សារព័ត៌មាន ខ្មែរផុស ស.រ.អា.

# KhmerPost USA

E-mail: info@khmerpost.us / Website : khmerpost.us
Advertising: 978-656-8141/ Hotline news: 1 (267) 253-3947

Free

Issue 149 March 07th - 20th, 2014

មាតិការឿង



New Office: Tel: (978) 677-7163 Fax: (978) 677-7092
45 Merrimack St. Suite 218A Lowell, MA 01852

# ខ្សែភាពយន្តខ្មែរ "រូបភាពដែលបាត់បង់" របស់ រិទ្ធី ប៉ាន់ ទៅកាន់ហូលីវូដ

## Missing Picture becomes the first Oscar nominee from Cambodia

### Film by Rithy Panh nominated for Best Foreign Film




ដោយ : សុខា

រូបភាពក្រេឌីតដល់ទំព័រហ្វេសប៊ុកលោក រាសី សាលសន្និសីទ ដាល់ប៊ិ, ឡូស អេនជឺឡេស: "To hang on you must hide within yourself a strength, a memory, an idea that no one can take from you," he says in the film. "For if a picture can be stolen, a thought cannot." មានន័យថា "ចាំឱកាសល្អមកដល់ គឺអ្នកត្រូវលាក់ទុកក្នុងខ្លួនអ្នកឱ្យបាននូវកម្លាំងចិត្តការចងចាំ និងឧត្តមគតិដែលពុំមាននរណាម្នាក់អាចបេះយកពីអ្នកបាន ព្រោះទោះបីជាទិដ្ឋភាពទាំងអស់នោះ ត្រូវបានគេលួចបាត់ទៅហើយឧត្តមគតិរបស់អ្នកគង់នៅមិនសាបសូន្យឡើយ" ស្រង់ប្រសាសន៍របស់លោក ឫទ្ធី ប៉ាន់ ដែលបានផ្តល់ដល់សារព័ត៌មានវិលស្ទ្រីត នាពេលថ្មីៗនេះ **តទៅទំព័រទី ០៣**

# ដំណើរទៅ "ឡុងប៊ិច" ក្រុងដែលមានខ្មែររស់នៅច្រើនជាងគេនៅស.រ.អា. (ភាគ២)

**ពិន សំខុន សម្រាប់ខ្មែរផុសស.រ.អា.**

យើងទៅដល់ "ឡុងប៊ិច" ថ្ងៃអង្គារល្ងាច ដើម្បីចូលរួមពិធីមង្គលការក្មួយនៅថ្ងៃសុក្រ-សៅរ៍-អាទិត្យ ដូច្នេះយើងនៅ សល់ពេល២ថ្ងៃដែរ




**តទៅទំព័រទី ០២**

## អត្ថបទទស្សនៈ

# "អព្យាក្រឹត្យភាព"

**ដោយ : ពិន សំខុន**

អ្នកអានម្នាក់បាននិយាយមកកាន់យើងថា "ខ្មែរផុសកាន់ជើងវត្តក្រោម" ក្នុងពេលប្រជុំមួយស្តីអំពីគំនិតបញ្ចូលវត្តលើនឹងវត្តក្រោមឱ្យទៅជាវត្តត្រៃរតនារាម **តទៅទំព័រទី ១៦**



# កិច្ចប្រជុំពិភាក្សាអំពីនីតិបញ្ញត្តិដោយសភាពាណិជ្ជកម្មក្រុងឡូវែល

**អត្ថបទដោយ : រីឆាដ ហូវ**
**ប្រែសម្រួលជាភាសាខ្មែរដោយ: សុខា**

**ក្រុងឡូវែល :** នៅថ្ងៃទី២៥ ខែកុម្ភៈ ឆ្នាំ២០១៤ សមាជិក៤០០ទៅ៥០០នាក់មកពីតំបន់ជាច្រើនក្នុងសហគមន៍បានអញ្ជើញចូលរួមកិច្ចប្រជុំមួយប្រព្រឹត្តទៅនៅមជ្ឈ **តទៅទំព័រទី ១៧**

# Greater Lowell Chamber of Commerce

**Legislative Breakfast**
**by Richard P. Howe Jr.**

On February 25, 2014 several hundred members of the local business community gathered at the UMass Lowell Inn & Conference Center for the annual Greater Lowell Chamber of Commerce Legislative Breakfast. Congresswoman Niki Tsongas and several members of

**Continued to page 17**





តមកពីទំព័រទី ១

# ដំណើរទៅ"ឡុងប៊ិច" ក្រុងដែលមានខ្មែរ...

សម្រាប់ទស្សនាកន្លែងសំខាន់ៗនៃក្រុង"ឡុងប៊ិច"។ ជួបពិភាក្សាជាមួយ លោក ធីរ៉ា ស្រី ជាចាស់ទុំក្នុងតំបន់នឹងជាអ្នកផ្សាយវិទ្យុសមាគមខ្មែរទ្វីបអាមេរិក តាំងពីជាង២០ឆ្នាំមកហើយ លោកបានឱ្យដឹងថា "កម្មវិធីផ្សាយរបស់សមាគមមានជាទូទៅ គឺផ្សាយអំពីកម្មវិធីអប់រំ ចំណែកឯទូទស្សន៍ខ្មែរឡុងប៊ិច ឥឡូវដួលអស់ហើយ ដូចជាទូទស្សន៍លោកសារីទូទស្សន៍លោកអារុណអឿន ពីព្រោះខ្មែរមិនសូវគាំទ្រគ្នាមិនដូចសហគមន៍យួនទេ ខ្មែរៗឥឡូវគេនិយមតែទូទស្សន៍ពីស្រុកខ្មែរទិញ"ខេបិល"ដាក់មើល ។ រីឯកាសែតខ្មែរក៏ដួលស្ទើរអស់ទៅហើយដែរ កាសែតអង្គរបូរីសេរីភាព "ឃែម ញូ" "ខេមបូឌាថៃម"នៅសល់មួយទើបបើកថ្មី គឺកាសែត "សំឡេងខ្មែរ" ចំណែកខ្មែរប៉ុស្ដិ៍ខានឃើញចេញច្រើនខែ ហើយមិនដឹងជាយ៉ាងម៉េចទេ"។

លក់គ្រឿងទេស ត្រីសាច់នឹងម្ហូបអាហារចំអិនស្រាប់មានហាងសំអាងកាយសម្រស់មុខមាត់ ហាងមាសពេជ្រ តុបតែងមានលក្ខណៈជាខ្មែរ,... ធ្វើឱ្យតំបន់នេះអ៊ូអរមានមោទនភាពជាខ្មែរទាក់ទាញអារម្មណ៍អ្នកឆ្លងកាត់ឱ្យចង់ដឹងពីជនជាតិថ្មីដែលមកបង្កើតមុខរបររកស៊ីនៅទីនេះ ជាពិសេសគេកត់សំគាល់ឃើញអាគារដ៏ធំមួយសំណង់ក្បាច់





ផ្លូវអាណាហែមក្រុងខ្មែរ


មនោរម្យ
ប៉ាស៊ិន ផាន្ទ ប្រធានក្រុងខ្មែរ
ហ្គារី អ៊ិង


ទីស្នាក់ការមាតុភូមិ កន្លែងដែលខ្មែរប៉ុស្ដិ៍ចាប់កំណើតក្នុងឆ្នាំ២០០៧

សហគមន៍ខ្មែរគ្មានដំណឹងពីសហគមន៍ខ្លួន គឺគ្មានទំនាក់ទំនងគ្មានកញ្ចក់ឆ្លុះរូបសម្បត្តិនឹងទស្សនៈសម្បត្តិ សង្គមខ្លួនដែលចង្អុលបង្ហាញថាមិនមានការរីកចំរើនបានទេ តែនៅពេលជួបជាមួយគណកម្មការ "ក្រុងខ្មែរ" លោក ប៉ាស៊ិន ផាន្ទ ជាប្រធានមនោរម្យ នេត ជាអនុប្រធាន ហ្គារី អ៊ិង ជាសមាជិកបានបង្ហាញពីភាពផ្ទុយទៅវិញថា "តាំងពីក្រុងខ្មែរកោតឡើងមកទល់ពេលនេះមានការរីកចំរើនប្លែកពីមុនច្រើនណាស់អ្នករកស៊ីក៏ប្រកបមុខរបរបានប្រសើរជាមុនដែរ"។

**(Cambodia Town ) ក្រុងខ្មែរ**

ថ្វីត្បិតតែមានប្រជាជនខ្មែរច្រើនរស់នៅលាតសន្ធឹងលើផ្ទៃដីដ៏ធំទូលាយ"ក្រុងខ្មែរ"ស្ថិតលើផ្នែកមួយភាគប៉ុណ្ណោះនៃផ្លូវ"អាណាហែម ។ មានពាណិជ្ជកររកទទួលទានលក់ដូររបស់របរមកពីស្រុកខ្មែរយ៉ាងកុះករ ។ គេច្រើននាំបងប្អូនដែលមកពីឆ្ងាយឱ្យស្គាល់ភោជនីយដ្ឋានធំៗ៣នៅក្រុងខ្មែរ"គឺ ១-ហាក់ ហេង ២-ស្ថានសួគ៌ ៣-"ឡាលូន" ដែលហាំហួនអ៊ូអរ ចាប់ពីល្ងាចថ្ងៃសុក្រទៅមានក្រុមតន្ត្រីសម័យលេងភ្លេងកំដរមិនឈប់ខុសពីតំបន់ណាៗទាំងអស់ដែលភ្លេងផ្ដើមបន្ទរតែល្ងាចថ្ងៃសុក្រនឹងល្ងាចថ្ងៃសៅរ៍តែប៉ុណ្ណោះ។ នៅមានហាងផ្សេងៗទៀតជាច្រើន ដូចជាហាងក្បូរខ្មែរសម្រាប់ជាទីផ្ដុំ "បីសណោសខ្មែរតូចៗ" តែដល់ចូលទៅខាងក្នុង ទើបមានឃើញការតុបតាំងរូបភាពពាសពេញដោយការផ្សាយរូបថតរបស់ចលនាគណបក្សប្រជាជននឹងសម្ភិទ្ធផលរបស់គណបក្សប្រជាជនជាអ្នកកាន់អំណាចនៅកម្ពុជាបានធ្វើឱ្យអាគាររូបរាង "វប្បធម៌ខ្មែរ"នេះក្លាយជាអាគារ "ការងារនយោបាយកម្ពុជាបច្ចុប្បន្ន"ទៅវិញ ។



កាសែតខ្មែរនៅឡុងប៊ិច

នៅអាគារពាណិជ្ជឿងទើបលាបថ្មីនៅមិនឆ្ងាយប៉ុន្មានពីអាគារខ្មែរនោះ គឺជាទីស្នាក់ការនៃ "សមាគមខ្មែរជួជនៅជាន់លើ រីឯនៅខាងក្រោមមានទីស្នាក់ការ"ក្រុងខ្មែរ"នៅក្នុងនោះ។ គឺនៅទីចុងក្រោយនេះហើយដែលយើងទទួលការពន្យល់មួយចំនួនស្ដីអំពីក្រុងខ្មែរនឹងប្រជាពលរដ្ឋនៅទីនោះ ។ គណកម្មការក្រុងខ្មែរមានសមាជិក១៧រូបគ្រប់គ្រងតំបន់សេដ្ឋកិច្ចមួយស្ថិតនៅផ្លូវ "អាណាហែមក្រុងនៃឡុងប៊ិចរដ្ឋកាលីហ្វ័ញ៉ា"។ លោកប្រធាន ផាន្ទ និយាយថា "គណកម្មការក្រុងខ្មែរជាអ្នករៀបចំបុណ្យធំៗទាំងឡាយដែលរៀបចំនៅលើផ្លូវអាណាហែមជាកិត្តិយសដល់វប្បធម៌នឹងប្រជាពលរដ្ឋខ្មែរតាំងពីឆ្នាំ២០០៧មកម្លេះ ដូចជាបុណ្យចូលឆ្នាំខ្មែរជាដើម..."។ ថ្វីត្បិតតែមានធ្វើសកម្មភាពជាច្រើនជាប្រយោជន៍ដល់សហគមន៍ខ្មែរតាំងជាង៦ឆ្នាំមកហើយក្ដី ក៏គណកម្មការនេះនៅតែធ្វើការស្វែងរកថវិការដោយខ្លួនឯងយ៉ាងលំបាកសម្រាប់គ្រប់គ្រងការងាររដ្ឋបាលរបស់ខ្លួននៅឡើយ។ សាលាក្រុងឡុងប៊ិចបានឱ្យដឹងថា បើស្ទង់មតិទៅឃើញថា "ប្រជាពលរដ្ឋលើស៥០ភាគរយ ព្រមចូលជាសមាជិក"សមាគមក្រុងខ្មែរ" គេនឹងធ្វើការប្រមូលថវិការសម្រាប់អភិវឌ្ឍប្រចាំឆ្នាំប្រគល់មកឱ្យធ្វើការតែ គួរឱ្យអនិច្ចាការធ្វើស្ទង់មតិនោះ ផ្ដល់ការគាំទ្រដល់ក្រុងខ្មែរតែ៣៨ភាគរយតែប៉ុណ្ណោះ ធ្វើឱ្យខ្ញុំឆ្ងល់ថា "បើគណកម្មការនេះមានសារសំខាន់សម្រាប់ពលរដ្ឋយ៉ាងនេះ ហេតុអ្វីខ្មែរឡុងប៊ិចមិនគាំទ្រ? លោកអនុប្រធានមនោរម្យឆ្លើយថា "នៅផ្លូវអាណាហែមនេះបរទេសក៏មានច្រើនដែរ" ខ្ញុំនៅតែមិនអស់ចិត្តថាបរទេសក៏ដោយ ក៏ត្រូវតែជួយគាំទ្រដល់អង្គការដ៏មានសារសំខាន់មួយនេះដែរ ពីព្រោះអីក៏គេអ្នកនាំភ្ញៀវឱ្យចូលក្រុងឱ្យឃើញ"ពាណិជ្ជកម្ម"របស់ខ្លួនដែរ ។ ខ្ញុំបានប្រៀបធៀបទៅផ្លូវ "អាណាហែម" កាលពី៧ឆ្នាំមុនជំនាន់អ្នកស្រី សទ្ធាសាន់ ជាប្រធានក្រុងខ្មែរទី១មកផ្លូវ "អាណាហែម" ឥឡូវនេះ ឃើញថាសោភណ្ឌភាពពេលនេះស្អាតប្លែកច្រើនណាស់ហើយ ។ ថ្នល់នឹងចិញ្ចើមថ្នល់ស្អាតភ្លឺងអាគារពាណិជ្ជកម្មជួសជុលលាបពណ៌បានស្អាតបាទទង់ជាតិនឹងទង់ក្រុងខ្មែរបក់រវិចតាមដងផ្លូវគួរឱ្យមោទនភាពសមតែឱ្យ"ក្រេឌីត"ទៅក្រុមអ្នកគ្រប់គ្រងបានហើយ... តែអ្នកដំណើរតាមហាងខ្លះជាម្ចាស់ស្រុកដែរនិយាយថា "ការ

**តទៅទំព័រទី ២៣**

តមកពីទំព័រទី ១

## ខ្សែភាពយន្តខ្មែរ "រូបភាពដែលបាត់បង់...

ខណៈដែលលោកត្រូវបានភ្នាក់ងារព័ត៌មានជាតិ និងអន្តរជាតិជាច្រើនសុំផ្តល់បទសម្ភាសន៍អំពីដំណើររបស់លោកមកកាន់សហរដ្ឋអាមេរិកផ្តើមចេញពីស្នាដៃភាពយន្តរូបភាពដែលធ្វើពីដីឥដ្ឋមានអត្ថន័យរំលឹកដល់អតីតកាលនៃខ្សែជីវិតរបស់លោកផ្ទាល់នាសម័យសម្លាប់រង្គាល។ ខ្សែភាពយន្តនោះមានចំណងជើងថា រូបភាពដែលបាត់បង់ "Missing Picture" ។ ថ្ងៃអាទិត្យ ទី២ នៃខែមីនា ជាថ្ងៃសំខាន់របស់លោក ឫទ្ធី ប៉ាន់ និងប្រជាពលខ្មែរទូទាំងប្រទេស និងកន្លែងផ្សេងៗទៀតនៃពិភពលោកដែលមានខ្មែររស់នៅ ព្រោះជាថ្ងៃដែលភាពយន្តខ្មែររូបភាពដែលបាត់បង់ "Missing Picture" ដែលជាស្នាដៃ របស់លោក ឫទ្ធី ប៉ាន់ ត្រូវបានផ្តល់នាមជាកុនមួយដាក់ក្នុងវិញ្ញាសាជ្រើសរើសពានរង្វាន់អស្ការនៃកុននិយាយភាសាបរទេសដែលល្អជាងគេបំផុត។

ក្នុងនោះចំណុចពិសេសនៃកុននេះពុំមានប្រើប្រាស់មនុស្សពិតឡើយ ពោលគឺប្រើដីឥដ្ឋដែលដីទាំងនោះត្រូវបានសូនឡើង ជារូបមនុស្សជាង៥០០រូប ប្រើប្រាស់ទៅតាមឈុតឆាកផ្សេងៗតាមការចងចាំនូវរឿងរ៉ាវ និងមនុស្សទាំងអស់ដែលបានប្រាស្រ័យទាក់ទងជាមួយលោក ឫទ្ធី ប៉ាន់ ផ្ទាល់បកត្រឡប់ទៅទសវត្សរ៍៧០។ គួរបញ្ជាក់ផងដែរ អ្នកសូនរូបមាននាមថា ម៉ាង សារិត។ រូបដីឥដ្ឋនៃក្មេងប្រុសពាក់អាវពណ៌ស៊ីជម្ពូពងជើងចក់ដែលជារូបលោក ឫទ្ធី ប៉ាន កាលពីនៅក្មេងនោះ ត្រូវបានទទួលការចាប់អារម្មណ៍ និងល្បីល្បាញក្នុងទំព័របណ្តាញទំនាក់ទំនងសង្គម ធ្វីតធឺ និងហ្វេស ប៊ុក ហើយ ក៏មានការបោះពុម្ពផលិតអាវពងជើងចក់ពណ៌ស៊ីជម្ពូនោះពាក់ដោយអ្នកគាំទ្រវណ្ណកម្មនេះជាច្រើន។

ជាលទ្ធផលនៅក្នុងការប្រកួតខាងលើភាពយន្តរូបភាពដែលបាត់បង់ "Missing Picture" មិនបានទទួលជ័យលាភីឡើយ។ យ៉ាងណាមិញត្រឹម១៥វិនាទីនៃការបញ្ចាំងកុនរូបភាពដែលបាត់បង់ "Missing Picture" នេះដោយសង្ខេបលើផ្ទាំងសំពត់សនៃរោងសន្និសីទដាល់ប៊ីកម្រិតហូលីវូដចាត់ទុកជាជោគជ័យដ៏ធំធេងសម្រាប់ព្រះរាជាណាចក្រកម្ពុជា ព្រោះក្នុងរាត្រីប្រកាសលទ្ធផលពានរង្វាន់អស្ការនោះ ទស្សនិកជនរាប់លានកោដិនាក់ទាំងអ្នកដែលមានវាសនាចូលរួមកម្មវិធីដោយផ្ទាល់ និងទស្សនិកជនតាមកញ្ចក់ទូរទស្សន៍ត្រៀមខ្លួនមើលមិនដាក់ភ្នែកស្វែងរកម្ចាស់រង្វាន់។ តិច ឬច្រើនសម្លេងខ្មែរបានជ្រួតជ្រាបក្នុងអារ្យប្រទេស និងប្រទេសនានាលើពិភពលោកមានសារប្រយោជន៍ក្រៃលែង ទីមួយ គឺពិភពលោកមើលឃើញខ្មែរក្នុងន័យវិជ្ជមានតាមរយៈគុណភាពនៃស្នាដៃកុនខ្មែរដែលឈានជើងទៅកាន់ហូលីវូដ ហើយក៏ជាយានឱ្យវិស័យដទៃទៀត នៅប្រទេសខ្មែរត្រូវបានទទួលការចាប់អារម្មណ៍ផងដែរ។ ទី២ គឺការលាតត្រដាងនូវប្រវត្តិសាស្ត្រខ្មែរនាជំនាន់នោះ ទៅដល់សាធារណជនជាតិ និងអន្តរជាតិបានដឹងឮសព្ទសាយឡើង។

ការប្រើប្រាស់អតីតកាលស្រាវជ្រាវអត្តសញ្ញាណបង្កើតទៅជាឧត្តមគតិ និងស្នាដៃជាចំណុចពិសេសចាត់ទុកកម្មសិទ្ធដ៏ពិសិដ្ឋនៃមនុស្សជាតិ។ សូមឱ្យគុណតម្លៃមួយនេះបានកើតឡើង និងស្ថិតក្នុងដួងព្រលឹងនៃកូនខ្មែរគ្រប់រូប៕

ប៊ូច រាសី VOA សម្ភាសន៍ ជាមួយតួកុន រិទ្ធី បាន់

THE MISSING PICTURE

រូបចម្លាក់សប្បនិម្មិតឆ្លាក់ពីដីឥដ្ឋចេញពីការចង់ចាំរបស់ រិទ្ធី ប៉ាន់ កាលពីសម័យខ្មែរក្រហមគ្រប់គ្រងកម្ពុជា




**តពីលេខមុន**

-សម្រាយដោយខ្មែរផុស ស.រ.អា.

កាលពីលេខមុនយើងបានពីពណ៌នាអំពីចង់ក្លាយជាអ្នកមានត្រូវមានជំនឿក្នុងខ្លួនហើយ "ប្រាថ្នាចង់មាន" ចំណង់នេះធ្វើឱ្យយើងរៀបរូបរាងកាយរបៀបរបបរស់នៅនឹងចរិយាសម្បត្តិឱ្យទ្រព្យអាចហូរចូលមកផ្ទះយើងជាបន្តបន្ទាប់មិនដាច់យើងអាចនឹងប្តូរបរិយាកាសរស់នៅក្នុងចំណោមអ្នកដែលមានសេចក្តីប្រាថ្នាដូចគ្នា ដើម្បីលើកទឹកចិត្តគ្នាទៅវិញទៅមក ។ ការដែលប្រាប់គេថា "មិនចង់មាន" តែបន់ស្រន់ប្រាថ្នាឱ្យព្រះជួយឱ្យ "មានបាន" គឺជាការកុហកខ្លួនឯងដែលនឹងនាំឱ្យយើងប្រព្រឹត្តអំពើមិនគប្បីវានឹងទប់ស្កាត់ទ្រព្យមិនឱ្យហូរចូលជាមិនខាន ។ បើយើងមិននិយាយពីអ្វីដែលយើងចង់ធ្វើ ពីព្រោះយើងយល់ថា ពេលខ្លះអ្នកជុំវិញយើងមិនជួយអបអរយើងទេ ក៏យើងឥតបានកុហកនរណាដែរទេ ឥតកុហកខ្លួនឯងទេ ដូច្នេះកុហក ឬយកសម្បត្តិអ្នកដទៃមកធ្វើជាសម្បត្តិរបស់ខ្លួនហៅថា "លួច" ជាអំពើបាបនាំឱ្យមិនយូរមិនឆាប់នឹងមានទោសដែលយើងត្រូវស្គាល់នឹងជៀសវាងឱ្យបាន។ ទ្រព្យហូរមកហើយយើងត្រូវចេះធ្វើហូរចូលរឹតតែច្រើនជាវិធីដែលយើងនឹងរៀបរាប់ដូចតទៅ :

**៣-ឱ្យប្រាក់សន្សំបង្កើតកូនខ្លួនឯង:** ជាទូទៅប្រាក់រកបានដោយប្រាក់បៀវត្សរ៍សុទ្ធសាធនោះ យកទៅសន្សំបានតិចតួចតែយើងមានវិធីច្រើនយ៉ាងដែលយើងអាចប្រើលុយឱ្យធ្វើការរកលុយជំនួសឱ្យយើងបាន ។ រៀងរាល់ពេលយើងចូលទៅធ្វើការកន្លែងណាមួយគេតែងសួរនាំឱ្យអ្នកធ្វើការដាក់ប្រាក់សន្សំសម្រាប់បើកបាន នាពេលចូលនិវត្តន៍ប្រាក់នោះគេយកទៅដាក់ធានាគារពិសេសមួយដែលធានាឱ្យមានការប្រាក់លើប្រាក់សន្សំនោះគេថែមទាំងយកប្រាក់នោះទៅលេង "ស្តុក" ដោយអ្នកឯកទេសយកប្រាក់យើងទៅធ្វើឱ្យមានប្រាក់ចំណេញមកបន្ថែមលើការប្រាក់ថែមទៀតនេះហៅថា "លុយបង្កើតកូន" តែដែលគួរឱ្យស្តាយនោះ គឺក្រសួងពន្ធដារស.រ.អា. គេកាត់យកតាក់២០ភាគរយទៅវិញ នៅពេលបើកលុយចូលនិវត្តន៍ តែក៏នៅតែច្រើនគួរសមទទួលបានដែរ ។ នៅក្រៅកន្លែងធ្វើការក៏គេអាច "សន្សំលុយដែលបង្កើតកូនបាន" នៅធានាគារបានដូចគ្នាដែរ តែយើងត្រូវតែធ្វើការសន្សំតក់ៗនោះ យ៉ាងព្យាយាមយ៉ាងសប្បាយចិត្ត ទោះបីជាមានការលំបាកខ្លះក៏ដោយពីក្រៅពីនេះទម្លាប់នៃសង្គមយើងមិនឱ្យតម្លៃទៅនឹងការរៀបខ្លួនសម្រាប់ប្រាក់សន្សំនោះទេយើងត្រូវបង្ខំខ្លួនខ្លះ ភ្លេចៗខ្លួន ស្រាប់តែ២០-៣០ឆ្នាំក្រោយមក ទើបយើងភ្ញាក់ខ្លួនថា "សម្បត្តិបានកើនយ៉ាងគួរសង្ឃឹមបាននៅពេលចូលនិវត្តន៍" ទេតើ? ក្រៅពីនេះសន្សំក្នុងឬក្រៅកន្លែងធ្វើការគេក៏អាចសន្សំតាមការទិញអចលនវត្ថុមានដី ឬផ្ទះដែលថ្លៃឈ្នួលផ្ទះក្លាយជាប្រាក់សន្សំដាក់ក្នុងផ្ទះខ្លួនឯង ពេលខ្លះកើនកំរៃខ្លាំងនៅពេលលក់ទៅវិញនឹងបានចំណេញច្រើន ។ ប្រាក់សន្សំផ្សេងទៀតគឺការទិញកម្មវិធី "ធានាជីវិត" បូកនឹងការសន្សំតក់ៗដែលគ្រប់គ្រួសារគួរតែមានកុំចាំចាស់សិមទិញពីព្រោះវាឡើងថ្លៃបង់ប្រចាំខែ ឬក៏ទិញមិនបាន គឺជាទស្សនៈពិបាកយល់បន្តិចយើងត្រូវរកអ្នកឯកទេសមកជួយពន្យល់... លោក ញ៉យ ចំរើន អ្នកឯកទេសខាងវិនិយោគបានឱ្យឈ្មោះការដាក់ប្រាក់សន្សំរបៀបនេះថា "ចេះស្លាប់ឆ្លាត" ពីព្រោះនរណាក៏ស្លាប់ដែរ តែបំណាច់នឹងស្លាប់ទៅហើយ ក៏អាចទុកកេរ្តិ៍ខ្លះឱ្យប្រពន្ធឱ្យកូនបានដែរ ។ នេះជាការទិញប្រាក់ធានាជីវិតមែនក្នុងតម្លៃ១០ម៉ឺន៥០ម៉ឺន ឬ១លានវាជាប្រាក់សន្សំតក់ៗក្លាយជាច្រើនមើលមិនឃើញ កាលណាយើងដាក់សន្សំយ៉ាងទៀងទាត់ វានឹងជួយដល់ខ្លួនឯងសំរាប់ដោះទាល់ម្តងៗនៅ១០-២០ឆ្នាំក្រោយ ជាពិសេសជួយដល់កូនជំនាន់ក្រោយឱ្យអាចប្រឈមមុខនឹងតម្លៃសិក្សានៅពេលត្រូវ **តទៅទំព័រទី ៩**





# "ក្រូណូ" ឬកាលប្បវត្តនយោបាយក្នុងប្រទេស

**(ភាគបន្តពីលេខមុន)**

**ដោយៈ ហ្វ្រង់ស្វ័រ ប៉ុងសូ (អ្នកនិពន្ធសៀវភៅ "ឆ្នាំសូន្យ")**

**ប្រែសម្រួលពីភាសាបារាំងដោយខ្មែរផុស**

*ថ្ងៃ១៤មករា សម រង្ស៊ី និងលោក កឹម សុខា មេដឹកនាំគណបក្សសង្គ្រោះជាតិបានទៅបង្ហាញខ្លួនតាមការកោះហៅនៅតុលាការក្រុងភ្នំពេញដើម្បីសួរអំពីតួរនាទីអ្នកទាំងពីរនៅក្នុងបាតុកម្មកាលពីខែធ្នូមុន ។ មនុស្សគាំទ្រជាង១ពាន់នាក់ មិនបានស្តាប់តាមបញ្ជាតាមការហាមប្រាមអាជ្ញាធរមិនឱ្យមានការប្រជុំកាលពីថ្ងៃទី៤មករាទេ ហើយមកឈរយ៉ាងស្ងៀមស្ងាត់នៅមុខសាលាក្តីក្រុង ។ ឡានធំ១៣គ្រឿនផ្ទុកពេញដោយក្រុមយោធាចតនៅក្បែរនោះ យុវជនស្លៀកស៊ីវីលប្រមាណ៣០នាក់ពាក់មួកម៉ូតូមានដំបងដែកនឹងដំបងឈើ (ក្រុមឈ្លបរបស់ ហ៊ុន សែន ដូចពេលមុនដេញវាយព្រះសង្ឃកាលពីថ្ងៃ២មករា ឈរជារនាំងនៅពីមុខអាគារក្រុង ។ អ្វីៗបានព្រឹត្តិការណ៍ទៅក្នុងសភាពស្ងប់ស្ងាត់។ វ៉ង ឈុន ប្រធានសហជីពកម្មករបានមកតុលាការឆ្លើយតបនឹងសេចក្តីកោះហៅជាលើកទី២ ដោយពុំមានការបារម្ភ។



លោក ហ៊ុន សែន នាយករដ្ឋមន្ត្រី

លោក សុរិយ [illegible] ណាង អ.ស.ប



កឹម សុខា និង សម រង្ស៊ី ដឹកនាំបាតុកម្ម

**ប្រតិកម្មសហគមន៍អន្តរជាតិៈ**

ថ្ងៃ១៣មករា ព្រឹទ្ធសភាអាមេរិកាំងបានអនុម័តសេចក្តីស្នើ ចុះហត្ថលេខាដោយប្រធានាធិបតីអូបាម៉ាថ្ងៃទី១៧ កាត់ជំនួយមួយចំនួនទៅកម្ពុជារហូតដលមានការស្រាវជ្រាវរកការពិតដល់ការបោះឆ្នោតកាលពីថ្ងៃទី២៨កក្កដា២០១៣ រហូតដល់មានការកែរទម្រង់នៃការបោះឆ្នោត រហូតដល់ឈប់មានពហិការរបស់សមាជិកសភាបក្សប្រឆាំងសហរដ្ឋអាមេរិកនៅផ្តល់ជំនួយ៨៩លានដុល្លា (ក្នុងជំនួយ១ពាន់លាន)ដែលមួយភាគធំផ្តល់ទៅឱ្យអង្គការក្រៅរដ្ឋាភិបាល។ ជំនួយដែលផ្តល់ទៅសម្រាប់លើកដំកើងសិទ្ធិមនុស្សទៅយោធានឹងសំណើនោះ មិនប៉ះពាល់ទេ ដូច្នេះគឺគ្រាន់តែជាការប្រមានមិនមានប្រសិទ្ធភាពទេ។ សំណើរនោះក៏បានបញ្ជាទៅធានាគារពិភពលោកអោយធ្វើតាមគំរូដំណើការណ៍ដូចគ្នា ហើយរាយការណ៍ឱ្យបានទៀងទាត់មកសភាស្តីពីជំនួយដែលផ្តល់ទៅជនដែលត្រូវបានបណ្តេញពីទំបន់បឹងកក់។

អង្គការ "លីកាដូ" បានចោទស.រ.អា.ថា នៅតែគាំទ្រយោធាខ្មែរដែលទទួលខុសត្រូវលើអំពើ

**តទៅទំព័រទី ១១**

**តមកពីទំព័រទី ៤** សន្សំតក់ៗ....

ចូលមហាវិទ្យាល័យ ឬក៏សម្រាប់មុខរបរជំនួញនានាដល់ពេលម៉ែឪស្លាប់ទៅ ក៏ក្លាយជាកេរ្តិ៍អាកររបស់កូនសម្រាប់កសាងអនាគតប្រសើរបានដែលប្រសើទៅទៀតនោះ ច្បាប់មិនអនុញ្ញាត្តឱ្យ IRS ឥតកាត់"តាក់"ទេ ។ ខ្មែរយើងមិនចូលចិត្តធ្វើជំនួញ ម្លោះហើយវិធីសន្សំទាំងប៉ុន្មានខាងលើប្រាកដជាអាចធានាថានឹងមានប្រាក់លានបានដែរ ។ រីឯខ្មែរកូនចៅចិនគេចូលចិត្តមុខរបរក្នុងជំនួញ គេជួញហើយគេសន្សំតាមរបៀបរកប្រាក់ចំណេញបានច្រើន ជាជីវិតដែលខ្លួនឯងធ្វើការនាំប្រាក់ចូលច្រើនរាល់ថ្ងៃយ៉ាងប្រឹងប្រែងនឹងឆ្លាតវៃ ហើយគេយកប្រាក់សល់ច្រើននោះទៅឱ្យធ្វើការជំនួសគេបន្ថែមទៀត ពីព្រោះជាវិធីមិនហត់នឿយដោយសារលុយឯណុះទេ ដែលធ្វើការរកជំនួសខ្លួនរួចហើយ រិតតែកើនសម្បត្តិថែមទៀត។ មានសេដ្ឋីខ្មែរចៅចិនម្នាក់រស់នៅមានពាណិជ្ជកម្មនៅ "តិចសាស់" គាត់ថា "មនុស្សក្លាយជាអ្នកមានម្នាក់បានមិនមែនចៃដន្យទេ ទី១-ត្រូវមានសំណាងមួយមកដល់ ទី២-ត្រូវត្រៀមរង់ចាំសំណាងនោះដោយចំណេះនឹងប្រឹងរៀនសូត្រ ទី៣-ត្រូវមានការព្យាយាម សុច្ចរឹត ក្លាហាននឹងឆក់ឱកាសដ៏កម្រឱ្យបានគាត់នឹងភរិយាជាតិចិនហុងកុង មានកីរតចេះដឹង "ម៉ាសស្ទឺរ"ដូចគ្នាប្តីធ្វើការជា"អាកោងទីង"។ ថ្ងៃមួយគាត់ជិះម៉ូតូកំសាន្តមាត់សមុទ្រជាមួយភរិយាបានជួបម្ចាស់កុប៉ាល់ធំមួយមានដឹកបង្គារ៥០តោនក្នុងនោះ គាត់ចរចាល្បងលេងស្រាប់តែត្រូវថ្លៃគ្នាបានបង្គារទាំងអស់ក្នុងតម្លៃយ៉ាងថោក ហើយម្ចាស់កុប៉ាល់ក៏លក់បានតម្លៃល្អដែរ គាត់រីករាយ និងឱ្យដាក់ប្រាក់កក់នឹងសងប្រាក់ក្នុងរយៈពេល៣ខែ២នាក់ប្តីប្រពន្ធក៏ចាប់ធ្វើការលក់បង្គារឱ្យហាងអាស៊ីជុំវិញស.រ.អា។ ជាមួយនឹងចំណេះនឹងបទពិសោធន៍ពាណិជ្ជកម្មដែលខ្លួនមានបីខែយ៉ាងនឿយហត់

**តទៅទំព័រទី ៦**

# គំនិតច្នៃប្រឌិតប្រតិស្ឋឡើងក្នុងវប្បធម៌ តាមរយៈផលិតកម្មហ្វ្លាយអ៊ឹងអប

James Ostis, Khmer Post USA staff writer

សេចក្ដីផ្ដើមគឺរាប់ចេញពីទំព័រមុខសៀវភៅ។ អំឡុងឆ្នាំ២០០៥ ជាងថតរូប ជីម ហ៊ីកហ្គីន ត្រូវការអ្នកបង្ហាញម៉ូដសម្រាប់តាំងឡើងនៅលើទំព័រមុខសម្រាប់ស្នាដៃបោះពុម្ពផ្សេងៗគ្នាដែលលោកបានធ្វើ។ មិត្តភាពដែលមានជាច្រើនឆ្នាំរវាង ធីមធូ និងជីម ហ៊ីកហ្គីន បាននាំឱ្យជីម ហ៊ីកហ្គីន ចាប់ផ្ដើមធ្វើការជាមួយសិល្បករពីររូបគឺម៉ូនីកា វិត និង សុភី ឡេង ក្នុងក្រុមរបាំអង្គរ។ អ្នកទាំងពីរមិនត្រឹមជាតួរាំដ៏ចំណានស្របគ្នានោះពួកគេទំនងជាតួសម្ដែងដ៏ចំណាប់ផងដែរ។ ផ្អែកទៅលើកិច្ចការដែលធ្វើរួមគ្នានោះ ក៏មានការបង្កើតនូវផលិតកម្ម ហ្វ្លាយអ៊ុងអប នេះឡើង ហើយ





បច្ចុប្បន្នស្នាដៃនៃផលិតកម្មនេះ កំពុងរ៉ាយរ៉ាប់រឿងរ៉ាវប្រទាក់ក្រឡាគ្នានៃតថភាពសង្គមក្នុងមធ្យោបាយដែលអស្ចារ្យ។

ហ្វ្លាយអ៊ឹងអបប្រភេទក្រុមហ៊ុនដែលផ្ដុំការសម្ដែងចម្រុះមានផលិតកម្មការសម្ដែងជាលក្ខណៈរាំ និងសម្ដែងផ្ទាល់នៅរោងល្ខោន។

លោក ជីម ហ៊ីកហ្គីនជាសហផលិតករជាមួយសុផល ងិន ហើយបានផលិតស្នាដៃគួរឱ្យចាប់អារម្មណ៍ជាច្រើន។

សូមស្វែងយល់ព័ត៌មានពិស្ដារក្នុងអត្ថបទទាំងមូលជាភាសាអង់គ្លេស៕

# Culture meets Creativity with Flying Orb Productions

It started with book covers. Around 2005, Lowell photographer Jim Higgins needed models to appear in cover images he was shooting for various publications. A longtime friend of Angkor Dance Troupe founder, Tim Thou, Higgins began working with Monica Veth and Sophy Leng, two members of the troupe who quickly proved to be more than just models but rather actors telling stories one frame at a time. With these early collaborations, Flying Orb Productions was born and today continues to tell engaging stories one frame at a time in a truly unique way.




Flying Orb is a multi-platform performance company, producing films, dance performances, and live theater shows. The cast, which after growing over the years, remains primarily made up of Cambodian-American veterans of the Angkor Dance Troupe. Flying Orb uses traditional legends and mythology as the basis of their experimental storytelling, presenting these ancient tales in creative and contemporary ways. Higgins credits the Dance Troupe with instilling a tremendous discipline and commitment to art in all of the



company's performers. Often Higgins or co-director Sophorl Ngin will provide the frame or outline of the story, but each of the performers ultimately fills in the details in their own personal way.

While live performance is a key piece of their portfolio-the group hosted their first stage production with 2011's Nectar of Immortality--Flying Orb is most known for their film work. Flying Orb utilizes a distinctive stop-motion camera technique where each frame in the film is actually a still photograph, rather than a piece of video footage. Some films will take over 200,000 still photographs to complete. The technique, coupled with Flying Orb's often-surreal content themes, give the productions a truly unique look.

Producing these films and performances is a lot of work and a labor of love, but Higgins has a simple approach. "If we're being creative and having fun, it makes it worth doing."

On March 18th, as the third part of Angkor Dance Troupe's Evolution of Cambodian Dance Film Series, Flying Orb Productions will present some of their recent works, including the award-winning short film, A Fairy's Tale. The company will also preview a clip from their upcoming film noir-inspired short, Kimset 91. Actors will also perform a live skit from their upcoming theatrical production, The Kingdom of Kambuja. The event will take place at the Lowell National Historical Park Visitor's Center from 6-8 p.m. and will be open to the public.

jamesostis@khmerpost.us

តមកពីទំព័រទី ៤ សន្សំតក់ៗ....

ក្រោយមកទូទាត់រួចអស់ទៅនៅចំណេញបាន ៣០ម៉ឺនដុល្លាលុយចូលចំណេញច្រើនយ៉ាងនេះគឺជាដើមទុនដ៏ពិតប្រាកដមួយអាចឱ្យពួកគេ ក៏បន្តមុខរបរនេះទៅមុខបាន...៥ឆ្នាំក្រោយមកសម្បត្តិគ្រួសារគាត់បានពូនឡើងរហូតដល់៦០លានដុល្លា ។

សម្រាប់គ្រួសារខ្មែរទូទៅនោះ ទោះជាមានសំណាងដូចគ្នានេះក៏ដោយ ក៏មិនអាចចាប់យកបានដែរ វិធីដែលខ្មែរយើងមានទម្លាប់រកស៊ីឱ្យ "លុយកើតកូន" នៅពេលមានប្រាក់កាសបន្តិចបន្តួច គឺយកលុយទៅ "ចងការ" វិធីយកការចំណេញជាប្រាក់១០ភាគរយពេលខ្លះដល់ទៅ២០ភាគរយក្នុង១ខែ គឺជាការ "រកស៊ីមានឆាប់ដោយសម្លាប់អ្នកទាល់ក្រ" មិនត្រូវយកខ្លួនបៀតក្នុង ជំនួញរបៀបនេះទេ រកស៊ី "ចងការ" នេះប្រទេសជឿនលឿនគេដាក់ទោស ហើយឈប់ប្រើច្រើនសតវត្សមកហើយ ។ រីឯការសន្សំប្រាក់ដោយលេង "តុងទីន" ក៏ជួយរកដើមទុនជួយគ្នាបានដែរ គេលេងតែជាមួយសង្គមមនុស្សសុច្ចរិតមនុស្សដែលមេទឹងកូនច្រើននាក់គេសំគាល់ថា "គ្រប់គ្រាន់" ច្រើនឆ្នាំជាមនុស្សព្យាយាមប្រាថ្នាជួយគ្នាទៅវិញទៅមកយ៉ាងជាក់ច្បាស់ទើបប្រថុយបាន ពីព្រោះពុំអាចការពារតាមផ្លូវច្បាប់បាន ដូចនៅធានាគារទេ បើជៀសមិនលេងបានជាការល្អប្រសើរណាស់។

ជាការណែនាំទូទៅគេដឹងថា មនុស្សមានការលំបាកនឹងសន្សំតក់ៗបានដោយសារយើងនៅក្នុង "សង្គមអ្នកទិញ" មានការលំបាកនឹងទប់ចិត្តកុំឱ្យទិញបានណាស់ "ក្រេឌីតខត" ឬ "វីសាខត" សុទ្ធសឹងជាទំនាញឱ្យមនុស្សជំពាក់លុយគេកាន់តែច្រើនសងមិនរួច ។ ដូច្នេះការណែនាំរបស់អ្នកជំនាញការណ៍ គឺទប់ចិត្តឱ្យការជំពាក់គេចុះមកចំណុច "សូន្យ" ឱ្យបានជាមុនអ្វីទាំងអស់ ។

លេខក្រោយយើងនឹងនិយាយអំពីវិធីការពារលុយដែលបានមកហើយកុំឱ្យហូរចេញទៅវិញ៕ **(នៅមានត)**

# ជម្ងឺបាក់ស្បាត ៖ បញ្ហាសុខភាពសាធារណៈដែលមនុស្សគ្រប់គ្នាគួរយកចិត្តទុកដាក់

# PTSD: A Public Health Issue Should Be in Everyone's Mind

**By Visal Chin, MPH**
**February 15, 2014**

Post-traumatic stress disorder is a public health concern, which everyone should pay attention. When asked about health, everyone thinks about only his or her body that is free from any bodily ailment. They rarely pay attention to any mental health let alone PTSD.



Good health includes not only a healthy body but also a healthy mind. In 1946, the World Health Organization (WHO) initially defined health as "a state of complete physical, mental and social well-being and not merely the absence of disease or infirmity." This definition still rings true and has never been challenged until these days. In fact, these three components must be well maintained so as a person can be called healthy and live a happy life. Therefore, taking care of mental health, especially PTSD, is everyone's responsibility so long as everyone takes care of his or her own body. (Please read a complete English version in our website www.khmerpost.us )

**ដោយ ៖ ជិន វិសាល្ស អនុបណ្ឌិតសុខភាពសាធារណៈ**

ជម្ងឺបាក់ស្បាត ឬចាញ់ច្រាប គឺជាបញ្ហាសុខភាពសាធារណៈមួយដែលមនុស្សគ្រប់វ័យត្រូវ



ស្វែងយល់ និងយកចិត្តទុកដាក់ ។ នៅពេលរំលឹកដល់បញ្ហាសុខភាពមនុស្សម្នាក់ៗនឹកឃើញត្រឹមតែការមានកាយសម្បទាល្អ ឬរាងកាយដែលរួចផុតពីជម្ងឺតម្កាត់ផ្សេងៗដែលញាំញីរាងកាយប៉ុណ្ណោះ ។ ពួកគេកម្រនឹកឃើញដល់បញ្ហាសុខភាពផ្លូវចិត្តណាស់កុំថាឡើយនឹកឃើញដល់ជម្ងឺបាក់ស្បាត ។

សុខភាពល្អមិនមែនមានន័យត្រឹមតែការមានសុខភាពរាងកាយល្អប៉ុណ្ណោះទេ ប៉ុន្តែរាប់បញ្ចូលទាំងការមានសុខភាពផ្លូវចិត្តល្អផងដែរ ។ កាលពីឆ្នាំ១៩៤៦ អង្គការសុខភាពពិភពលោកបានកំណត់និយមន័យសុខភាព ថាជា "ស្ថានភាពនៃសុខុមាលភាពពេញបរិបូណ៌ទាំងផ្លូវកាយ ផ្លូវចិត្ត និងសុខុមាលភាពសង្គម ហើយមិនមែនត្រឹមតែភាពគ្មានជម្ងឺឬពិការភាពប៉ុណ្ណោះទេ"។ និយមន័យនេះនៅតែមានសុក្រិតភាព និងគ្មានការកែប្រែម្តងណាសោះរហូតមកដល់ពេលបច្ចុប្បន្ន ។ ជាការពិតណាស់ ទាល់តែកត្តារួមផ្សំទាំងបីនេះល្អ ទើបអាចចាត់ទុកមនុស្សម្នាក់ថាមានសុខភាពល្អ និងរស់នៅប្រកបដោយសេចក្តីរីករាយ ។

**តទៅលេខក្រោយ**





# យូក្រែនវំជើបរំជួល រុស្សីចូលលុក Ukraine in trouble

**ព័ត៌មានអន្តរជាតិ-ដោយ ខ្មែរផុសស.រ.អា.**

នៅចុងសប្តាហ៍ថ្ងៃទី១-២មីនានេះ ទ័ពពិសេសរុស្សីបានលើកទ័ពចូលលុកលុយតំបន់ខាងត្បូងនៃប្រទេស"យូក្រែន" ដែលមានឈ្មោះថា "គ្រីមិយា" ស្ថិតនៅជាប់មាត់ច្រកនៃ"សមុទ្រខ្មៅ" នៅពេលដែលផ្ទៃក្នុងនៃប្រទេសនេះ កំពុងបះបោរទាមទារធ្វើ ប្រជាមតិអស់រយៈពេល៣ខែមកហើយ ។ រំពេជនោះ ក្នុងបំណងយកទ័ព"អូតង់" មកគម្រាម ស.រ.អា នឹងសហភាពអឺរ៉ុបបានបញ្ចេញប្រតិកម្មខ្លាំងខ្លាថា"រុស្សីរំលោភសន្ធិសញ្ញាអន្តរជាតិ ដោយប្រើកម្លាំងទ័ពលុកលុយប្រទេសយូក្រែន" តែលោកប្រធានាធិបតីពុទីននៃប្រទេសរុស្សីនិយាយតបថា "ខ្លួនមានសិទ្ធនឹងលុកចូលយូក្រែន" ។

ដើមហេតុនៃភាពរំជើបរំជួលនេះ គឺនៅយូក្រែនប្រជាពលរដ្ឋភាគច្រើននិយាយភាសារុស្សី រីឯនៅ"គ្រែមិយា"ពលរដ្ឋភាគច្រើនជាអ្នកទាមទារឱ្យត្រឡប់ទៅជារុស្សីវិញ ដូចកាលពីមុនសហភាពសូវៀតដួលរលំ ។ នៅ"គៀវ" ជាក្រុងធំមួយនៅផ្នែកខាងកើតនៃប្រទេសយូក្រែនតំបន់ដែលនៅជាប់ព្រំប្រទល់រុស្សីបានត្រូវក្រុមបាតុករវាយលុកយកកាន់កាប់វិមានរដ្ឋាភិបាលនៅទីនោះ បាតុករក៏បានជួបប្រទះការទប់ស្កាត់ការពារដោយ



ប្រធានាធិបតីរុស្ស៊ីវ្ល៉ាឌីមៀ ពូទីន

កងរក្សាសន្តិសុខកាលពាក់កណ្តាលសប្តាហ៍មុនបណ្តាលឱ្យមានរបួសជាច្រើននឹងស្លាប់ប្រមាណ ២០នាក់ ព្រឹត្តិការណ៍នេះ បាននាំឱ្យឧត្តមសេនីយម្នាក់មានវិប្បដិសារីនឹងអំពើដ៏កំសាកដែលបណ្តាលឱ្យពលរដ្ឋរងគ្រោះ ក៏នាំកងកម្លាំងរបស់ខ្លួនទៅចុះចូល ហើយលុតជង្គង់សុំទោសក្រុមបាតុករ ។ ជាមួយគ្នានោះដែរ ប្រធានាធិបតី យានូកូវិ បានត្រូវពលរដ្ឋភាគខាងជើងចោទប្រកាន់ថា "មានទំនោរទៅខាងរុស្សីច្រើនជាងសហភាពអឺរ៉ុបដែលខ្លួនជាសមាជិក" ក៏លាលែងពីដំណែងរត់ទៅរុស្សីបន្ទាប់ពីកងកម្លាំងខ្លួនលែងស្តាប់បង្គាប់ ។

ប្រទេសយូក្រេន មកទល់ថ្ងៃនេះ នៅក្រោមការគ្រប់គ្រងបញ្ជាការរបស់អនុប្រធានាធិបតី អាឡិចសង់ ទ័រឈីណុហ្វ ដែលសន្យាថា "នឹងរៀបឱ្យមានការធ្វើប្រជាមតិ នឹងបោះឆ្នោតប្តូររដ្ឋាភិបាលនៅថ្ងៃ២៥ឧសភាខាងមុខ ចំណែកឯខាងរុស្សីវិញមិនត្រឹមតែមិនបន្ធូរបរិយាកាសដោយដកទ័ពថយទេ ថែមទាំងបន្ថែមទ័ពរឹតតែច្រើនថែមទៀតដោយមានលេសថា "ខ្លួនមកការពារប្រជាពលរដ្ឋនៅយូក្រេនដោយមានលិខិតពីប្រធានាធិបតីជាអ្នកហៅរុស្សីឱ្យមកជួយ"។ ប្រទេសប៉ូឡូញដែលនៅជាប់គ្នាផ្នែកខាងកើតមានការព្រួយបារម្ភចំពោះសន្តិសុខរបស់ខ្លួនដោយខ្លាចការចល័តទ័ពរុស្សី ក៏ប្តឹងទៅបក្សសម្ព័ន្ធយោធា "អូតង់" ក្នុងនាមជាសមាជិកដែលនឹងបើកកិច្ចប្រជុំបន្ទាន់របស់ខ្លួននៅសប្តាហ៍ប្តើមថ្ងៃទី៣នេះដើម្បីទុបទល់ស្ថានភាពគម្រាមកំហែងរបស់កុម្មុយនីស្តរុស្សីនេះ ។



ការដាក់ទ័ពរបស់រុស្សីនៅយូក្រែននេះ យ៉ាងហោចណាស់ក៏ប៉ះពាល់ដល់ច្បាប់អន្តរជាតិមួយដែលកម្ពុជាស្គាល់ច្បាស់ណាស់នោះ គឺ "សិទ្ធិសម្រេចវាសនាជាតិដោយយូក្រេនិញានខ្លួនឯង"មិនអាចមានន័យត្រឹមត្រូវបានទេ ដ៏វាបណាទ័ពនៃប្រទេសផ្សេងនៅក្នុងប្រទេសដូចគ្នានឹងកម្ពុជាចុះហត្ថលេខាលើរឿងព្រំប្រទល់ខ្មែរ-វៀតណាមនៅពេលវៀតណាមកំពុងលុកលុយកម្ពុជានាចន្លោះឆ្នាំ ១៩៧៩-១៩៩១ដូច្នោះដែរ ៕

**KhmerPost USA, LLC**
សារពត៌មានខ្មែរផុសសហរដ្ឋអាមេរិក
អាស័យដ្ឋាន 45 Merrimack St. Suite 218A. Lowell, MA 01852
លេខទូរស័ព្ទ Phone: 978 677-7163 | Fax: (978) 677-7092
អ៊ីម៉ែល info@khmerpost.us
អានកាសែតនៅគេហទំព័រ www.khmerpost.us
តាមដានយើងនៅទំព័រហ្វេសប៊ុក Like us at: www.facebook.com/KhmerPostUSA
ផ្សាយពាណិជ្ជកម្ម Advertising
អគ្គនាយកទីផ្សារ និងគ្រប់គ្រង សុបិន្ត ពិន Soben Pin, *Managing Partner*
លេខទូរស័ព្ទ 978 - 656 - 8141 (Mobile) 978 677-7163 (Office) |
អ៊ីម៉ែលsobenpin@khmerpost.us
អ្នកនិពន្ធ Editorials
និពន្ធនាយក ពិន សំឃុន Roger Samkhon Pin, *Publisher & Editor-in-Chief*
(978) 942 - 1641 | rogerpin@khmerpost.us

អ្នកនិពន្ធកិត្តិយស Contributed Writers:
Kim Phien, Kim Sos, Mao Chan Somnom, Mam Yin,
Richard Howe Esq. Sengly Kong, Ph.D. James Ostis
ឡៃសោភ័ណភាពកាសែត Design Artist
Heng Chhunleng
ជំនួយការរដ្ឋបាល Administrative Assistant
Sokha Lim

KhmerPost USA, LLC is an independent newspaper that aims to facilitate mass communication among the Cambodian communities, their neighboring communities, and families. We aim to address local community, and national news; and give an insight into Cambodian & global news. We also strive to bridge the language and cultural gaps and reduce social isolation by publishing in Khmer & English. It published twice a month in Massachusetts serving Greater Lowell, Lynn, Revere, MA, Providence, RI, CT, NY, NJ, and Philadelphia, PA.

Mail subscription is available within the U.S. & Canada at $60.00 or 70 Euros in Europe per year.

The KhmerPost USA has full authorization from Bernard Krisher, the publisher of the Cambodia Daily to reproduce all the articles that are produced by the Cambodia Daily free of charge effective date: 6/19/2009

# អភិបាល ផាទ្រីក ទទួលភ្ញៀវក្នុងកិច្ចពិភាក្សា តុមូលស្ដីពីប្រព័ន្ធផ្សព្វផ្សាយជនជាតិភាគតិច

## Governor Patrick hosts Ethnic Media Roundtable

James Ostis - KhmerPost USA Staff writer

ចាប់តាំងពីឆ្នាំ២០០៧ អភិបាល ផាទ្រីក បានចូលកាន់តំណែងបម្រើកិច្ចការរដ្ឋក្នុងការិយាល័យរបស់លោក លោកបានប្ដេជ្ញា ថានឹងពង្រីកការប្រាស្រ័យទាក់ទងជាមួយសហគមន៍ខំម៉ុនវ៉ែលឱ្យបានប្រសើរជាងមុន។

ការធ្វើការជាមួយសាពតិមាននៃជនជាតិភាគតិចក្នុងសហគមន៍ជាមធ្យោបាយដែលអភិបាល ផាទ្រីកបានយកមកប្រើប្រាស់។ ថ្ងៃទី២០ កុម្ភៈ អភិបាល ផាទ្រីក ទទួលភ្ញៀវក្នុងកិច្ចពិភាក្សាតុមូលក្នុងរដ្ឋវកាលសារព័តិមាន ហើយថ្ងៃនោះជាលើកទីមួយដែលសារព័តិមានខ្មែរផុសសហរដ្ឋអាមេរិកចូលរួមក្នុងកិច្ចប្រជុំខាងលើ។

ក្នុងកិច្ចប្រជុំលោកអភិបាលបានផ្ដោតការចាប់អារម្មណ៍ក្នុងអង្គប្រជុំអំពីកញ្ចប់កំណែទម្រង់អំពីការកាត់បន្ថយការ (តទៅទំព័រទី ២១)



# Governor Patrick hosts Ethnic Media Roundtable

One February 20th, for the first time, KhmerPostUSA was in attendance at Governor Deval Patrick's Ethnic Media Roundtable discussion at the Massachusetts State House. Since first taking office in 2007, Massachusetts Governor Deval Patrick has pledged his commitment to reaching out to all the residents of the Commonwealth. One of the ways in which he reaches out to specific audiences in the state is through engaging directly with the ethnic media outlets multiple times per year.



The governor, who had earlier in the day presented his reform package to reduce prison recidivism, met for an hour with representatives from several local and regional papers from throughout the state, discussing both his reform package and the topics important to the communities represented. Asked about following the REAL ID model of New York State for undocumented immigrants, Patrick offered the pros and cons of a dual identification system. The governor also offered his advice for whomever follows him in the office next year (After serving two terms as governor, Patrick is not running for reelection in the fall).

Answering a question from Khmer Post's Soben Pin, Governor Patrick also addressed the language and cultural barriers for immigrant business owners in communities such as Lowell. In discussing existing small business support programs, Patrick noted "I want to acknowledge the practical barrier that language has for programs that are otherwise good."

Governor Patrick also recalled his "fabulous" visit to the Merrimack Valley Sandbox, expressing what a great time he had talking with the entrepreneurs and mentors of the Accelerator Program after an invitation from Sandbox founder Desh Deshpande.

As he prepares to leave office next January, Governor Patrick was asked about his legacy concerning immigrants in the Commonwealth. Continued to page 21

# តួឯកប្រុសវិនាទីអាថ៌កំបាំង តុលា សុខ ក្នុងស្នាដៃទីពីរ

## Moment in Time's Main Actor Tola Sok in Second Film "Transfer"

**ដោយ : សុខា**

**ក្រុងឡូវែល:** ជួបថៃដន្យនៅភោជនីយដ្ឋានទេពធីតាខ្មែរក្នុងក្រុងឡូវែលសារព័ត៌មានខ្មែរផុស បានឆ្លៀតឱកាសសម្ភាសន៍តួឯកប្រុសក្នុងខ្សែភាពយន្តវិនាទីអាថ៌កំបាំងក្នុងរឿងមានឈ្មោះថា សុធី រីឯឈ្មោះពិត គឺ តុលា សុខ។

ក្រោយពីបានដាក់បញ្ចាំងខ្សែភាយន្តរឿងវិនាទីអាថ៌កំបាំង នៅរោងភាពយន្តអាមេរិកស្បូខេស រួចមកតួឯកប្រុសលោក តុលា សុខ ត្រូវបានអញ្ជើញឱ្យថតក្នុងស្នាដៃទីពីរក្នុងខ្សែភាពយន្តខ្លីមួយមានចំណងជើងថា ត្រេនស្វឺ ឬមានន័យជាភាសាខ្មែរថា ផ្ទេរ ។ ផ្ទេរកិរិយាស័ព្ទដែលត្រូវបានដាក់ជាចំណងជើងរឿងនេះនិយាយសង្ខេបអំពីចរាចរនៃការរកស៊ីជួញដូរគ្រឿងក្នុងមនុស្សផ្ទេរគ្រឿងក្នុងរបស់ជនរងគ្រោះទៅអ្នកទិញ។

តម្លៃអប់រំក្នុងរឿង គឺការបង្កើនការប្រុងប្រយ័ត្នថែរក្សាសុវត្ថិភាពផ្ទាល់ខ្លួនដែលមនុស្សគ្រប់គ្នាត្រូវប្រកាន់យកមិនគួរគប្បីធ្វេសប្រហែសប្រមាថចំពោះយថា ហេតុផ្សេងៗ និងការពង្រឹងនូវការយកចិត្តទុកដាក់របស់ភ្នាក់ងារមានសមត្ថកិច្ចក្នុងការផ្តន្ទាទោសជនដែលប្រព្រឹត្តជួញដូរគ្រឿងក្នុងមនុស្សតាមផ្លូវច្បាប់។





ឆ្លៀតឱកាសកម្រដែលលោកតុលាឈាងចូលលេងក្រុងឡូវែលពីការប្រចាំការក្នុងកងយោធារបស់លោកនៅឯខេបខតលោកមានសេចក្តីរីករាយផ្តល់បទសម្ភាសន៍ដល់សារព័ត៌មានខ្មែរផុសអំពីរឿងទីពីរនេះ។ លោកបានថ្លែងថារឿងទីពីនេះ មានបញ្ចាំងក្នុងទំព័រយូធូប ហើយជាប្រទេសរឿងខ្លីប្រមាណជា១៥ទៅ៣០នាទី។ លោកបានបញ្ចប់ការថតរឿងនេះជាស្ថាពរ ហើយឥលូវខាងផ្នែកបច្ចេកទេសកំពុងកាត់តបញ្ចប់មុនរឿងនេះត្រូវចេញផ្សាយ។

អ្នកផលិតកុនទីពីរនេះ គឺជាក្រុមផលិតតែមួយដែលផលិតរឿងវិនាទីអាថ៌កំបាំងមានលោកវិបុល ជាអ្នកដឹកនាំថត។ ទីតាំងថតនៃរឿងនេះគឺទីក្រុងញូយ៉កថតកាលពីខែមករាឆ្នាំ២០១៤។ ហើយតុលា មានឱកាសបាតថតជាតួសំខាន់ជាមួយតួស្រីមានឈ្មោះថា លីលី ដែលជាតារាអាជីព។

តួឯកប្រុសរូបនេះ មានជីវប្រវត្តិគួរឱ្យចាប់អារម្មណ៍។ បច្ចុប្បន្នលោកជាទាហានប្រចាំការនៅខេបខត ។ ពិនិត្យលើប្រវត្តិសិក្សាលោកទទួលបានបរិញ្ញាប័ត្រ ទ្វេរជំនាញ គឺវិទ្យាសាស្រ្ត នយោបាយ និងត្រីមីណល ចាស់ស្ទិស(ឧក្រិដ្ឋកម្ម និងយុត្តិធម៌)។ សម្រាប់ថ្នាក់ក្រោយ ឧត្តមលោក តុលា សុខ សិក្សា ជំនាញសន្តិភាព និងការសិក្សាអំពីវិវាទសម្រាប់ថ្នាក់អនុបណ្ឌិត៕

តមកពីទំព័រទី ៩ "ក្រូណូ" ឬកាលប្បវត្តនយោបាយក្នុង...

រំលោភសិទ្ធមនុស្សច្រើនផងនៅកម្ពុជា ។

*ថ្ងៃ១៥មករា លោក សុរិយា ស៊ូបេឌី ប្រេ សិទ្ធពិសេសប្រចាំអង្គការសហប្រជាជាតិបានជួបជាមួយលោក ហ៊ុន សែន រួមទាំងរដ្ឋមន្ត្រីចំនួន១០រូប នឹងមន្ត្រីជាន់ខ្ពស់ចំនួន៣ម៉ោងកន្លះ លោកបានលើកករណីរសើបមួយចំនួនមានការប្រើអាវុធធ្វើសង្គ្រាមប្រឆាំងពលរដ្ឋគ្មានអាវុធការធ្វើឱ្យស្លាប់មនុស្ស៧រូបរាប់តាំងពីខែកញ្ញាមកការចេញក្រិត្យលាលពីថ្ងៃទី៤មករា មិនឱ្យប្រើសិទ្ធក្នុងរដ្ឋធម្មនុញ្ញស្តីពីការរួមប្រជុំការចាប់ដាក់គុកដល់តំណាងសហជីពនឹងអ្នកកាពារសិទ្ធមនុស្សនឹង ការចាប់ខ្លួនកម្មករ២៣នាក់នៅពេលធ្វើបាតុកម្ម ។ លោកយល់ថា ការទាមទារតម្លើងប្រាក់បៀវត្សកម្មករទៅ១៦០ ដុល្លាអាចធ្វើទៅបានលោក ហ៊ុន សែន បានបង្ហាញពីភាពទន់ភ្លន់ជាងមុនចំពោះលោក ស៊ូបេឌី ហើយសន្យាថានឹងកែរទម្រង់តាមការណែនាំ ។ "ប្រទេសកម្ពុជាបានមកដល់ផ្លូវបែក" ហើយលោក ស៊ូបេឌីបន្តថា "ការកែទម្រង់នឹងមកដល់លឿនជាងការគិតរបស់អ្នកខ្លះ" ។

*ថ្ងៃ១៧មករា សភាអឺរ៉ុបអនុម័តដំណោះស្រាយ១៧ចំណុចតាមលំនាំសហរដ្ឋអាមេរិក ប៉ុន្តែមានភាពម៉ឹងម៉ាត់ជាង គឺឱ្យមានការស៊ើបអង្កេតលើការស្លាប់កម្មករកាលពីថ្ងៃទី៣មករានឹងដោះលែងកម្មករជាប់ក្នុងពន្ធនាគារជាបន្ទាន់ ។ សហភាពអឺរ៉ុប គឺជាម្ចាស់ជំនួយដ៏ធំចំពោះកម្ពុជា ដូច្នេះជាសញ្ញាដ៏ខ្លាំងមាំមួយដែលរដ្ឋាភិបាលត្រូវចាប់អារម្មណ៍ដំណាងសហភាពអឺរ៉ុបនៅភ្នំពេញបង្ហាញជំហរប្លែកពីសភា(CD18.1.14 ) ។

*ថ្ងៃ១៧មករា សហព័ន្ធសហជីពអន្តរជាតិ៣០ប្រទេស និងពហុប្រទេសដូចជា គ្លាប GAP វលឌីស្នេ Walt Disnay vlmat Wal-Mart បានសរសេរលិខិតទៅលោក ហ៊ុន សែន ស្តីពីកង្វល់ដ៏ធ្ងន់ធ្ងរចំពោះការស្លាប់មនុស្ស៥នាក់ កាលពីថ្ងៃទី៣មករា ហើយសុំឱ្យបើកការស៊ើបអង្កេតជាបន្ទាន់ ។ នៅក្នុងចំនើមហត្ថលេខីនោះមានសហគ្រាសន៍៦ ដែលដំណាងឱ្យការនាំទំនិញសំលៀកបំពាក់ចូលប្រទេស៩០ភាគរយ កាណាដា នឹងសហរដ្ឋអាមេរិក( CD 20.1.14 ) ។ ថ្ងៃ១៥មករា តំណាងរបស់"ពូម៉ា PUMA គ្លេប GAP នឹងអេចអិនអិម H&M (ក្រុមហ៊ុនលក់ខោលំដាប់លេខ២ពិភពលោកទទួលប្រាក់ចំណេញ៣.៤ពាន់លានដុល្លាឆ្នាំ២០១២) រួមទាំងអគ្គលេខាធិការសហជីពអាំងដឺស្រ្តីយាលអលក្លូបូល industrial ALL Global មកជួបជាមួយរដ្ឋមន្ត្រីពាណិជ្ជកម្មរដ្ឋមន្ត្រីកាងារនឹងអតីតរដ្ឋមន្ត្រីហិរញ្ញវត្ថុ គាត ឆុន ប្រធាគណកម្មការសិក្សាពីការតម្លើងប្រាក់ខែ ។ រដ្ឋមន្ត្រីទាំងអស់ទម្លាក់កំហុសទាំងស្រុងទៅលើគណបក្សសង្គ្រោះជាតិដែលបង្កើតអនាធិបតេយ្យ ។ គ្លាប GAP បានធ្វើការកត់សំគាល់អំពីបញ្ហាដែលវាយជន២៣នាក់ហើយចាប់ដាក់គុកដោយគ្មានការវិនិច្ឆ័យដែលធ្វើឱ្យមានការចោទប្រកាន់លើបញ្ហាសីលធម៌នឹងទំនាក់ទំនងសាធារណៈ "អ្នកទិញរបស់យើងជុំវិញពិភពលោកចោទសួរថា ខោអាវអ្នកឯងធ្វើនៅឯណា? ហើយធ្វើរបៀបណា?"(CD20.2.14)

*ថ្ងៃ១១កុម្ភៈ ព្រឹទ្ធសភាអូស្រ្តាលីអនុម័តសេចក្តីសម្រេចចិត្តមួយសុំឱ្យមានការស៊ើបអង្កេតលើការលួចបន្លំក្នុងការបោះឆ្នោតកាលពីខែកក្កដាកន្លងទៅ ការប្រើកម្លាំងអាវុធហួសហេតុប្រឆាំងនឹងកម្មករនឹងការបិទចោលនូវសិទ្ធពលរដ្ឋចែងក្នុងរដ្ឋធម្មនុញ្ញស្តីពីការរួមប្រជុំរបស់ពលរដ្ឋ (CD 15.2.14) ។

*នាខែមករានឹងកុម្ភៈ គេបានកត់សំគាល់ការនៅស្ងៀមស្ងាត់របស់គណបក្សសង្គ្រោះជាតិនៅពេលដែលក្រុមសហជីពនឹងក្រុមអ្នកគេបណ្តេញចេញពីផ្ទះសម្បែងនៅធ្វើបាតុកម្មនៅឡើយ ។ គណបក្សសង្គ្រោះជាតិខំពន្យល់ថា "យើងចង់ជៀសវាងការចោទប្រកាន់ថាយើងជាអ្នកពន្យុះក្រុមកម្មករ" ។ សមាជិកខ្លះនៃសង្គ្រោះជាតិផ្តើមយល់ថាបើនៅតែធ្វើពហិការចំពោះសភាជាតិតទៅទៀត គណបក្សនឹងគ្មានមធ្យោបាយធ្វើសកម្មភាពបានទៀតទេ ។ សម រង្ស៊ី ចាកចេញពីកម្ពុជានៅថ្ងៃ២៣មករារយពេល១អាទិត្យទៅកាន់ប្រទេស "បែលហ្ស៊ិកBelgiqueនឹងទៅហ្ស៊ឺណែវដើម្បីចូលរួមកិច្ចប្រជុំក្រុមប្រឹក្សាអ.ស.ប.ខាងផ្នែកសិទ្ធមនុស្ស ហើយនឹងបានជួបសភាសហភាពអឺរ៉ុបផង ។ មានរូបថតមួយបង្ហោះក្នុង"ហ្វេសប៊ុក"បង្ហាញលោក សម រង្ស៊ី កំពុងលេង"ស្គី"នៅពេលដែលសមាជិកគណបក្សកំពុងត្រូវគេវាយធ្វើបាប ។

*ថ្ងៃ២៨មករា គណកម្មការរដ្ឋាភិបាលខាងផ្នែកសិទ្ធមនុស្សចូលទៅបង្ហាញសេចក្តីរាយការណ៍របស់ខ្លួន នៅមុខក្រុមប្រឹក្សាសិទ្ធមនុស្សដែលមានប្រទេសចំនួន៤៧ ។ ក្រុមប្រឹក្សាមានការយកចិត្តទុកដាក់ស្តាប់ ជាពិសេសចំពោះការណែនាំ៩១ចំណុចដែលបានធ្វើការពីឆ្នាំ២០០៩ ។ ប្រទេសមួយចំនួនបានដាក់សំនួររបៀបការទូតឬបញ្ចេញយោបល់ពីកង្វល់ចំពោះព្រឹត្តិការណ៍ដើមខែមករា ។ វៀតណាមកោតសរសើរប្រទេសកម្ពុជាអំពីការបោះឆ្នោតចុងក្រោយ ។

*ថ្ងៃ១៥មករា នាយករដ្ឋមន្ត្រីបានអញ្ជើញអ្នកគាំទ្រលោកឱ្យធ្វើបាតុកម្មប្រឆាំងនឹងគណបក្សប្រឆាំងដែលមានបំណងចង់ទម្លាក់លោក ។ ថ្ងៃ២១មករា សម រង្ស៊ី នឹង កឹម សុខា បានលុបចោលកិច្ចប្រជុំរបស់ខ្លួនមួយនៅស្អាង **តទៅទំព័រទី ១៨**

ឌឹ ខេមបូឌា ដេលី The Cambodia Daily

ជំណឹងប្រែសម្រួលពីកាសែតអង់គ្លេស អត្ថបទដកស្រង់ និងទទួលការអនុញ្ញាតឱ្យធ្វើការចុះផ្សាយពី ឌឹ ខេមបូឌា ដេលី ច្បាប់ចេញផ្សាយថ្ងៃ ពុធ ទី០៥ ខែមីនា ឆ្នាំ២០១៤

# ម្ភៃឆ្នាំក្រោយមក អ៊ីវ៉ាន អំពាវនាវឱ្យ ដាក់ទណ្ឌកម្មរដ្ឋាភិបាលខ្មែរ

**ដោយ Alex Willemyns - February 28, 2014**

លោក ហ្គារ៉េត អ៊ីវ៉ាន (Gareth Evans) អតីតរដ្ឋមន្ត្រីក្រសួងការបរទេសអូស្ត្រាលីដែលបានដើរតួនាទីសំខាន់មួយនៅក្នុងការដោះស្រាយបញ្ហានយោបាយ ដែលបានបញ្ចប់សង្គ្រាមស៊ីវិលនៅកម្ពុជានោះបានអំពាវនាវឱ្យមានការដាក់ទណ្ឌកម្មរដ្ឋាភិបាលដែលដឹកនាំដោយគណបក្សប្រជាជនកម្ពុជារបស់លោកនាយករដ្ឋមន្ត្រី ហ៊ុន សែន ដែលលោកបានមានប្រសាសន៍ថា "មិនត្រូវបានដាក់ទោសចំពោះការសម្លាប់មនុស្ស"។

លោក អ៊ីវ៉ាន ត្រូវបានតែងតាំងជារដ្ឋមន្ត្រីក្រសួងការបរទេសអូស្ត្រាលីនៅខែកញ្ញា ឆ្នាំ១៩៨៨ គឺមានរយៈពេលតែពីរខែប៉ុណ្ណោះ បន្ទាប់ពីមានកិច្ចប្រជុំលើកដំបូងរវាងរបបលោក ហ៊ុន សែន ដែលគាំទ្រ ដោយសូវៀត និងក្រុមតស៊ូដែលគាំទ្រដោយសហរដ្ឋអាមេរិកដឹកនាំដោយព្រះអង្គម្ចាស់នរោត្តម សីហនុ ហើយលោក គឺជាឥស្សរជនអន្តរជាតិទី១ ដែលបានស្នើជាផ្លូវការឱ្យប្រទេសកម្ពុជារួបរួមគ្នាឡើងវិញនៅក្រោមការឧបត្ថម្ភពីអង្គការសហប្រជាជាតិដែលបានសម្រេចជាផ្លូវការកាលពីឆ្នាំ១៩៩៣។

ពេលសរសេរអត្ថបទបញ្ចេញយោបល់កាលពីថ្ងៃពុធសម្រាប់អង្គការ Project Syndicate ដែលអះអាងថា មានការឧបត្ថម្ភពីកាសែតជាង ៤០០នោះ លោក អ៊ីវ៉ាន ដែលបានរក្សាទំនាក់ទំនងជិតស្និទ្ធជាមួយរដ្ឋាភិបាលរបស់លោក ហ៊ុន សែន ចាប់តាំងពីមានដំណើរការសន្តិភាពក្នុងទសវត្សរ៍ ឆ្នាំ ១៩៨០ និងដើមទសវត្សរ៍ឆ្នាំ១៩៩០នោះ បានមានប្រសាសន៍ថា លោកមិនមានសង្ឃឹមថា គណបក្សកាន់អំណាចចាប់អារម្មណ៍លើការការពារសិទ្ធិមនុស្ស ឬប្រជាធិបតេយ្យសេរីនៅក្នុងប្រទេសនេះទេ។

លោក អ៊ីវ៉ាន បានសរសេរមុនពេលរៀបរាប់ពីការប្រើអំពើហិង្សាពីសំណាក់កងរាជអាវុធហត្ថ

**តទៅទំព័រទី ១៣**

# Gareth Evans Calls for Sanctions on Government

**Saturday, March 1, 2014**

**By Alex Willemyns | February 28, 2014**

Gareth Evans, the former Australian foreign minister who played a key role in the political settlement that ended Cambodia's civil war, has called for sanctions against the CPP government of Prime Minister Hun Sen, which he says has been "getting away with murder."

Mr. Evans was appointed Australian foreign minister in September 1988, only two months after the first meeting between Mr. Hun Sen's Soviet-backed regime and the U.S.-backed resistance led by Prince Norodom Sihanouk, and he was the first international figure to formally propose reunification of the country under the auspices of the U.N., which would come to pass in 1993.

Writing an opinion column on Wednesday for Project Syndicate, which claims syndication in more than 400 newspapers, Mr. Evans, who has maintained a close friendship with Mr. Hun Sen's government since the peace process of the 1980s and early 1990s, said he has lost hope that the ruling party is interested in protecting human rights or liberal democracy in the country.

"Cambodia's government has been getting away with murder," Mr. Evans writes, before describing the onslaught by military police who shot dead five protesting garment workers and imprisoned more than 20 last month.

Mr. Evans-who was in 1994 described as "the father of Cambodia" by ChheangVun, a senior lawmaker from the ruling CPP-states that the recent killings form part of a "pattern" of strategic violence used by the government-with international impunity-when its power is threatened.

He mentions summary killings of political opponents of the CPP and complete seizure of the mechanics of government in 1997 when Mr. Hun Sen's forces defeated forces loyal to Prince NorodomRanariddh, which he says was met with an inadequate response from "Cambodia-fatigue[d]" governments around the world, but should serve as a lesson for today. **Continued to page 24**

# លោក ខៀវ កាញារីទ្ធ បញ្ជាក់ជាថ្មីថា គ្មានប្រេកង់ស្ថានីយទូរទស្សន៍សម្រាប់លោក ម៉ម សូណង់ដូ ទេ

កាលពីម្សិលមិញ លោក ខៀវ កាញារីទ្ធ រដ្ឋមន្ត្រីក្រសួងព័ត៌មានបានលាតត្រដាងផែនការបំបែកស្ថានីយទូរទស្សន៍ជាតិកម្ពុជាជាបីស្ថានីយដាច់ដោយឡែកពីគ្នា ប៉ុន្តែបានគូសបញ្ជាក់ជាថ្មីថាគ្មានប្រេកង់ទំនេរសម្រាប់លោក ម៉ម សូណង់ដូ ម្ចាស់ស្ថានីយវិទ្យុសម្បុកឃ្មុំដែលជាស្ថានីយវិទ្យុឯករាជ្យទេ។

លោក ម៉ម សូណង់ដូ បានស្នើសុំអាជ្ញាប័ណ្ណបង្កើតស្ថានីយទូរទស្សន៍ម្តង ហើយម្តងទៀតជាច្រើនលើកច្រើនសាក្នុងរយៈពេលប៉ុន្មានឆ្នាំមកនេះ ប៉ុន្តែលើកណាក៏ត្រូវគេច្រានចោលដែរ ដោយលើកហេតុផលថា ខ្វះប្រេកង់។ លោកបានដាក់សំណើចុងក្រោយកាលពីថ្ងៃទី១០ខែកុម្ភៈ។

លោក ខៀវ កាញារីទ្ធ បានបញ្ជាក់អះអាងនៅខាងក្រៅសន្និបាតបូកសរុបការងារប្រចាំឆ្នាំរបស់ក្រសួងព័ត៌មានកាលពីម្សិលមិញថា "ពេលនេះយើងគ្មានស្ថានីយទូរទស្សន៍ផ្តល់ឱ្យទេ ពីព្រោះគ្មានប្រេកង់"។ លោកថ្លែងបន្ថែមទៀតថា "រឿងសំខាន់នៅពេលនេះគឺថា យើងប្រើប្រព័ន្ធឱ្យផ្សព្វផ្សាយ ឌីជីថល។ ទូរទស្សន៍ជាតិនឹងត្រូវបំបែកជាបីប៉ុស្តិ៍ ពីព្រោះវាមានកម្មវិធីច្រើនពេក ។ នឹងមានប៉ុស្តិ៍សម្រាប់កម្មវិធីនយោបាយកម្មវិធីកម្សាន្ត និងអប់រំ ឬព័ត៌មានទូទៅ"។

លោក ម៉ម សូណង់ដូ បានមានប្រសាសន៍តាមទូរស័ព្ទថា លោកមិនយល់ពីលោក ខៀវ កាញារីទ្ធ ដែលបដិសេធមិនផ្តល់អាជ្ញាប័ណ្ណដល់លោកស្របពេលអនុញ្ញាតឱ្យបង្កើតស្ថានីយទូរទស្សន៍ផ្សេងៗទៀតនោះទេ។ លោក ម៉ម សូណង់ដូ បានមានប្រសាសន៍បន្ថែមទៀតថា "គាត់និយាយគ្មានហេតុផល។ ហេតុអ្វីបានជាខាងគាត់ផ្តល់ប្រេកង់ឱ្យបង្កើតស្ថានីយទូរទស្សន៍និងវិទ្យុបាន? ខ្ញុំបានស្នើសុំរឿងនេះតាំងពីឆ្នាំ២០០៥មកម្ល៉េះ។ ខ្ញុំនឹងរង់ចាំមួយសប្តាហ៍ទៀត ហើយប្រសិនបើខ្ញុំមិនទទួលបានការឆ្លើយតបពីក្រសួងឱ្យពាក់ព័ន្ធនឹងសំណើសុំអាជ្ញាប័ណ្ណចុងក្រោយនេះទេ ខ្ញុំនឹងធ្វើការតវ៉ានៅខាងមុខក្រសួងព័ត៌មាន"។

ការតវ៉ាលើកចុងក្រោយរបស់លោក ម៉ម សូណង់ដូ នៅខាងមុខក្រសួងនេះកាលពីខែមករា ត្រូវបានបង្ក្រាបដោយកម្លាំងកងរាជអាវុធហត្ថប្រដាប់ដោយដំបង និងគ្រាប់បែកផ្សែង។ លោក យ៉ែម បុញ្ញឫទ្ធិ អ្នកនាំពាក្យគណបក្សសង្គ្រោះ

**តទៅទំព័រទី ៣១**

# Kanharith Reiterates No TV Station for Broadcaster Sonando

**BY KHUON NARIM | FEBRUARY 27, 2014**

Information Minister Khieu Kanharith on Wednesday revealed plans to split state-run TVK into three separate television stations but reiterated that no frequencies are available for independent radio broadcaster Mom Sonando.

Mr. Sonando, who owns Beehive radio station, has over the past several years repeatedly requested a TV broadcast license only to be rejected each time on the grounds of a bandwidth shortage.

He last submitted a request on February 10.

"Now we don't have television stations to offer because there are no frequencies," Mr. Kanharith claimed on the sidelines of the Ministry of Information's annual meeting Wednesday.

"The main thing now is that we push through a digital [broadcasting] system. TVK will be split into three channels because it has so many programs. There will be channels for political programs, entertainment programs and education or general news."

Mr. Sonando said by telephone he could not understand Mr. Kanharith's refusals to grant him a license amid approvals for many other broadcasters.

"He is talking without reason," Mr. Sonando said.

"Why is his side offering frequencies to operate TV and radio? I have requested this since 2005."

"I will wait one more week and if I have no response from the ministry [concerning the latest license request], I will hold a protest in front of the Ministry of Information," Mr. Sonando added.

The last protest by Mr. Sonando at the ministry in January was crushed by military police armed with batons, smoke and stun grenades.

Yem Ponhearith, spokesman for the CNRP, which has also called for a license to compete with the existing plethora of pro-CPP stations, which are all either aligned with, or supporters of, Prime Minister Hun Sen's party, also **Continued to page 29**

ឌី ខេមបូឌា ដេលី The Cambodia Daily

ដំណឹងប្រែសម្រួលពីភាសាអង់គ្លេស អត្ថបទដកស្រង់ និងទទួលការអនុញ្ញាតឱ្យធ្វើការចុះផ្សាយពី ឌី ខេមបូឌា ដេលី ច្បាប់ចេញផ្សាយថ្ងៃ ពុធ ទី០៥ ខែមីនា ឆ្នាំ២០១៤

# អ្នករាជានិយមសួរពីគតិបណ្ឌិតរបស់ព្រះអង្គម្ចាស់ រណឫទ្ធិ ដែលចង់ប្រឡូកក្នុងឆាកនយោបាយវិញ

**ដោយ** **Alex Willemyns and Mech Dara - February 28, 2014**

មេដឹកនាំជាន់ខ្ពស់គណបក្សហ៊្វុនស៊ិនប៉ិច ដែលព្រះអង្គម្ចាស់នរោត្តម រណឫទ្ធិ ធ្លាប់បានដឹកនាំឱ្យទទួលជោគជ័យក្នុងព្រឹត្តិការណ៍បោះឆ្នោតឧបត្ថម្ភដោយអង្គការសហប្រជាជាតិកាលពីក្នុងឆ្នាំ១៩៩៣នោះ បានចោទសំណួរទាក់ទងទៅនឹងគតិបណ្ឌិតរបស់ព្រះអង្គម្ចាស់នរោត្តម រណឫទ្ធិ ក្នុងការធ្វើសេចក្តីសម្រេចព្រះទ័យវិលត្រឡប់មកប្រឡូកក្នុងឆាកនយោបាយវិញ? ដោយបង្កើតគណបក្សនយោបាយថ្មីមួយ។



ព្រះអង្គម្ចាស់នរោត្តម រណឫទ្ធិ ដែលត្រូវបានបង្ខំឱ្យចុះចេញពីតំណែងជាប្រធានគណបក្សហ៊្វុនស៊ិនប៉ិច កាលពីឆ្នាំ២០០៦ មុនពេលបង្កើតគណបក្សនរោត្តម រណឫទ្ធិ បានប្រកាសកាលពីថ្ងៃអាទិត្យសប្តាហ៍មុនអំពីការបង្កើតគណបក្សសហគមន៍អ្នករាជានិយម។ គួរបញ្ជាក់ផងដែរថា គណបក្សនរោត្តម រណឫទ្ធិ ត្រូវបានច្របាច់បញ្ចូលក្នុងគណបក្សហ៊្វុនស៊ិនប៉ិច។

ព្រះអង្គម្ចាស់នរោត្តម រណឫទ្ធិ បានមានព្រះបន្ទូលក្នុងកិច្ចសម្ភាសតាមវិទ្យុមួយក្នុងសប្តាហ៍នេះថា ព្រះអង្គកំពុងបង្កើតគណបក្សថ្មីនេះ ដើម្បីជួយបង្រួបបង្រួមប្រទេស បន្ទាប់ពីបញ្ហាជាច្រើនបានកើតឡើងក្រោយពេលបោះឆ្នោតជ្រើសតាំងតំណាងរាស្ត្រកាលពីឆ្នាំមុន និងដើម្បីលើកកម្ពស់ទស្សននយោបាយបែបរាជានិយមរបស់អតីតព្រះមហាក្សត្រនរោត្តម សីហនុ។

ព្រះអង្គម្ចាស់នរោត្តម រណឫទ្ធិ មានព្រះបន្ទូលថា "ខ្ញុំចង់ប្រមូលទស្សនជាតិនិយម និងសីហនុនិយម **តទៅទំព័រទី ៣១**

# Royalists Question Wisdom of Ranariddh's Planned Return

**By Alex Willemyns and MechDara | February 28, 2014**

Senior leaders of Funcinpec, the party that Prince NorodomRanariddh led to victory in the U.N.-sponsored election of 1993, have questioned the wisdom of the prince's decision to return to the political realm by creating a new political party.

Prince Ranariddh, who was pushed out of the presidency of Funcinpec in 2006 before creating the Norodom Ranariddh Party, which later collapsed back into Funcinpec, on Sunday announced the creation of the Community of Royalist People Party (CRPP).

The prince said in a radio interview this week that he was creating the party to help unite the country after the "problems" arising from last year's national election, and to promote the royalist politics of the late King Father Norodom Sihanouk.

"I want to mobilize nationalism and Sihanoukism to form my party and restore the royal family," the Prince said.

Prince SisowathSirirath, who served as a co-minister of defense in Prince Ranariddh's coalition government in the 1990s, said Prince Ranariddh's quest for political power could be hampered by perceptions that he previously governed carelessly.

"A leader needs to gain love and adulation from the people, and so he must not flip-flop," he said, also suggesting that Prince Ranariddh's new bid for office may lack an organic base.

KeoPuthRasmey, who replaced Prince Ranariddh as Funcinpec's president in 2006 and is the husband of Princess NorodomArunrasmy, who led the **Continued to page 21**

តមកពីទំព័រទី ១២ ម្ភៃឆ្នាំក្រោយមក អ៊ីវ៉ាន អំពាវនាវឱ្យ...

ដែលបានបាញ់សម្លាប់កម្មកររោងចក្រកាត់ដេរដែលធ្វើការតវ៉ាប្រាំនាក់ និងបានចាប់មនុស្សជាង២០នាក់ទៀតដាក់ពន្ធនាគារកាលពីខែមុននោះថា "រដ្ឋាភិបាលកម្ពុជារួចផុតពីការដាក់ទោសចំពោះការសម្លាប់មនុស្ស"។

លោក អ៊ីវ៉ាន ដែលកាលពីឆ្នាំ១៩៩៤ត្រូវបានលោក ឈាង វុន សមាជិកសភាជាន់ខ្ពស់មកពីគណបក្សប្រជាជនកម្ពុជាចាត់ទុកថា ជាបិតានៃប្រទេសកម្ពុជានោះ បានលើកឡើងថា ការសម្លាប់មនុស្សនៅពេលថ្មីៗនេះ គឺជាផ្នែកមួយនៃការប្រើអំពើហិង្សាពីសំណាក់រដ្ឋាភិបាលនៅពេលដែលអំណាចរបស់ខ្លួនរងការគំរាមកំហែង។

លោកបានលើកឡើងពីការសម្លាប់នៅក្រៅប្រព័ន្ធតុលាការលើអ្នកប្រឆាំងគណបក្សប្រជាជនកម្ពុជា និងការដណ្តើមយកអំណាចដឹកនាំរដ្ឋាភិបាលទាំងស្រុងនៅក្នុងឆ្នាំ១៩៩៧បន្ទាប់ពីកងកម្លាំងរបស់លោក ហ៊ុន សែន បានផ្តួលរំលំកងកម្លាំងដែលស្មោះត្រង់នឹងព្រះអង្គម្ចាស់នរោត្តម រណ ឫទ្ធិ។ លោកបានមានប្រសាសន៍ថា ការដណ្តើមអំណាចដឹកនាំរដ្ឋាភិបាលទាំងស្រុងនេះមិនបានទទួលការគាំទ្រពេញលេញពីរដ្ឋាភិបាលនៅទូទាំងពិភពលោកទេ ប៉ុន្តែគួរធ្វើជាមេរៀនសម្រាប់ថ្ងៃនេះ។

លោក អ៊ីវ៉ាន សរសេរថា "នៅពេលនោះ ខ្ញុំចង់ជឿថា ឧបសគ្គទាំងនេះគឺ ជាការបណ្តោះអាសន្ន និងមានមនុស្សច្រើនណាស់ដូចជារូបខ្ញុំ"។ "ចាប់តាំងពីពេលនោះមកនៅពេលការពារប្រជាធិបតេយ្យដែលមានតែឈ្មោះ នោះ លោក ហ៊ុន សែន បានដឹកនាំក្នុងនាមជាជនផ្តាច់ការសម្រាប់គោលបំណងសំខាន់ៗទាំងអស់ ដោយបង្ហាញឱ្យឃើញថា មិនមានការគោរពសិទ្ធិសេរីភាពនៃការបញ្ចេញមតិ និងការជួបជុំឱ្យបានគ្រប់គ្រាន់ឡើយ និងបានបង្ក្រាបដោយហិង្សានៅពេលណាដែលលោកគិតថា ជាការចាំបាច់ដើម្បីរក្សាអំណាចរបស់លោក និងគណបក្សរបស់លោក"។ "ជាយូរមកហើយ លោក ហ៊ុន សែន និងសហការីរបស់គាត់តែងតែរួចខ្លួន ចំពោះការប្រើអំពើហិង្សាការរំលោភសិទ្ធិមនុស្ស អំពើពុករលួយ និងប្រព័ន្ធផ្សព្វផ្សាយ និងការលួចបន្លំសន្លឹកឆ្នោត"។

នៅក្នុងអត្ថបទរបស់លោកលោក អ៊ីវ៉ាន ក៏បានចាត់ទុកថា សមហេតុផលដែរ ចំពោះការចោទប្រកាន់ថា មនុស្សជាង២០នាក់ក្នុងចំណោមមនុស្សជិតស្និទ្ធបំផុតរបស់លោក ហ៊ុន សែន ម្នាក់ៗមានលុយជាង១ពាន់លានដុល្លារតាមរយៈការលួចបន្លំទ្រព្យសម្បត្តិរបស់រដ្ឋ។

លោក អ៊ីវ៉ាន បានសន្និដ្ឋានថា "ខ្ញុំស្គាល់ ហ៊ុន សែន និងបានធ្វើការល្អជាមួយគាត់កាលពីអតីតកាល។ ខ្ញុំបានប្រឆាំងនឹងការរិះគន់ជាសាធារណៈខ្លាំងៗរហូតមកទល់ពេលនេះ ពីព្រោះខ្ញុំគិតថាមានក្តីសង្ឃឹមទាំងលើរូបគាត់ និងរដ្ឋាភិបាលរបស់គាត់"។ លោកបានសរសេរថា "ប៉ុន្តែឥរិយាបថរបស់ពួកគេឥឡូវនេះមិនអាចទទួលយកបានទេ។ ដល់ពេលសហគមន៍អន្តរជាតិដាក់ឈ្មោះធ្វើឱ្យអាម៉ាស់ស៊ើបអង្កេត និងដាក់ទណ្ឌកម្មមេដឹកនាំរដ្ឋាភិបាលកម្ពុជាហើយ"។

លោក ហ៊ុន សែន និងលោក អ៊ីវ៉ាន បានជួបគ្នាជាសាធារណៈចុងក្រោយនៅខែកញ្ញាឆ្នាំ២០១០ ដែលនៅពេលនោះលោកទាំងពីរ រួមជាមួយព្រះអង្គម្ចាស់នរោត្តម សិរីវុឌ្ឍ និងលោក មីលថុន អូសប៊ិន ប្រវត្តិវិទូខ្មែរអូស្ត្រាលី បានចូលរួមនៅក្នុងកិច្ចប្រជុំរបស់ក្រុមពិគ្រោះយោបល់មកពីសាកលវិទ្យាល័យម៉េលប៊ិននៅក្នុងទីក្រុងភ្នំពេញ។ នៅពេលនោះលោកទាំងពីរបានសរសើរគ្នាទៅវិញទៅមកចំពោះការជួយជំរុញឱ្យមានសន្តិភាព និងស្ថិរភាពនៅកម្ពុជា។

លោក ហ៊ុន សែន បានមានប្រសាសន៍ក្នុងសន្និសីទនោះថា "ខ្ញុំសូមស្វាគមន៍លោកសាស្ត្រាចារ្យ ហ្គារ៉េត អ៊ីវ៉ាន យ៉ាងកក់ក្តៅបំផុត ចំពោះតួនាទី និងការចូលរួមចំណែកដ៏ធំធេងរបស់លោកដល់ការបង្រួបបង្រួមជាតិ និងការកសាងប្រទេសកម្ពុជាឡើងវិញ"។

ជាការឆ្លើយតបទៅនឹងការកោតសរសើររបស់នាយករដ្ឋមន្ត្រីលោក អ៊ីវ៉ាន បានមានប្រសាសន៍ថា ថ្វីបើមានបញ្ហាច្រើននៅក្នុងដំណើរការលទ្ធិប្រជាធិបតេយ្យនៅកម្ពុជា តាំងពីឆ្នាំ១៩៩៣ក៏ដោយក៏ប្រទេសនេះ បានរីកចម្រើននៅក្រោមការដឹកនាំរបស់លោក ហ៊ុន សែន ដែរ។

លោកបានមានប្រសាសន៍នៅពេលនោះ ដោយកោតសរសើរចំពោះការរីកចម្រើននៅក្នុងទីក្រុងភ្នំពេញ និងកំណើនសេដ្ឋកិច្ចនៅក្នុងប្រទេសនេះ តាំងពីឆ្នាំ១៩៩៣មកថា "មានទឹកកន្លះកែវប្រសើរជាងគ្មានទឹកសោះ"។

លោកបានបន្តថា "វាជាកិត្តិយសដ៏ធំធេងរបស់លោកនាយករដ្ឋមន្ត្រី ហ៊ុន សែន និងក្រុមការងាររបស់លោកដែលមានការប្តេជ្ញាខ្លាំងក្លាចំពោះអនាគតរបស់ប្រទេសកម្ពុជា និងប្រជាជនកម្ពុជាភាគច្រើនដែលបានគាំទ្រពួកគេយ៉ាងច្រើនកុះករ"។ **តទៅទំព័រទី ២៥**

# អ្នកស្រី លីដា សុភាពស៊ូ ថ្លែងសុន្ទរកថា នៅឡូវែលសប្តាហ៍ស្តីពីស្រ្តី

**ដោយ : ចេមស៍ អសទីស**

**ប្រែសម្រួលដោយ : សុខា**

"ផ្តល់និយមន័យសារជាថ្មីអំពីភាពប្រសើរ" ជាមូលន័យនៃកិច្ចពិភាក្សា និងការប្រារព្ធខួបលើកទី១៩នៃសប្តាហ៍ស្តីពីស្រ្តីនៅឡូវែលតាមរយៈការជួបជុំគ្នាទទួលទានអាហារពេលព្រឹកនៅលីហ្ស៊ីដែលប្រព្រឹត្តិទៅកាលពីថ្ងៃទី៣ខែមីនា ឆ្នាំ២០១៤។ វាគ្មិនក្នុងកម្មវិធី "អ្នកស្រីលីដា សុភាព ស៊ូ ដែលផ្តល់និយមន័យ ថា ភាពប្រសើរ គឺទទួលបានការគាំទ្រជាប្រព័ន្ធមួយក្នុងសភាពដែលរឹងមាំ។ សុន្ទរកថា មានអត្ថន័យជ្រាលជ្រៅ



ផ្អែកលើបទពិសោធន៍ការងារដែលអ្នកស្រីលីដា

តទៅទំព័រទី ២៣

# Linda Sopheap Sou delivers Lowell Women's Week keynote address

**By James Ostis**

"Redefining Wellness" was the theme at the 19th Annual Lowell Women's breakfast held at Lenzi's on March 3, 2014. For keynote speaker, Linda Sopheap Sou, a key component of wellness is having a strong support system. In an emotional speech, Sou, who serves as the director of Lowell Community Health Center's Teen Block and as the executive director of Angkor Dance Troupe talked about the notion of paying it forward citing the fact she currently works at two youth-serving organizations that helped shape her own youth. But most of all, Linda thanked her parents for being there for her all throughout her life.

Representative Niki Tsongas kicked off the lineup of women in political office during the breakfast which also included appearances by State Senator Eileen Donoghue and a special video greeting from United States Senator Elizabeth Warren. During her remarks, Congresswoman Tsongas cited the expanded numbers and influence seen within the women's caucus since she first took office in 2007. As a member on the House Armed Services committee, Tsongas also spoke of her documented efforts to require the military to create and supply armor made specifically for women's bodies. Prior to Tsongas's legislation, all U.S. body armor was designed for men.

The breakfast also included the presentation of annual "Because of Her" Awards which were given to Jane Calvin, executive director of the Lowell Parks and Conservation Trust, Dracut junior high school teacher, Rebecca D uda and Brandi Giles, owner of Body Destinations in Tyngsboro. Lowell Women's Week is held during the first week of March every year. Next year's Lowell Women's Week will mark the 20th year of the event. For more information, please visit www.lowellwomensweek.org.



# Human Dogsleds highlight a wild Winterfest '14 weekend

## បុណ្យរដូវរងានៅឡូវែល : ប្រណាំងឆ្កែ (មនុស្ស) ដឹករទេះ

By James Ostis

On February 22nd, crowds of spectators descended upon a single spot to watch the elite competition






taking place on snow and ice. No, it was not Sochi, Russia-but Lowell, Massachusetts, home of the 14th Annual Winterfest and the always engaging National Human Dogsled Competition.

Eighteen teams competed in the double-elimination tournament which due to poor weather Friday was held during a single Saturday afternoon instead of the usual two-day format. After several rounds of spirited racing down the Arcand Drive Track, it was the team of "Still Hungry" that emerged victorious knocking off the





defending champion Upper Cut Landscaping.

Other teams participating included Sage Bank, Enterprise Bank, CTI Team, Chariots of Pawtucketville, The Boozehounds, Greater Lowell , United Green Dragons, Sean Shanley and the Project Specialists, The Pride of Lowell, Middlesex Rugby, Madd Love, MJR Mad Dogs, Boys and Girls Club Teen Team, All You Need's a Shove, Shane's Antibullying, and Team TRC.

The often-creative dogsled teams also were judged on their costuming



efforts. In that competition, All You Need is a Shove was awarded the gold, while two entrants from across the river, the Chariots of Pawtucketville and Pawtucketville News Team took home the silver and bronze respectively. The Banker's Cup, a special contest between the various local banks participating, went to Enterprise Bank.

Until we hear that the Human Dogsled Competition is accepted into the Winter Games of Pyeongchang 2018, we can more than settle by looking forward to the 15th Annual Winterfest next year right in the heart of Downtown Lowell.

តមកពីទំព័រទី ១

# អត្ថបទទស្សនៈ"អព្យាក្រឹត្យ"...

តែមួយវិញ បន្ទាប់ពីបែកជាពីរធ្វើបុណ្យខុសគ្នា ចែកឧបាសកឧបាសិកាជាពីរពួកអស់រយៈប្រមាណជា១៥ឆ្នាំមកហើយ ។ វាគ្មិនជាច្រើនបាននិយាយប្រកាន់ខ្លួនថា ជាមនុស្សកណ្តាលជាមនុស្ស "អព្យាក្រឹត" តែមិនពេញចិត្ត ហើយបានបន្ទោសវត្តម្ខាង១យ៉ាងចាស់ដៃដែរ ចំណែកខ្មែរផុសមិនបាននិយាយអ្វីឱ្យបានវែងឆ្ងាយនៅឡើយទេ គ្រាន់តែបានឆ្លើយថា "មានកាន់ជើងមែនតែក្នុងន័យថា នរណាបានធ្វើត្រូវច្រើនជាងនរណាបានធ្វើខុសមិនមែនក្នុងន័យថា ក្រុមនេះជាបក្ខពួកខ្លួនចេះតែត្រូវនោះទេ ហើយបន្តថា សូម្បីតែតុលាការក៏ផ្តល់ការសម្រេចឱ្យនរណាម្ខាងឈ្នះម្ខាងទៀតចាញ់ដូច្នោះដែរ" មិននៅកណ្តាលទេ។

អត្ថបទយើងថ្ងៃនេះ ចង់បញ្ជាក់ឱ្យបានច្បាស់ជាងមុនបន្តិចទៀតថា ការប្រកាន់ជំហររបស់ "ខ្មែរផុស" ឬរបស់វាគ្មិន ឯទៀត១មានន័យយ៉ាងណា?

ក្នុងរឿងវត្តត្រៃរតនារាមតែមួយនេះយើងចង់តែនៅអព្យាក្រឹតរវាង"វត្តលើ-វត្តក្រោម" នេះណាស់តែប្រវត្តិនៃការចងរួមសម្បាច់គ្នាមានតែការភូត កុហក សាធារណជនម្តងហើយម្តងទៀត មិនមានឈប់តំណាងវត្តលើនឹងតំណាងវត្តក្រោមបានចេញមកសន្យាពលរដ្ឋឡូវែលថា "ខ្លួននឹងធ្វើវត្តទាំង២ចូលគ្នាឱ្យទាល់តែបាន" គឺនៅមុខអ្នកស្តាប់ជាង៥០០នាក់នៅសាល "សានិដា" កាលពីពេលផ្តើមផ្ទុះរឿងអាស្រូវនៅ"វត្តសហគមន៍ព្រះសង្ឃខ្មែរ"រាស្ត្របានទះដៃអបអរយ៉ាងខ្លាំង ។

បន្តពីនោះមកមានតែតំណាងវត្តក្រោមទេដែលមកបង្ហាញខ្លួនបង្ហាញឆន្ទៈថាចង់បន្តការបង្រួបបង្រួមវត្តនៅចំពោះមុខប្រជារាស្ត្រឡូវែល រីឯតំណាងវត្តលើមិនដែលមកទេ មិនតែប៉ុណ្ណោះទាំង២ក្រុមថែមទាំងបង្កបញ្ហាឱ្យបែកគ្នាកាន់តែជ្រៅឡើងទៀតផង មានទាំងបណ្តឹងទៅតុលាការនឹងការធ្វើឱ្យអាជ្ញាធរ បិទវត្តមិនឱយចេញចូលផង ។ ខ្មែរផុសបានមើលឃើញថា មានអ្នក"រងគ្រោះដោយសារជំនឿចំពោះវត្តអារាមនឹងព្រះសង្ឃដ៏ជ្រាលជ្រៅ" គឺប្រជាពលរដ្ឋជាពុទ្ធបរិស័ទ ដែលបានបរិច្ចាកទ្រព្យសម្បត្តិ ដើម្បីឱ្យមានកន្លែងបរិសុទ្ធធ្វើ បុណ្យឱ្យបានជ្រះថ្លា បែរជាទៅធ្វើលែងបាន រីឯអ្នកដែលមានឈ្មោះថាបានប្រព្រឹត "អំពើអយុត្តិធម្មដែលអសមត្ថភាពក្នុងរឿងនេះមានគណកម្មការវត្តមានអាចារ្យវត្តមានព្រះសង្ឃ" ដ៏រាបណាវត្តត្រៃរតនារាមនៅតែបិទទ្វារនៅតែគ្រប់គ្រងជាវត្តបែកជាពីរតែដដែលនោះ ពីព្រោះមិនមែនពលរដ្ឋទេដែលធ្វើឱ្យឡូវែលក្លាយជាសហគមន៍បែកបាក់គ្នារកសេចក្តីស្ងប់មិនឃើញមានមុខមាត់អាក្រក់ កម្លាំងក៏ខ្សោយដណ្តើមគ្នាធ្វើមេវត្តនោះ។ មើលឃើញយ៉ាងនេះហើយមិនអាចឱ្យយើងឈរនៅកណ្តាលអ្នករងគ្រោះ ឬកណ្តាលគណកម្មការវត្តទាំង២យករួចខ្លួនម្នាក់ឯងបានទេ គឺត្រូវប្រកាន់យកផ្លូវ "ការពារអ្នករងគ្រោះដោយតិអំពើអយុត្តិធមិ"រហូតដល់ប្រជាពលរដ្ឋឡូវែលអាចធ្វើបុណ្យដោយសុខសន្តិភាពផ្លូវចិត្តឡើងវិញ។ ជាការត្រឹមត្រូវណាស់ដែលពលរដ្ឋ



George W.Bush



សម្តេចឪ. សីហនុ



ឡូវែលរាប់រយនាក់បះបោរច្រើនដងធ្វើបាតុកម្មយ៉ាងក្លាហានបង្ហាញឆន្ទៈតាមរបៀបរបបនៃប្រទេសសេរីការពារសិទ្ធក្នុងជំនឿរបស់ខ្លួនប្រឆាំងនឹងក្រុមមុខក្រាស់ដែលការពារវត្តគ្មានអាណត្តិដូចជាសម្បត្តិផ្ទាល់ខ្លួនហ៊ានចាយលុយវត្តលុយពុទ្ធបរិស័ទដ៏សន្ធឹកសន្ធាប់សម្រាប់ជួល "មេធាវី" ជាជាងរករូបមន្តត្រឹមត្រូវមួយអង្គុយជុំវិញតុមូលជាមួយគ្នាដោយមានអាជ្ញាកណ្តាលឯករាជ្យម្នាក់ឬច្រើននាក់ចរចាអំពី" ការពារសម្បត្តិវប្បធមិខ្មែររួម"ដែលកំពុងផុយរលួយដោយក្រុមដឹកនាំតណ្ហាក្រាស់ខ្នឹកនោះ ។

ដែលហៅថា"អព្យាក្រឹត" គឺករណីដែលមិនកាន់ភាគីទំនាស់ខាងណាមួយ គឺទស្សនៈមនុស្សម្នាក់ដែលនៅចន្លោះមនុស្ស២នាក់មានគំនិត២ដែលផ្ទុយគ្នាតែគ្មានអ្នករងគ្រោះទេ។ ខ្មែរយើងចូលចិត្តប្រកាន់យកអព្យាក្រឹត្យជាអំពើប្រសើរបំផុតតែពាក្យនេះផ្ទាប់ទៅរកឥរិយាបទ"លើកដំកើងការធ្វើត្រូវ"ក្នុងរឿងនេះអំពើដែល"ត្រូវនឹងប្រកបដោយសីលធមិ"គឺ"ការពារអ្នករងគ្រោះ" មិនមែននៅខាងឬនៅកណ្តាល"អ្នកធ្វើបាបសហគមន៍" ទេ។

(រូបទី២-George W.Bush) លោក ជច ប៊ូស្ទ ប្រធានាធិបតីអាមេរិកាំងបាននិយាយនៅពេលវៀបវាយប្រទេសប្រទេសអ៊ីរ៉ាក់ថា"ប្រកាន់ស្មារតីយុត្តិធមិនឹងគ្មានចន្លោះសម្រាប់អព្យាក្រឹតទេ"។

ប្រកាន់អព្យាក្រឹតរបស់ខ្លួន ជាអំពើកុសលមួយដ៏រាបមានស្មារតី"សុច្ចរឹតយុត្តិធម្ម"ក្នុងនោះបើប្រកាន់ថា"មនុស្សនេះជាមិត្តឬអ្នកនោះជាសត្រូវ" ជាមុននោះ មិនអាចប្រើពាក្យ"អព្យាក្រឹត" បានទៀតទេ គឺអ្នកនឹងនៅក្នុង"ក្រុមអ្នកនិយមបក្សពួក"តែប៉ុណ្ណោះ។

ក្នុងទ្រឹស្តីនេះ យើងមានឧទាហរណ៍ជាច្រើនដូចជា ១-បុរសម្នាក់ច្រាននារីម្នាក់ទម្លាក់ពីលើស្ពាន យើងថាបាន-ស្គាល់មនុស្សទាំង២នាក់ដូច្នេះយើងប្រកាន់អព្យាក្រឹតមិនកាន់ជើងនរណាម្នាក់បានទេ? សួរថាតើទុកឱ្យស្ត្រីនោះលង់ទឹកស្លាប់ ឬក៏ទៅជួយស្រោចស្រង់មនុស្សលង់ទឹក? យើងត្រូវតែជួយស្រោចស្រង់ជីវិតនោះ ពីព្រោះយើងត្រូវសម្រេចយកអំពើត្រូវជាមុននឹងគ្មានចន្លោះប្រើ"អព្យាកឹត្រ"ឡើយ(រូបទី៣-ព្រះស៊ីហនុ) ២-នៅក្នុងនយោបាយគំនិត"អព្យាក្រឹត"យើងបានឮនឹងស្គាល់មុនគេ ដោយសារសម្តេចស៊ីហនុចូលចិត្តប្រើក្នុងអតីតកាលជារៀងរាល់ថ្ងៃថា"ខ្មែរជាប្រទេសអព្យាក្រឹតមិនចូលបក្សកុម្មុយនីស្តមិនចូលបក្សសេរីអាត្ទ"តែព្រះអង្គទទួលការបីបមថ្នាក់ថ្នមពីចិនតែមួយគ្រួសារព្រះអង្គឯង មើលត្រូវនឹងខុសលែងឃើញមិនដឹងថា"ចិនយកកម្ពុជាទៅដាក់ក្នុងមាត់កុម្មុយនីស្តនៅពេលណា?" ពេលនោះ"អព្យាក្រឹតភាព"បានរលាយបាត់ហើយក្លាយជា"បក្សពួកកុម្មុយនីស្តនិយម"គឺបើកឱកាសឱ្យសង្គ្រាមប្តើមក្នុងស្រុកបានភ្លាម។

(រូបទី៤-ប៉ូលីសវាយបាតុករ) ៣-ក្នុងនយោបាយបច្ចុប្បន្ន ក៏ដូចគ្នាដែរ យោធានឹងប៉ូលីសបានធ្វើឱ្យរបួសនឹងបាញ់សម្លាប់រាស្ត្រក្រីក្រនឹងកម្មកររោងចក្រ ដែលបានធ្វើបាតុកម្មស្របច្បាប់ប្រទេសនាពេលថ្មី១នេះ រដ្ឋាភិបាលខ្មែរដែលបានឡើងកាន់អំណាចក្នុងការបោះឆ្នោតមួយដែលគ្មានលទ្ធផលច្បាស់លាស់ជាអ្នកបញ្ហា តើរូបភាពនេះយើងអាចនៅជា"អព្យាក្រឹត"រវាងក្រុមយោធា-ប៉ូលីសនឹងក្រុមបាតុករបានដែរឬទេ? យុត្តិធមិតម្រូវឱ្យយើង"ការពារបាតុកររងគ្រោះដោយអំពើអយុត្តធមិ"គ្មានចន្លោះសម្រាប់"អព្យាក្រឹត" ដូចគ្នាទៀតទេ ...។

ដ៏រាបណាយើងមាន"អ្នករងគ្រោះ"នៅក្នុងជញ្ជីងយុត្តិធម្ម-សីលធម្មរបស់យើងហើយពាក្យ"អព្យាក្រឹត"លែងមានន័យអ្វីទៀតហើយ នៅសល់តែពាក្យ"ត្រូវឬខុស"តែប៉ុណ្ណោះដែលនិយាយបាន ។

ខ្មែរផុសសូមអរគុណដែលបានផ្តល់ឱកាសអនុញ្ញាត្តឱ្យយើងបញ្ចេញយោបល់ពីពាក្យ"អព្យាក្រឹត្យ"នេះបាន៕

Continued from page 01

# Greater Lowell Chamber...

the Massachusetts Legislature attended the event and talked about many Federal and State Issues.

Congresswoman Tsongas spoke about the great damage that last fall's shutdown of the Federal government caused to the economy but also said she now sees signs that the Democrats and Republicans have learned that they must work together to get anything accomplished. She said the process is still messy but people have learned that no legislation will pass in Washington unless it has bipartisan support.


Niki Tsongas

State Representative Kevin Murphy who represents the Highlands and Acre neighborhoods of Lowell spoke next. He said the most important part of economic development is to support the businesses that already operate here in Lowell. One way to do that is to ensure that any increase in the minimum wage is modest so that small businesses are not harmed. Representative Murphy also said that the best way to attract new businesses to Lowell is to continue to have a talented workforce living here. To do that, we must continue to support our public schools, Middlesex Community College and UMass Lowell.

State Representative James Arciero who represents Westford, Littleton and part of Chelmsford said that many major high tech companies such as IBM and Kronos are located in his district. The challenge in his towns is a lack of public transportation. He said that the young people who work at these companies prefer living in cities and not in suburbs and that many do not even own cars and rely on public transportation. Making trains and buses more convenient for workers is an important issue for Representative Arciero.

State Representative Marc Lombardo represents Billerica and was also the only Republican elected official who participated (the rest were Democrats). Lombardo criticized state government for imposing too many regulations and fees on small businesses. His believes that before any new regulations or taxes are enacted their impact on business profitability should be considered.

State Representative Dave Nangle who represents Belvidere, South Lowell and part of Chelmsford talked about the importance of state government support for the elderly. As an example, he said the state contributes more than $250 million per year to Elder Services, an agency that helps older people stay in their homes as an alternative to moving to nursing homes.

State Senator Ken Donnelly who represents Billerica, Lexington and Arlington said the transportation bill that recently passed the legislature is a very important tool for economic development. He said that when employees are stuck in traffic jams, they are not being productive so making our transportation system more efficient helps business. Senator Donnelly also said more money should be given to Community Colleges and Vocational High Schools to provide older workers with training in new technologies so that the workers will continue to have skills that are valuable to employers.

The final speaker was Representative Tom Golden who represents the Lowell neighborhoods of Centralville and Pawtucketville and part of Chelmsford. He said the most important part of his job is to listen to all kinds of people - employers, workers, young people, the elderly, everyone. Only by learning about people's problems and challenges can a legislator understand the types of laws that are needed.

The Greater Lowell Chamber of Commerce is located at 131 Merrimack Street in Lowell. The Chamber provides its members with resources, advocacy and information, along with networking and marketing opportunities. For more information, visit the Chamber's website at http://greaterlowellcc.org.

តមកពីទំព័រទី ១

## កិច្ចប្រជុំពិភាក្សាអំពីនីតិបញ្ញត្តិដោយ...

មណ្ឌលទទួលបដិសណ្ឋារកិច្ច និងសន្និសីទនៃសាលាវិទ្យាល័យយុវម៉ាស់ហៅកាត់ថា ICC ។ កម្មវិធីនេះរៀបចំទទួលអាហារពេលព្រឹក និងក្រោមការសម្របសម្រួលពីសភាពាណិជ្ជកម្មក្រុងឡូវែល ។ ព្រឹទ្ធសភានីគីសុងហ្កាស និងសមាជិកនានានៃអង្គនីតិបញ្ញត្តិប្រចាំរដ្ឋម៉ាសាឈូសេតជាច្រើនទៀតបានមានវត្តមាន និងជជែកពិភាក្សាអំពីចំណុចសំខាន់ៗជាច្រើនអំពីបញ្ហាទាំងថ្នាក់រដ្ឋ និងសហព័ន្ធ ។

ព្រឹទ្ធសមាជិកនីគីសុងហ្កាសបានមានប្រសាសន៍លើកឡើងអំពីផលប៉ះពាល់ធ្ងន់ធ្ងរដល់សេដ្ឋកិច្ចដែលបណ្តាលមកពីបរាជ័យនៃការបញ្ឈប់ដំណើរការរដ្ឋសហព័ន្ធ ។ ស្របគ្នានោះព្រឹទ្ធសមាជិករូបនេះក៏បានលើកឡើងផងដែរ អំពីបទពិសោធន៍ដែលបក្សប្រជាធិបតេយ្យ និងសាធារណរដ្ឋរៀនស្វែងយល់ពីបទពិសោធន៍មួយនេះ ហើយគប្បីសហការធ្វើការជាមួយគ្នា ដើម្បីសម្រេចគោលដៅរួម ។ អ្នកស្រីបានមានប្រសាសន៍ផងដែរថា ដំណើរការដែលកំពុងប្រព្រឹត្តទៅស្ថិតនៅក្នុងស្ថានភាពច្របូកច្របល់នៅឡើយ ។ យ៉ាងណាមិញ ម្នាក់ៗនៃថ្នាក់ដឹកនាំក៏បានទទួលមេរៀនរួមហើយថា និងពុំមានច្បាប់ណាមួយដែលត្រូវបានអនុម័តឡើយ លុះត្រាតែរដ្ឋាភិបាលវ៉ាស៊ីនតុនងាកមកចាប់ដៃសហការគ្នា ។

អ្នកតំណាងរដ្ឋហៃឡែន និងខេតខឺឈ្មោះ ខេវិន មឺហ្វី បានឡើងមានប្រសាសន៍បន្ទាប់ ។ លោកលើកឡើងថា ចំណុចដ៏មានសារសំខាន់ដែលគាំទ្រស្ថេរភាព និងវឌ្ឍនភាពសេដ្ឋកិច្ច គឺការទ្រទ្រង់នូវគាំទ្រនូវជំនួញដែលមានស្រាប់ក្នុងសហគមន៍ ។


អភិបាលក្រុង អេលីយុត រ៉ដនី
ព្រឹទ្ធសមាជិក នីគី សុងហ្កាស

មធ្យោបាយមួយដែលអាចជួយរឿងនេះបាន គឺត្រូវឱ្យច្បាស់ថា ការបង្កើនប្រាក់ឈ្នួលអប្បបរិមា និងមិនធ្វើឱ្យជំនួញទាំងអស់នោះ ស្ថិតក្នុងសភាពអាសន្ន ។ តំណាងរដ្ឋមឺហ្វីក៏បានមានប្រសាសន៍ផងដែរ ពីមធ្យោបាយដែលអាចទាក់ទងជំនួញថ្មីមកសហគមន៍ គឺតាមរយៈការបន្តឱ្យមានភាពសកម្មនៃមជ្ឈមណ្ឌល និងស្ថាប័នដែលមានសក្តានុពលក្នុងតំបន់ដូចជាសាលាសាធារណមហាវិទ្យាល័យសហគមន៍ និងសាលាសាកលវិទ្យាល័យយូម៉ាសឡូវែល ។

តំណាងរដ្ឋតំបន់វែសហ្វឺត, លីថលថោន និងផ្នែករបស់ឆឹមស្វដបានមានឈ្មោះថា ចេមស៍ អាស៊ីរ៉ូ បានមានប្រសាសន៍ថា ក្រុមហ៊ុនបច្ចេកវិទ្យាទំនើប ដូចជា អាយប៊ីអឹម និងក្រូណូមានទីតាំងស្ថិតនៅក្នុងស្រុក ។ បញ្ហាប្រឈមដែលមាននៅតំបន់ក្រុងរបស់លោក គឺកង្វះមធ្យោបាយធ្វើដំណើរសាធារណៈ ។

លោកបានមានប្រសាសន៍ថា អ្នកធ្វើការវ័យក្មេងដែលបំពេញការងារនៅក្រុមហ៊ុនទាំងអស់នោះ មានទំនោររស់នៅក្នុងក្រុង ហើយមិនចង់នៅជាយក្រុងឡើយ ហើយភាគច្រើនពួកគេមិនមានឡានជិះទេ គឺពឹងលើមធ្យោបាយធ្វើដំណើរសាធារណៈទាំងស្រុង ។

ដូចនេះ ការបង្កើតឱ្យមានមធ្យោបាយធ្វើដំណើរសាធារណៈទាំងរថភ្លើង និងឡានក្រុងឱ្យបានប្រសើរឡើង និងជួយសម្រួលដល់អ្នកធ្វើការទាំងនោះ ។ នេះជាមតិរបស់លោកតំណាងរដ្ឋអាសេរ៉ូ ។

អ្នកតំណាងរដ្ឋសម្រាប់តំណាងតំបន់បៀលឡឺរីកាលោក ម៉ាក ឡំបាដូ ជាមនុស្សតែម្នាក់គត់ដែលអញ្ជើញមកពីបក្សសាធារណរដ្ឋ ហើយដែលបានជាប់ឆ្នោត(ក្រៅពីនោះ គឺអញ្ជើញពីបក្សប្រជាធិបតេយ្យ) ។ លោក ឡំ បាដូ បានធ្វើការរិះគន់រដ្ឋាភិបាលដែលបង្កើតឱ្យមានបន្ទុកជាច្រើនទាំងគោលការណ៍ និងថ្លៃឈ្នួលឱ្យជំនួញតូចៗទទួលខុសត្រូវ ។

គោលគំនិតរបស់លោក គឺថាមុននិងច្បាប់ឬសារាចរថ្មីអំពីពន្ធ និងចំណុចផ្សេងៗទៀត ត្រូវបានអនុម័តឡើង គួរតែធ្វើការពិនិត្យពីទំហំប៉ះពាល់ទៅលើផលប្រយោជន៍ម្ចាស់ជំនួញផងដែរ ។

តំណាងរដ្ឋសម្រាប់តំបន់បែលវីដៀ, ឡូវែលប៉ែកខាងត្បូង និងផ្នែកនៃ ឆឹម ស្វដ លោក ដេវ ណេហ្គលបានមានប្រសាសន៍អំពីសារៈសំខាន់នៃការគាំទ្រផ្តត់ផ្គង់មនុស្សវ័យចំណាស់ពីសំណាក់រដ្ឋ ។ លោកលើកឧទាហរណ៍ជាក់ស្តែងដែលរដ្ឋបានប្រគល់ **តទៅទំព័រទី ២៤**

# វីរបុរសខ្មែរ ~ ព្រះអង្គម្ចាស់ ស៊ីសុវត្ថិ យុត្តិវង្ស (១៩១៣~១៩៤៧)

(១៩១៣ - ១៩៤៧)

ព្រះអង្គម្ចាស់ ស៊ីសុវត្ថិ យុត្តិវង្ស

វីរបុរសខ្មែរ - ព្រះអង្គម្ចាស់ ស៊ីសុវត្ថិ យុត្តិវង្ស (១៩១៣- ១៩៤៧) ព្រះអង្គម្ចាស់ ស៊ីសុវត្ថិ យុត្តិវង្ស ជាក្សត្រាខ្មែរម្នាក់ជាវរជនជាបញ្ញវន្តមានប្រាជ្ញាវាងវៃបានសិក្សាឧត្តមសិក្សានៅមហាវិទ្យាល័យវិទ្យាសាស្ត្រប្រទេសបារាំង និងបានទទួលសញ្ញាប័ត្របណ្ឌិតរដ្ឋគណិតវិទ្យានៅឆ្នាំ១៩៤១ ។ ព្រះអង្គបានជាប់ឆ្នោតជាប្រធានគណបក្សប្រជាធិបតេយ្យដែលទើបនឹងបង្កើត នៅខែមេសា ១៩៤៦ ដោយលោក ស៊ឹម វ៉ា លោក ឈាន វ៉ន និងលោក អៀវកើស ។ព្រះអង្គជាស្ថាបនិកម្នាក់នៃរដ្ឋធម្មនុញ្ញ ដែលត្រូវបានប្រកាសឱ្យប្រើនៅថ្ងៃទី៦ ឧសភា ១៩៤៧ "ប្រទេសកម្ពុជាជាប្រទេសរាជានិយមអាស្រ័យរដ្ឋធម្មនុញ្ញ"។ ជាគណបក្សឈ្នះឆ្នោតក្នុងការបោះឆ្នោតសភាធម្មនុញ្ញលើកទី១ នៅកម្ពុជាថ្ងៃទី១ កញ្ញា ១៩៤៦ ព្រះអង្គត្រូវបានតែងតាំងជានាយករដ្ឋមន្ត្រីពីថ្ងៃទី១៥ ធ្នូ ១៩៤៦ ដល់ថ្ងៃទី២៤ កក្កដា ១៩៤៧ ។ ព្រះអង្គបានចរចាជាមួយបារាំងជាច្រើនលើកដែលអនុញ្ញាតឱ្យបារាំងផ្តល់ដល់កម្ពុជានូវ "លក្ខន្តិកៈរដ្ឋស្វ័យតនៅក្នុងសភាបារាំង" ។ (ដកស្រង់ចេញពីសៀវភៅប្រវត្តិសាស្ត្រកម្ពុជានិងវរជនខ្មែរនិពន្ធដោយលោក សាគូ សាម៉ុត) ។





**ស៊ីសុវត្ថិ យុត្តិវង្ស**

(១៩១៣ - ១៩៤៧)

ព្រះអង្គម្ចាស់ ស៊ីសុវត្ថិ យុត្តិវង្ស កើតនៅឆ្នាំ១៩១៣ នៅក្រុងភ្នំពេញ ។ ព្រះបិតា នាម ចំរើន វង្ស ត្រូវជាចៅ ព្រះអង្គ ភីម ព្រះមាតា នាម យុកិផន ជាចៅ ព្រះបាទ ស៊ីសុវត្ថិ ។

ព្រះអង្គបានធ្វើការសិក្សា បឋមសិក្សា និង មធ្យមសិក្សា នៅ ភ្នំពេញ និង ក្រុងព្រៃនគរ ។ បន្ទាប់មក ព្រះអង្គបានសិក្សាឧត្តមសិក្សា នៅ មហាវិទ្យាល័យ វិទ្យាសាស្ត្រ MONTPELLIER ស្រុកបារាំង ។ ព្រះអង្គបានទទួល សញ្ញាប័ត្រ "បណ្ឌិតរដ្ឋ គណិតវិទ្យា" នៅឆ្នាំ ១៩៤១ ។ ព្រះអង្គមានមហេសីជាស្ត្រីជាតិបារាំងសែស និង ចូលធ្វើ ជាសកម្មជន នៃ គណបក្ស សង្គមនិយមបារាំង (SFIO) ។ ទ្រង់ យុត្តិវង្ស បានវិលត្រឡប់ចូលកម្ពុជា នៅខែមិថុនា ១៩៤៦ និង បានជាប់ឆ្នោតជាប្រធាន "គណបក្ស ប្រជាធិបតេយ្យ" ដែលទើបនឹងបង្កើត នៅខែមេសា ១៩៤៦ ដោយ លោក ស៊ឹម វ៉ា, ឈាន វ៉ន, អៀវ កើស ។ ប្រទេសកម្ពុជា បានប្រើពហុបក្ស រហូតដល់ឆ្នាំ ១៩៥៥ ជាឆ្នាំបង្កើត "សង្គមរាស្ត្រនិយម" ដោយ សម្តេច សីហនុ ។ នៅថ្ងៃទី ១ កញ្ញា ១៩៤៦ មានការបោះឆ្នោត សភាធម្មនុញ្ញ ជាលើកទី ១ នៅកម្ពុជា ដែល មិនដែលមានសោះ នៅប្រទេសនេះ ។ ក្នុង ចំនួន ៦៧ អាសនៈ នៅសភា គណបក្ស ប្រជាធិបតេយ្យ បានទទួល ៥០ អាសនៈ ។ ទ្រង់ យុត្តិវង្ស ជាស្ថាបនិកម្នាក់ នៃ រដ្ឋធម្មនុញ្ញ ដែលអនុញ្ញាតឲ្យ មហាក្សត្រ សីហនុ ប្រកាសឲ្យប្រើ នៅថ្ងៃទី ៦ ឧសភា ១៩៤៧ **"ប្រទេសកម្ពុជា ជាប្រទេស រាជានិយមអាស្រ័យរដ្ឋធម្មនុញ្ញ"** ។ ជា គណបក្ស ឈ្នះឆ្នោត ស៊ីសុវត្ថិ យុត្តិវង្ស ត្រូវបានតែងតាំងជា នាយករដ្ឋមន្ត្រី ពីថ្ងៃទី ១៥ ធ្នូ ១៩៤៦ ដល់ថ្ងៃទី ២៤ កក្កដា ១៩៤៧ ។ ទ្រង់ យុត្តិវង្ស បានចរចាជាមួយ បារាំង ជាច្រើនលើក ដែលអនុញ្ញាតឲ្យបារាំង ផ្តល់ដល់កម្ពុជានូវ "លក្ខន្តិកៈរដ្ឋស្វ័យត នៅក្នុងសភាបារាំង" ។ ទ្រង់ យុត្តិវង្ស បានចូលទីវង្គត នៅថ្ងៃទី ១១ សីហា ១៩៤៧ ដោយ "ជម្ងឺ" តែមតិខ្លះនិយាយថា "សុគតទាន់ហន់" របៀបនេះ បង្កើតឲ្យមានការសង្ស័យ ។ ស៊ីសុវត្ថិ យុត្តិវង្ស ជាក្សត្រាខ្មែរម្នាក់ ជាវរជន ជាបញ្ញវន្តមានប្រាជ្ញាវាងវៃ ដែលពិបាករក ក្សត្រា-ក្សត្រី ណា មកប្រៀបនឹងព្រះអង្គបានឡើយ ។




## តមកពីទំព័រទី ១១ "ក្រួណូ" ឬកាលប្បវត្ត...

ដោយសារមានអ្នកគាំទ្រលោក ហ៊ុន សែន ជាច្រើនរយនាក់នឹងកងកម្លាំងសន្តិសុខយ៉ាងច្រើននៅទីនោះដែរ ។ កិច្ចប្រជុំផ្សេងៗទៀតក៏ត្រូវបានបញ្ឈប់ដោយក្រុមអ្នកគាំទ្រលោកហ៊ុន សែន ចូលជានៅព្រៃវែង (25 Jan. )នៅកំពុងចាម ( 26 Jan.). ។ មេដឹកនាំសហជីពខាងរដ្ឋាភិបាលដែលជារាជការទទួលប្រាក់បៀវត្សពីរដ្ឋបានស្នើសុំឱ្យដាក់ទណ្ឌកម្មដល់តំណាងសហជីពចំនួន៦ ដែលមិនមែនរដ្ឋាភិបាល(CD 24.01.14)

*ថ្ងៃ១៩កុម្ភៈ តំណាងគណបក្សប្រជាជននឹងតំណាងគណបក្សសង្គ្រោះជាតិចួបប្រជុំគ្នាពិភក្សាអំពីយន្តការកែទម្រង់ពីការបោះឆ្នោត ។ គណបក្សសង្គ្រោះជាតិបានលុបចោលជុំនួបថ្ងៃទី៤មករា ដោយបុព្វហេតុមានការបង្ក្រាបយ៉ាងឃោរឃៅកាលពីមុន១ថ្ងៃ ។ គណបក្សទាំង២បានសម្រេចបង្កើតគណកម្មការមួយដែលមានគណបក្សមានអាសនៈនៅសភា (ករណីនេះត្រូវនឹងគណបក្សសង្គ្រោះជាតិឬទេ? (ដើម្បីសរសេរគម្រោងកែទម្រង់ ។ គណកម្មការនោះ នឹងបើកចំហរឱ្យសង្គមស៊ីវិលចូលរួមបាន ហើយអាចទទួលថវិការពីអង្គការក្រៅរដ្ឋាភិបាលជាតិ និងអន្តរជាតិ ។ គនបក្សប្រជាជនបានឱ្យដឹងថា "ការបោះឆ្នោតមុនអាណត្តិអាចប្រព្រឹត្តទៅបាន លុះណាតែមានការកែប្រែរដ្ឋធម្មនុញ្ញដែលអនុម័តដោយសម្លេង២ភាគ៣នៃសភាជាតិ ដូច្នេះនឹងមានវត្តមាននៃគណបក្សសង្គ្រោះជាតិ: ពន្លឺក្តីសង្ឃឹមមានខ្លះហើយ!



**ការរៀបចំបោះឆ្នោតឃុំ សង្កាត់**

*គណបក្សប្រជាជននឹងជូនប្រាក់បំណាច់១២៥ដុល្លាដល់សមាជិកក្រុមប្រឹក្សាឃុំសង្កាត់ និងមេឃុំខ្លួនចំនួន៨៩,២៩២រូប តើនេះមិនមែនជាសញ្ញាថា គណបក្សកំពុងតែទាក់ទាញឱ្យត្រឡប់មានការទុកចិត្តពីអ្នកជាប់ឆ្នោតខ្លួនមកវិញទេឬ? គេសង្កេតឃើញថាបន្ទាប់ពីឃើញមានការបង្ក្រាបថ្ងៃទី៣ មករាមកនៅតាមខេត្តទោះជាសមាជិកគាំទ្រដដែលនោះក៏លែង មានការជឿជាក់ទៀត ហើយ ៕

# Clemente Park សួនប៉ៃលិន ឬខ្លែមិនតេផាក

by Richard P. Howe Jr.

Clemente Park is an important part of Lowell's Cambodia Town neighborhood and the scene of intense volleyball games and many other fun activities. More than 100 years ago this park was the site of one of the most modern baseball stadiums in America. Built in 1906 and named Washington Park, the baseball stadium had 3500 seats and was home to the Lowell Tigers of the professional New England Baseball League.

Although the Tigers were very popular when the park first opened, people soon lost interest in the baseball team and attendance dropped. This caused the owner to sell the team. The new owner moved the team to a new location. Without a baseball team, the stadium at Washington Park was neglected and was eventually torn down. After a few years the city of Lowell took over space as a city park and built several small fields for local softball and baseball teams.

The park kept the name Washington Park until 1973 when the Lowell City Council voted to rename the park Roberto Clemente Park in honor of the all star outfielder of the Pittsburgh Pirates who died at the peak of his baseball career while flying emergency supplies to his homeland of Nicaragua after a devastating earthquake struck that country that year. At the same time, the city installed powerful "arclights" that allowed adult softball teams and Little League baseball teams to play there late into the night all summer long.

Volleyball courts and playground equipment have replaced the softball fields of the 1970s, but Clemente Park remains an important gathering place for residents of the neighborhood.



**អត្ថបទរិឆាដ ហូវ**

**ប្រែសម្រួលដោយ : សុខា**

ផាកប៉ៃលិនដែលប្រជាជនខ្មែរតែងហៅឈ្មោះថា ខ្លែមិនតេផាក ផាក(សួន) មួយនេះកន្លងមកមានឈ្មោះថា washing park (វ៉ាស៊ីនតោនផាក) ដែលត្រូវបានសាងសង់នៅឆ្នាំ១៩០៦។ ការពិតសួនប៉ៃលិន ដើមឡើយ ជាពហុកីឡដ្ឋានដែលអាចអ្នកទស្សនាបាន៣៥០០០នាក់ និងជាទីលានប្រកួតបេសបល (Baseball) ។

លុះដល់ឆ្នាំ១៩៧៣ឆ្នាំសួនមួយនេះត្រូវបានប្តូរឈ្មោះពីវ៉ាស៊ីនតោនផាកទៅជាខ្លែមិនតេផាក ដើម្បីរំលឹកដល់លោក រ៉ូបឺតូ ខ្លែមិនតេផាក តារាបាល់ទាត់បេសបលដែលបានស្លាប់ដោយសារការ




ធ្លាក់យន្តហោះពេលលោកប្រញាប់ប្រញាល់បញ្ជូនជំនួយដល់ជនរងគ្រោះដោយសាររញ្ជួយដីនៅប្រទេសនីហ្គារ៉ាហ្គ័រ ។

ផាកខ្លែមិនតេ ផ្តល់នូវទីធ្លាធំទូលាយឱ្យប្រជាជនបានលេងបាល់បោះ និងបោះប៊ូល និងកន្លែងសម្រាប់ឱ្យកុមារលំហែកាយ ហើយមានភ្លើងបំភ្លឺពេញមួយថ្ងៃពេលរដូវក្តៅជាទីកន្លែងបង្កើតភាតរភាពក្នុងសហគមន៍ ៕

# វីរបុរសខ្មែរ ~ ប៊ុណ្ណ ចន្ទម៉ុល (១៩១៦_១៩៧៥)

**ចន្ទម៉ុល**

វីរបុរសខ្មែរ - ប៊ុណ្ណ ចន្ទម៉ុល (១៩១៦-១៩៧៥) លោក ប៊ុណ្ណ ចន្ទម៉ុល ជាអ្នកតស៊ូជើងចាស់ប្រឆាំងនឹងអាណានិគមបារាំងសេស ។ នៅឆ្នាំ១៩៤២ លោកបានចូលរួមបាតុកម្មជាមួយនឹងព្រះសង្ឃជាច្រើនរយអង្គនិងមនុស្សរាប់ពាន់នាក់ប្រឆាំងនឹងរដ្ឋបាលបារាំងសេសដើម្បីទាមទារឱ្យដោះលែងលោកអាចារ្យ ហែម ចៀវ និងលោក នួន ឌួង ។ លោកត្រូវរដ្ឋបាលបារាំងចាប់បញ្ជូនទៅដាក់នៅពន្ធនាគារលើកោះត្រឡាច (île Poulo Condor, Cochinchine) ចំនួន៣ឆ្នាំ ។ លោកបានសរសេរសៀវភៅ ២ គឺ ។១) គុកនយោបាយ និង (2) ចរិតខ្មែរ ដែលរៀបរាប់ពីជីវិតផ្ទាល់ខ្លួន និងបទពិសោធន៍របស់លោកក្នុងឆាកនយោបាយដោយទទួលបានការគាំទ្រយ៉ាងខ្លាំងក្នុងមជ្ឈដ្ឋានជាតិ និងអន្តរជាតិ ។



**ប៊ុន ចន្ទម៉ុល**

កើតក្នុងឆ្នាំ ១៩១៦ នៅភ្នំពេញជាយុទ្ធជនជើងចាស់ប្រឆាំងនឹងអានិគមបារាំងសេស ហើយជាបក្សព័ន្ធនឹងលោក សឺង ង៉ុកថាន់ ជាស្ថាបនិកដំបូងនៃកាសែតនយោបាយភាសាខ្មែរ "នគរវត្ត"។ នៅឆ្នាំ១៩៤២ កាលលោកបានចូលរួមបាតុកម្មជាមួយនឹងព្រះសង្ឃជាច្រើនរយអង្គប្រឆាំងនឹងរដ្ឋបាលអាណានិគមបារាំងសេស។ លោកត្រូវរដ្ឋបាលបារាំងចាប់បញ្ជូនទៅដាក់នៅពន្ធនាគារក្នុងកោះត្រឡាចចំនួន៣ឆ្នាំ។

បន្ទាប់ពីរដ្ឋប្រហារយោធានៅឆ្នាំ ១៩៧០ មកលោកបានត្រឡប់ចូលក្នុងឆាកនយោបាយវិញ គឺបានទទួលងារជាវរនីយត្រីឧត្តមបញ្ជាការដ្ឋានជូនក្បួន និងអភិបាលជាប់ឆ្នោតជាប្រធានពុទ្ធិកសមាគម ហើយជាពិសេសលោកបានចូលក្នុងគណកម្មការតែងតាំងរដ្ឋធម្មនុញ្ញសាធារណរដ្ឋខ្មែរ។ ទន្ទឹមនឹងមុខងារថ្មីនេះ លោកបានសរសេរសៀវភៅ២ពណ៌នាអំពីជីវិតផ្ទាល់ខ្លួនក្នុងឆាកនយោបាយ និងបទពិសោធន៍ក្នុងវិស័យនេះ។ សៀវភៅទី១ គុកនយោបាយបោះផ្សាយនៅខែមីនាមានជោគជ័យយ៉ាងខ្លាំងក្លាក្នុងមជ្ឈដ្ឋានមហាជន និងអន្តរជាតិ ពោលគឺត្រូវលក់អស់ក្នុងរយៈពេលតែ២ខែប៉ុណ្ណោះ ហើយលោកបានយកមកបោះពុម្ពជាលើកទី២ នៅខែឧសភាចំនួន ៤.000 ក្បាលទៀត។

សៀវភៅនេះបង្ហាញពីប្រវត្តិអ្នកនិពន្ធ និងសង្គមនយោបាយនៅស្រុកខ្មែររវាងឆ្នាំ ១៩៣៦-១៩៤៥។ សៀវភៅទី២ មានចំណងជើងថា ចរិតខ្មែរ បោះពុម្ពផ្សាយនៅឆ្នាំ ១៩៧៣ (១៣៩ ទំព័រ) ចែងពីប្រវត្តិលោកបទពិសោធន៍ និងសង្គមនយោបាយខ្មែរតាំងពីសម័យអាណានិគមបារាំងរហូតដល់ឆ្នាំ១៩៧២។ នេះសម្រង់ពីសៀវភៅគុកនយោបាយជំពូកទ១១ មានចំណងជើងថា "មរណភាពនៃអាចារ្យ ហែម ចៀវ" :

"នៅកន្លែង ដិកយុក នេះខ្លួនខ្ញុំដូចជាមនុស្សមានឥស្សរភាពពេញទីអាចបំភ្លេចបាននូវសេចក្ដីលំបាកទាំងប៉ុន្មាន។ ប៉ុន្តែយ៉ាងណាក៏ដោយ ខ្ញុំនៅតែនឹកមម៉ៃចំពោះជោគវាសនារបស់ខ្ញុំទៅអនាគត និងអនាគតប្រទេសយើងដែរ ម្យ៉ាងទៀតខ្ញុំនឹកគិតទៅដល់លោកគ្រូអាចរ្យ ហែម ចៀវ, លោក នួន ឌួង, លោក ប៉ាច ឈឺន ដែលគេប្រកាសនៅព្រៃនគរថា ត្រូវប្រហារជីវិត ហើយដែលថា ចាំផ្ញើសំណុំរឿងទៅលោកឧត្ដមសេនីយ ប៉េ តាំង ឯក្រុងប៉ារីស ដើម្បីសុំសំរាលទោសនោះ តើបានស្រាលខ្លះដែរ ឬក៏ត្រូវគេប្រហារជីវិតទៅហើយ? ខ្ញុំគិត ថា បើគេបន្ថយទោសខ្លះនោះ ប្រហែលអ្នកទាំង បីនេះមិនស្លាប់ទេ ហើយប្រហែលជាបានត្រូវគេបញ្ជូនមកកាន់កោះត្រឡាចនេះដែរហើយ។

ខ្ញុំនៅនឹងកន្លែង ដិកយុក នេះបានជាង៤ខែ ទើបបានដំណឹងថា លោកអាចរ្យ ហែម ចៀវ លោក នួន ឌួង លោក ប៉ាច ឈឺន ត្រូវបានគេបញ្ជូនមកកោះត្រឡាចនេះមែន។ បញ្ជូនមក១ខែ ហើយគឺក្នុងខែមិថុនា ឆ្នាំ១៩៤៣ ។ ខ្ញុំស៊ើបទៅដឹងថា គេដាក់អ្នកទាំងបីឱ្យនៅក្នុងគុកលេខ៤ ជាកន្លែងទោសឧក្រិដ្ឋទោសអស់អាយុទាំងអស់គ្នា។ កន្លែងនោះគេឱ្យអ្នកទោសវិញខ្សែពួរធ្វើរបស់ផ្សេងៗតាមការបង្គាប់របស់បារាំង។

កន្លែងគុកទី៤ នេះ គេហាមដាច់ខាតមិនឱ្យមនុស្សផ្សេងទៅសាកសួរសុខទុក្ខមនុស្សទោសដែលនៅក្នុងនោះសោះឡើយ។ ជាហេតុនាំឱ្យពិបាកទាក់ទងគ្នាណាស់ ប៉ុន្តែយ៉ាងណាក៏ដោយ ខ្ញុំក៏ចេះតែខំលបលាក់ផ្ញើរបស់របរទៅជូនលោកទាំងបីនាក់នោះបានខ្លះដែរ ហើយបានដំណឹងសុខ ទុក្ខពីទីគុកលេខ៤ នេះខ្លះៗដែរ ដោយពួកមនុស្សទោសដែលប្រើឱ្យចេញក្នុងទីនោះម្ដងម្កាលគេនិយាយឱ្យព័ត៌មាន។

លោកអាចរ្យ ហែម ចៀវ និងលោក នួន ឌួង នៅគុកនោះបានប្រហែល៤ខែក៏មានរោគពាធបៀតបៀន។ លោកអាចារ្យ ហែម ចៀវ មានរោគមូលយ៉ាងខ្លាំង។ ឯលោកអាចារ្យ នួន ឌួង ដោយគ្រូពេទ្យចាក់ថ្នាំច្រើនម្ដុលពេកក៏កើតបូសត្រង់ត្រគាក ហើមយ៉ាងធំ ហើយពេទ្យក៏វះយកខ្ទុះចេញយ៉ាងសែនវេទនា។ ដោយអ្នកទោសនោះមានជំងឺកាន់តែដាបណាស់នោះគេក៏បញ្ចេញយកទៅដាក់នៅមន្ទីរពេទ្យទាំង២នាក់។

ខ្ញុំប្រញាប់ទៅសួរនៅមន្ទីពេទ្យក៏ស្លុតចិត្តតែម្ដង ត្បិតឃើញអ្នកទាំង២ ទុរន់ទុរាណាស់ទៅហើយ ហើយឃើញលោកអាចារ្យ ហែម ចៀវ ធ្ងន់ដាបជាងលោកអាចារ្យ នួន ឌួង ទៅ ទៀត។ មើលទៅមិនធារទេ... រោគមូលនៅស្រុកកោះត្រឡាចនេះ ពិបាកព្យាបាលណាស់គ្មានថ្នាំសង្កូវសោះ ពេទ្យយកតែទឹកសមុទ្រ ឬក៏ទឹកកំបោរសផឹកប៉ុណ្ណោះ។ ខ្ញុំដូចជាបានដឹងមុនស្រេចថា លោកអាចារ្យ ហែម ចៀវ មិនបានរស់រានមានជីវិតយូរទេ។ ខ្លោចចិត្តណាស់ ខ្ញុំក៏បានទៅទាក់ទងនឹងមុំនុស្សទោសជាកម្មករដែលរក្សាពេទ្យនោះ ឱ្យរវាំងមើលលោកអាចារ្យទាំងពីរផង។ ខ្ញុំបានឱ្យប្រាក់ទៅពួកទាំងនេះ ឱ្យគេយកចិត្តទុកដាក់ចំពោះអ្នកជម្ងឺទាំងពីរ ហើយខ្ញុំបានផ្ដាំពួកនោះទៀតថា ប្រសិនបើអ្នកទាំងពីរនោះស្លាប់ ហើយតម្រូវឱ្យយកទៅកប់លាយឡំជាមួយអ្នកអ្នកឯទៀតឱ្យសោះ។ នៅកោះត្រឡាចមានពេលខ្លះមនុស្សទោសស្លាប់ច្រើន ខ្មោចនោះគេយកទៅកប់៥-៦នាក់តែមួយរណ្ដៅក៏មាន។ ខ្ញុំសុំឱ្យគេអនុគ្រោះដូច្នេះ ព្រោះគិតថា បើលោកអាចារ្យ ហែម ចៀវ ឬលោកអាចារ្យ នួន ឌួង ស្លាប់ទៅនោះ ខ្ញុំក៏អាចដឹងបានស្គាល់នូវផ្នូររបស់លោកតទៀតដែរ។

កាប៉ូរាល់ពេទ្យ និងកម្មករពេត្យ ក៏ទទួលតាមសំណូមពររបស់ខ្ញុំ។

ខ្ញុំមកកន្លែងវិញ ដោយទឹកចិត្តបារម្ភ។

ក្រោយមក ខ្ញុំក៏បានដំណឹងថា លោកគ្រូអាចារ្យ ហែម ចៀវ បានស្លាប់ទៅហើយ ដំណឹងមិនបណ្ដាលឱ្យខ្ញុំរន្ធត់ចិត្តអ្វីទេ ព្រោះខ្ញុំដូចជាបាន




ដឹងមុនស្រេចទៅហើយ ប៉ុន្តែសេចក្ដីខ្លោចផ្សាស្ដាយស្រណោះដ៏ធំធេងរបស់ខ្ញុំ ចំពោះលោកគ្រូអាចារ្យ ហែម ចៀវ ធ្វើឱ្យទឹកភ្នែកខ្ញុំផុសផុរឡើងរលេងរលោងឥតដឹងខ្លួនតែម្ដង។ ខ្ញុំរលះរលាំងទៅពេទ្យសួរលោក នួន ឌួង ។ លោក នួន ឌួង ក៏ខ្សឹកខ្សួលអួលដើមកនិយាយថា លោកអាចារ្យ ហែម ចៀវ ខូចពីថ្ងៃម្សិលមិញទៅហើយ ហើយពួកពេទ្យ ក៏ជួយយកចិត្តទុកដាក់ណាស់ដែរ គេជួយរុំសពនឹងកន្ទេលមួយ ហើយរុំក្រមាស្អាតបាតមានខ្សែចងត្រឹមត្រូវ ហើយគេ យកសពនោះដាក់រទេះរុញមួយយកទីបញ្ចុះបាត់ទៅហើយ ។

ខ្ញុំមានកិរិយាធេងធោងដោយទម្ងន់ទុក្ខបានងើបទៅជួបការប៉ូរាល់ពេត្យនោះ ដើម្បីឱ្យគេជូនទៅមើលផ្នូរលោកគ្រូដ៏កំសត់នេះ។

លោកកាប៉ូរាល់នោះ ក៏ប្រញាប់ជូនទៅមើលកន្លែងបញ្ចុះសបនោះ ។ ផ្នូរនោះ គឺនៅលើភ្នំខ្សាច់ក្នុងចំណោមផ្នូររាប់ពាន់ឯទៀត ។ នៅមុខផ្នូរទុតតនោះ មានផ្លាកក្ដារតូចមួយសរសេរលេខ ១១១៣។ លោកការប៉ូរាល់បញ្ជាក់ប្រាប់ខ្ញុំថា គេគោរពតាមបណ្ដាំខ្ញុំទាំងអស់ គេកប់សពនេះដាច់តែឯងមិនលាយឡំនឹងសពឯទៀតទេ ។

ខ្ញុំឈរទ្រឹងសំឡឹងផ្នូរលោកទង្គឹះខ្សឹកខ្សួលរួចងើបមើលទៅនាយ ដើម្បីឱ្យខ្សែខ្យល់ដែលបក់មកពីសមុទ្រផាត់មកលើមុខខ្ញុំជួយលុបលាងទឹកភ្នែកដែលបានរអិលចុះ...។

កន្លងបានពីរបីថ្ងៃក្រោយមក ខ្ញុំក៏បាននាំអ្នកទោសទៅកន្លែងខ្ញុំបីនាក់ឱ្យជួយយកដុំថ្មធំៗល្មមដាក់នៅលើផ្នូរនោះ បានប្រមាណជា២០ដុំជាគ្រឿងចំណាំទីនោះតទៅ ។

អស់លោកអ្នកទាំងឡាយមកដល់ទំព័រនេះ ខ្ញុំយល់ថា អស់លោកអ្នកពិតជាមានមនោសញ្ចេតនាក្ដុកក្ដួលរំជួយចិត្តអាណិតលោកគ្រូ ហែម ចៀវ មិនខានសោះឡើយ ដែលលោកស្លាប់ចោលឆ្អឹងនៅលើកោះនោះ ដ៏សែនឆ្ងាយលន្លង់លន្លោចយ៉ាងនេះ ។ លោកស្លាប់ព្រោះរឿងជាតិខ្មែរ សាសនា និងរដ្ឋខ្មែរ តែម្យ៉ាងប៉ុណ្ណោះ លោកស្លាប់ដោយឯកា គ្មានញាតិ គ្មានបងប្អូន មានតែលោក នួន ឌួង ជាមិត្តប៉ុណ្ណោះ ។

គួរខ្លោចចិត្តណាស់ លោក នួន ឌួង ថា លោកគ្រូនេះ ត្រូវស្លាប់នៅលើភ្លៅគាត់ដែលឈឺដូចគ្នា។

លោក នួន ឌួង ថា គាត់បានជួយច្របាច់រឹតជូនលោករហូតដល់ទីបំផុត លោកបានយកក្បាលលោកមកកើយភ្លៅគាត់ រួចក៏ផុតដង្ហើមទៅ...។

លោកអាចារ្យ ហែម ចៀវ កើតនៅថ្ងៃអង្គារ ខែមាឃ ឆ្នាំច គ.ស. ១៨៩៧ ។

លោកទទួលគ្រោះថ្នាក់ក្នុងជន្មាយុ៤៦ឆ្នាំនៅចុងឆ្នាំ១៩៤៣ ថ្ងៃខែខ្ញុំពុំបានចាំប្រាកដ។

លោកអាចារ្យ ហែម ចៀវ មានស្មារតីរឹងណាស់ មុននឹងស្លាប់លោកបាននិយាយនឹងលោក នួន ឌួង ថា :

ខ្ញុំមិនខ្លាចសេចក្ដីស្លាប់ទេ តែខ្ញុំនឹកស្ដាយត្រង់មិនបានឃើញប្រទេសកម្ពុជាបានឯករាជ្យតែប៉ុណ្ណោះ។

នេះជាសំដីវីរបុរសនេះ ជាគតិពេចន៍នៃអ្នកតស៊ូដ៏គួរឱ្យគោរព និងលើកតម្កើង៕

**ឃីង ហុកឌី**

តមកពីទំព័រទី ១៣

## អភិបាល ផាទ្រិក ទទួលភ្ញៀវក្នុង...

ដាក់ពន្ធនាគារដល់ទណ្ឌិតដដែល។ ហើយកិច្ចពិភាក្សាក៏មានផ្តោតទៅលើកិច្ចព្រមព្រៀងស្តីពីវិស័យអន្តោប្រវេសន៍មានជាអាទិ៍ ឌ្រីមអាក់ធ៍ (Dream Act) និងការជជែកតទល់គ្នាត្រង់ចំណុចគាំទ្រ និងបដិសេធន៍ទៅលើគម្រោងដែលផ្តល់អត្តសញ្ញាណប័ណ្ណមួយជាក់លាក់ដល់ជនជាប់ចោទ និងជនអន្តោប្រវេសន៍ដែលមិនមានក្រដាសស្នាម។

សូមស្វែងយល់ព័ត៌មានពិស្តារក្នុងអត្ថបទទាំងមូលជាភាសាអង់គ្លេស៕



Continued from page 09

## Governor Patrick hosts Ethnic

Citing his support for policies such as the DREAM Act an d in-state tuition benefits, "I think all of you are going to probably write my legacy. I've tried my best to make this a welcoming environment for people who are not originally from here."

In reflecting on Patrick's term in office, Josiane Martinez, Executive Director of the Office for Immigrants and Refugees said, "The Commonwealth right now is more inclusive, more accessible, and more sensitive of the immigrants and the refugee community."

jamesostis@khmerpost.us

Continued from page 13

## Royalists Question Wisdom

party in last year's election, said the party would be watching the Prince's new royalist party.

"Prince Ranariddh has come and go so many times," Mr. PuthRasmey said. "Frankly, he is hard to predict, so I want to wait six months or a year to see how serious Prince Ranariddh is, or whether he has just come to make some noise."

"We will see if he is serious [enough] to lead Funcinpec."

Nhek Bun Chhay, who as a deputy prime minister in the current government is the last serving Funcinpec member to hold public office, said the Prince's decision to create a new party belied his stated intention to help unite the country.

"The Prince himself is in the royal family, in which he is the brother and Princess Arunrasmy is the sister," General Bun Chhay said. "Can they unite? And if not, how can he unite others?"

Prince Ranariddh has not responded to requests for comment on his decision to create a new royalist party.

Prince SisowathThomico, a founding member of Funcinpec, who defected to the opposition CNRP last year, said that the time for royalist politics in Cambodia had come and passed.

"There's no place for royalist politics in Cambodia anymore," Prince Thomico said. "It's a bi-polar world now in Cambodia, between the politics of the CPP and the CNRP."

# CLASSIFIED ADS



រឿងរាមកេរ្តិ៍ ដោយសាគូ សាមុត
តម្លៃ $10



របាំបុរាណខ្មែរ ដោយសាគូ សាមុត
តម្លៃ $10



រឿងរាមកេរ្តិ៍ ដោយសាគូ សាមុត
តម្លៃ $10



ក្រុងភ្នំពេញមុនឆ្នាំ១៩៥៤
តម្លៃ $10



CAMBODGE
តម្លៃ $5



អង្គការជានរណា?
បភាគ តម្លៃ $5/1

| Name | Phone # |
|---|---|
| Shipping Address | Email |
| City, State, Zip | Book Title(s) |

## BOOK ORDER FORM

Checks or Money Order Payable to KhmerPost USA, LLC
អាចទិញនៅអាសយដ្ឋាន៖ 45 Merrimack St., Suite 218A, Lowell, MA 01852



## Help Wanted
**Pailin Dental Center:**
**Chien Yu Hsu D. M.D, M.A.C.D**

ដំណឹងជ្រើសរើសបុគ្គលិក
ទន្តបណ្ឌិត និងមន្ទីរពេទ្យធ្មេញយើងខ្ញុំត្រូវការ
ជ្រើសរើសបុគ្គលិកដូចខាងក្រោម៖

- Front Desk
- Dental Assistant
Khmer/English

ផ្តល់ជូនតម្លៃម៉ោង $10/h
Tel: 978-453-7800

## "Help Wanted
ដំណឹងជ្រើសរើសបុគ្គលិក

Dianna's Hair Salon and Spa is seeking an experience Nail Technician withexperiences of pedicure, manicure, and nail callus.

ដាយអាណា សាឡន និងស្ប៉ា ត្រូវការជាងធ្វើក្រចកមានបទពិសោធន៍ទាំងលាប និងម្សៅ
Compensation is communication or salary.

ប្រាក់ខែអាចចរចាបាន
Please call Dianna at 978-495-6652 for interview"
សូមទូរស័ព្ទ 978 495 6652 ដាយអាណាដើម្បីសម្ភាសន៍

# NOTICE OF PUBLIC MEETING

The Northern Middlesex Metropolitan Planning Organization (NMMPO) will meet Thursday March 13th, 2014 at 3:00 P.M. Proposed draft amendments to the FFY 2014-2017 Transportation Improvement Program (TIP) will be discussed, as will the development process for the FFY 2015-2018 TIP and FFY 2015 Unified Planning Work Program (UPWP). The meeting will be held at the Northern Middlesex Council of Governments office, 40 Church Street, Suite 200, Lowell, MA. Please note that the TIP contains the program of projects for the Lowell Regional Transit Authority (LRTA). The MPO's public participation process satisfies the LRTA's public participation requirements for the program of projects.

**Notice:** This location is accessible to people with disabilities and is near public transportation. NMCOG offers secure bicycle parking on the second floor. The NMMPO provides reasonable accommodations and/or language assistance free of charge upon request (including but not limited to interpreters in American Sign Language and languages other than English, open or closed captioning for videos, assistive listening devices and alternate material formats), as available. For accommodation or language assistance, please contact Justin Howard at (978) 454-8021, ext 21 or at jhoward@nmcog.org . Requests should be made as soon as possible for services requiring advanced arrangements, including sign-language, CART or language translation or interpretation.

# សេចក្តីជូនដំណឹង កិច្ចប្រជុំជាសាធារណៈ

អង្គការរៀបចំគម្រោងនៃក្រុងធំៗក្នុងខ័ណ្ឌមីដដលស៊ិកខាងជើង ហៅកាត់ថា អ៊ិន អ៊ឹម អ៊ឹម ភី អូ (NMMPO) នឹងបើកកិច្ចប្រជុំពិភាក្សាជាសាធារណៈដែលនឹងធ្វើឡើងនៅថ្ងៃទី១៣ មិនា ឆ្នាំ២០១៤ វេលាម៉ោង ៣រសៀល។ កិច្ចប្រជុំនឹងពិភាក្សាទៅលើសេចក្តីព្រៀងវិសោធនកម្ម(កែប្រែ) ដើម្បីអភិវឌ្ឍវិស័យមធ្យោបាយធ្វើដំណើរសាធារណៈ ហៅកាត់ថា ធីប(ទីភ) សម្រាប់ឆ្នាំ ២០១៤ ដល់ឆ្នាំ២០១៧ ដូចគ្នាទៅនឹងគម្រោងអភិវឌ្ឍសម្រាប់ឆ្នាំ២០១៥ ដល់ឆ្នាំ២០១៨ និងគម្រោងការងារក្នុងប្រព័ន្ធតែមួយហៅកាត់ថា យូ ភី ដាប់បលយូ ភី (UPWP) សម្រាប់ឆ្នាំ២០១៥។ ទីកន្លែងនៃកិច្ចប្រជុំធ្វើនៅការិយាល័យរដ្ឋាភិបាលក្នុងខណ្ឌមីដដលសិកខាងជើងផ្លូវ៤០ ឆឺចស្រ្ទីត ស៊ុតលេខ២០០ ក្រុងឡូវែលរដ្ឋម៉ាសាឈូសេត (៤0 Church Street, Suite 200, Lowell, MA)។ សូមចំណាំថា កម្មវិធីធីប (TIP) មានគម្រោងដែលទាក់ទៅនឹងសេវាមធ្យោបាយធ្វើដំណើរសាធរណៈនៃមន្ទីរទូរគមនាគមន៍ប្រចាំតំបន់ឡូវែលហៅកាត់ថា អិល អ័រ ធី អេ (LRTA)។ ការចូលរួមជាសាធារណៈនៃកិច្ចប្រជុំខាងលើជាបច្ច័យជំរុញគម្រោងមធ្យោបាយធ្វើដំណើរសាធាៈឱ្យបានដល់ការពេញចិត្តពីកម្មវិធីនេះ៕

**ចំណាំៈ** ទីកន្លែងនៃកិច្ចប្រជុំខាងលើផ្តល់ដល់អ្នកចូលរួមដែលមិនចេះភាសាអង់គ្លេស និងជនពិការ ហើយមានទីតាំងងាយទៅដល់ ព្រោះនៅក្បែរមធ្យោបាយធ្វើដំណើរសាធារណៈ។ អិន អឹម ស៊ី អូ ជី ផ្តល់ជូនទូវការចតទោចក្រយាន្តនៅជាន់ទីពីរប្រកបដោយសុវត្ថិភាព ។ លោកអ្នកអាចទទួលបានទីកន្លែងស្នាក់នៅ និងការបកប្រែភាសាដោយគិតថ្លៃ (ទាំងភាសាកាយវិកា និងសម្លេង ការថតរូប និងវីដេអូប្រដាប់ជំនួយសម្លេងស្តាប់ការប្រជុំ និងឧបករណ៍ជំនួយក្នុងទម្រង់ផ្សេងៗទៀត) តាមរយៈការស្នើរសុំពេលចូលរួមកិច្ចប្រជុំខាងលើ។

សម្រាប់ការស្នើរសុំទីកន្លែងស្នាក់នៅ និងសេវាបកប្រែភាសាពេលចូលរួមកិច្ចប្រជុំ សូមទាក់ទង ចឹសស្ទីន ហូវឹដ តាមរយៈលេខទូរស័ព្ទ ៩៧៨-៤៥៤ -៨០២១ បន្តចុចលេខ២១ ឬអាច អ៊ីម៉ែល jhoward @nmcog.org ។ ការស្នើរសុំជំនួយបកប្រែភាសាកាយវិកា និងភាសានិយាយ គួរតែធ្វើឡើងឱ្យលឿនបំផុតតាមដែលអាចធ្វើបាន ដើម្បីឱ្យបុគ្គលិកដែលទទួលបន្ទុកអាចរៀបចំឱ្យបានទាន់ពេលវេលា៕

## តមកពីទំព័រទី ០២ ដំណើរទៅ"ឡុងប៊ិច"ក្រុងដែលមាន...

ដែលមិនបានការគាំទ្រលើសពី៥០ភាគរយ ពីព្រោះអ្នកដឹកនាំសមាគមនេះមិនបានយកអ្នកឡុងប៊ិចជាគំរូនៃសង្គមដែលត្រូវលើកដំកើងទេ បែរជាយកមន្ត្រីពុករលួយពីភ្នំពេញមកបង្ហាញទៅវិញហេតុនេះហើយបានជាគេមិនចូលចិត្តនោះ"ដំណឹងនេះក៏សមរម្យដែរ ខ្ញុំនឹកឃើញថាធ្លាប់បានទទួលព័ត៌មានពីទំនាស់នេះតាំងពីឆ្នាំទី១មកដែរ ជាមួយនឹងបាតុកម្មប្រឆាំងការអញ្ជើញលោកឧបនាយករដ្ឋមន្ត្រី សុខ អាន មកជាអធិបតីនៃពិធីបុណ្យចូលឆ្នាំខ្មែរនៅឡុងប៊ិច ជាហេតុធ្វើឱ្យមានការល្អក់ពណ៌ដល់"ជោគជ័យដ៏ត្រចះត្រចង់របស់ពលរដ្ឋដែលកំពុងងើបពីភក់" ។ យោងទៅតាមសមត្ថភាពតតាំងគ្នាតាមគំរូប្រទេសប្រជាធិបតេយ្យការពិន័យរបស់ពលរដ្ឋពេលនេះ នឹងត្រូវចប់នៅពេលណាថ្នាក់ដឹកនាំក្រុងខ្មែរស្តាប់ឮហើយប្តូរយោបល់ជាមួយប្រជាពលរដ្ឋតូចតាចរបស់ខ្លួនឱ្យកាន់តែច្រើនអភិវឌ្ឍន៍នឹងបន្តឡើងវិញយ៉ាងលឿន។

នៅប៉ុន្មានកន្លះម៉ោងពីក្រុងខ្មែរនេះ នៅ "សាន់តាអាណា"មានក្រុងមួយទៀតដែលគួរទៅមើលដែរ គឺ "លីធីលសាយហ្គន Little Saigon" ដែលជាទីប្រជុំពាណិជ្ជកររៀតណាមដ៏ធំច្រើនជងជាងក្រុងខ្មែរ មានឥវ៉ាន់ប្លែកៗលក់ជាច្រើនខ្មែរយើងក៏ចូលចិត្តទៅទិញឥវ៉ាន់ ម្ហូបអាហារកែសម្ផស្សមុខមាត់ ហើយក៏មានចិនឬ ខ្មែរក្រោមក៏ទៅរកស៊ីនៅទីនោះដែរ។

យើងបានចូលទៅទីស្នាក់ការ"មាតុភូមិ"នៅផ្លូវ "អាណាហែមនេះដែរ"កន្លែងដែលខ្មែរប៉ុស្តិ៍បានចាប់កំណើតដំបូងបង្អស់ឆ្មេរខាងលិចនឹងឆ្មេរខាងកើតរួមរួមគ្នានាឆ្នាំ២០០៧ ឥឡូវ"មាតុភូមិ" នៅតែជាមណ្ឌលវប្បធម៌ដែលមានឯកសារសរសេរឯកសារសម្លេងនឹងរូបភាពជាច្រើនពីកម្ពុជា។

ក្រៅពីក្រុងខ្មែរ ក្រុងវៀតណាម ក្រុងឥណ្ឌាដែលនៅជិតៗគ្នាប្រជាពលរដ្ឋបានថ្វូរពីការកកើតវត្តប្រមាណជា១០ នៅកំប៉េតកំប៉ូតជុំវិញឡុងប៊ិចបុណ្យក៏ច្រើនរឿងរ៉ាវក៏ច្រើន...តែវត្តដ៏ធំជាងគេមានតែ១ គឺ"វត្តត្រៃកូដ"ដែលព្រះតេជគុណ គង់ សុផាន ចៅអធិការវត្តកំពុងក៏សាងព្រះវិហារថ្មីស្រឡាងក្នុងតម្លៃច្រើនលានដុល្លា ៕

**(នៅមានត)**

LitSaigon

## តមកពីទំព័រទី ១៤ អ្នកស្រី លីដា សុភាព ស៊ូថ្លែងសុន្ទរកថា...

ស៊ូបម្រើការជានាយកប្រតិបត្តិនៃក្រុមរបាំអង្គរ និងជានាយកសម្រាប់មជ្ឈមណ្ឌលសុខភាពយុវជន ដើម្បីជួយកំណែទម្រង់ទិសយុវជនឱ្យប្រសើរឡើងក្នុងនោះអ្នកស្រីក៏ឆ្លៀតឱកាសថ្លែងអំណរគុណឪពុកម្តាយអ្នកស្រីដែលបានធ្វើជាគ្រូបង្គោលសម្រាប់អ្នកស្រីកន្លងមក។

សំខាន់ជាងនេះ កម្មវិធីចោទលើមានការចូលរួមពីប្រព័ន្ធ ទីគី សុងហ្គាស តណាងរាស្ត្រអែលីន ដូ ណាហ៊ូ និងការបញ្ចាំងវីដេអូពិសេសពីសំណាក់សភាអាមេរិកអេលីហ្សាបែិតវ៉ែរនផងដែរ។ ម្យ៉ាងទៀតក៏មានការដាក់បញ្ចាំងកុនចំណងជើង "ព្រោះតែនាង"ដែលចេនខាល់វីនទទួលបានរង្វាន់។ សប្តាហ៍ស្ត្រីស្រ្តី គឺធ្វើឡើងនៅខែមីនារៀងរាល់ឆ្នាំ ហើយឆ្នាំក្រោយកម្មវិធីនេះចូលដល់ខួបគម្រប់២០ឆ្នាំ ៕

តមកទំព័រទី ៧

## កិច្ចប្រជុំពិភាក្សាអំព...

ជំនួយជាទឹកប្រាក់២៥០លានដុល្លារក្នុង១ឆ្នាំសម្រាប់សេវាបម្រើមនុស្សចាស់តាមរយៈភ្នាក់ងារដែលជួយមនុស្សចាស់ឱ្យបានរស់នៅក្នុងផ្ទះដោយមិនបាច់ត្រូវបានគេបញ្ជូនទៅមជ្ឈមណ្ឌលថែទាំនៅខាងក្រៅ ។

សភាតំណាងរដ្ឋបៀលីរីកា ឡិកហ្សិតុន និងអាលីងតុន ឈ្មោះថា ខេន ដូណែល បានមានប្រសាសន៍ថា ការអនុម័តថវិការដ្ឋអភិវឌ្ឍមធ្យោបាយធ្វើដំណើរសាធារណៈមានសារសំខាន់ក្នុងការអភិវឌ្ឍន៍សេដ្ឋកិច្ច ។ លោកបានលើកឡើងថា លោកវិនិយោគត្រូវជាប់គាំងក្នុងចរាចរពួកគេ និងមានអារម្មណ៍មិនល្អឡើយ ក្នុងការធ្វើការ ។ ដូចនេះចរាចរណ៍រលូនជាចំណែកជួយអភិវឌ្ឍន៍សម្រួលលំបាកផ្នែកជំនួញ ។ លោកក៏បានមានប្រសាសន៍បន្ថែមទៀតថា ថវិកាមួយភាគទៀត គួរតែត្រូវបានអនុម័តឱ្យដល់មហាវិទ្យាល័យក្នុងសហគមន៍ និងវិទ្យាល័យដែលផ្តល់វគ្គបណ្តុះបណ្តាល ខ្លីៗដល់អ្នកធ្វើការអំពីបច្ចេកវិទ្យាថ្មីៗដើម្បីឱ្យអ្នកធ្វើការទាំងនោះមានជំនាញឆ្លើយតបនឹងទីផ្សារ និងសេចក្តីត្រូវការរបស់និយោគជក ។

វាគ្មិនចុងក្រោយអ្នកតំណាងរដ្ឋថមហ្គោលដិនដែលតំណាងឱ្យឡូវែលផ្នែកសិនត្រល និងធីធ័ខេត និងផ្នែកនៃតំបន់ឆឹមស្វដ ។ លោកបានមានប្រសាសន៍កិច្ចការដ៏សំខាន់របស់លោក គឺស្តាប់យោបល់ប្រជាជនទាំងអស់មានអ្នកធ្វើការ,យុវជនវ័យក្មេង,មនុស្សចាស់គ្រប់គ្នា ។ មានតែការស្វែងយល់ពីបញ្ហារបស់មនុស្សគ្រប់គ្នាទើបអង្គនីតិបញ្ញត្តិអាចយល់ពីច្បាប់ដែលគួរអនុម័ត និងចាំបាច់ ៕

**សមាពាណិជ្ជកម្ម**

សភាពាណិជ្ជកម្មឡូវែលមានទីស្នាក់ការនៅផ្លូវ 131 Merrimack Street ក្នុងក្រុងឡូវែល ។ សភាពាណិជ្ជកម្មផ្តល់ដល់សមាជិករបស់ខ្លួននូវប្រភពព័តិមានទំនាក់ទំនង និងឱកាសទីផ្សារ ។ សម្រាប់ព័តិមានបន្ថែម

សូមចូលកាន់ហេទំព័រសភាពាណិជ្ជកម្ម

http://greaterlowell.cc.org

Continued from page 12

## Gareth Evans Calls for...

"At the time, I wanted to believe that these reverses would be temporary, and there were too many like me," Mr. Evans writes.

"Since then, while preserving a democratic facade, Hun Sen has ruled, for all practical purposes, as an autocrat, showing scant regard for rights of free expression and association-and resorting to violent repression whenever he has deemed it necessary to preserve his and his party's position."

"For far too long, Hun Sen and his colleagues have been getting away with violence, human-rights abuses, corruption, and media and electoral manipulation without serious internal or external challenge."

In his article, Mr. Evans also describes as "plausible" an accusation that more than 20 of Mr. Hun Sen's closest associates have "each amassed more than $1 billion through misappropriation of state assets."

"I know Hun Sen and worked well with him in the past. I have resisted strong public criticism until now, because I thought there was hope for both him and his government," Mr. Evans writes.

"But their behavior has now moved beyond the civilized pale. It is time for Cambodia's political leaders to be named, shamed, investigated, and sanctioned by the international community," he concludes.

Mr. Hun Sen and Mr. Evans last met publicly in September 2010, when the pair appeared with Prince NorodomSirivudh and Australian-born Cambodia historian Milton Osborne on a panel at a University of Melbourne retrospective in Phnom Penh. At the event, the pair praised each other for helping to promote peace and stability in Cambodia.

"I would like to extend a particularly heartfelt welcome back to Cambodia to the honorable professor Gareth Evans… for his personal role and great contribution to Cambodia's national reconciliation and reconstruction," Mr. Hun Sen said at the conference.

In response to the prime minister's praise, Mr. Evans said that while there had been "serious bumps along the way" in Cambodian democracy since 1993, the country had prospered under the leadership of Mr. Hun Sen.

"It is important-and accurate-to see the glass as half-full rather than half-empty," he said at the time, praising the vibrancy of Phnom Penh and economic growth in the country since 1993.

"[It] is a great credit to Prime Minister Hun Sen and his team…who obviously have an intense commitment to the future of Cambodia, and the majority of Cambodians strongly behind them," he continued.

Mr. Evans also calls in his article for Julie Bishop, the current Australian foreign minister who visited Phnom Penh last week, to drop "quiet diplomacy" and pick up a "loud megaphone" in her dealings with Cambodia.

Contacted for further comment Thursday, Mr. Evans said he hoped his criticism would give the government pause.

"It may be that my voice this time around will make the government realize it fundamentally has to change its behavior or there will be nothing left of Cambodia's reputation and credibility," he said.

Mr. Vun, the CPP lawmaker who described Mr. Evans as "the father of Cambodia" and who also served as Cambodia's ambassador to Australia, on Thursday said little about Mr. Evans' scathing comments directed at his party and the government.

"Gareth's words do not give me a headache," Mr. Vun said.

Mr. Evans, who served as Australian foreign minister between September 1988 and March 1996 and later became president of the respected International Crisis Group think tank, proposed the idea of a U.N.-administered reunification of Cambodia to the Australian Senate in November 1989.

The idea was almost immediately met with positive, if wary, reactions from the Vietnamese Foreign Ministry and Cambodia's resistance forces on the Thai border, who in July 1988 had held their first meeting on possible peace in Cambodia after almost 10 years of war.

# តួអក្សរខ្មែរផ្ទៀបនឹង រូបតួអង្គរឿងរាមកេរ្តិ៍

គំនូរតួអង្គនៃរឿងរាមកេរ្តិ៍ គូរនៅឆ្នាំ១៩៣៥
គូរដោយជាងតឹក ជាងព្រះរាជបណ្ណាល័យ
ចំណងជើងដោយព្រះមហាពិទូរក្រសេម































## តមកពីទំព័រទី ១៣ ម្ភៃឆ្នាំក្រោយមក អ៊ីវ៉ាន អំពាវនាវឱ្យ...

នៅក្នុងអត្ថបទរបស់លោក អ៊ីវ៉ាន ក៏បានស្នើសុំឱ្យលោកស្រី ជូលី ប៊ីសប់ រដ្ឋមន្ត្រីក្រសួងការបរទេសអូស្ត្រាលីបច្ចុប្បន្នដែលមកបំពេញទស្សនកិច្ចនៅទីក្រុងភ្នំពេញកាលពីសប្តាហ៍មុនកាត់បន្ថយទំនាក់ទំនងការទូតស្វាត់ៗ និងចាត់វិធានការឱ្យបានខ្លាំងក្លា ចំពោះការដោះស្រាយជាមួយប្រទេសកម្ពុជា។

នៅពេលទាក់ទងសុំការអត្ថាធិប្បាយបន្ថែមកាលពីម្សិលមិញលោក អ៊ីវ៉ាន បាន មានប្រសាសន៍ថា លោកសង្ឃឹមថា ការរិះគន់របស់លោកនឹងជួយឱ្យរដ្ឋាភិបាលពិចារណាពីអ្វីដែលខ្លួនកំពុងធ្វើ។

លោកបានមានប្រសាសន៍ថា "សំឡេងរបស់ខ្ញុំនៅពេលនេះនឹងធ្វើឱ្យរដ្ឋាភិបាលដឹងថា រដ្ឋាភិបាលត្រូវផ្លាស់ប្តូរឥរិយាបថរបស់ខ្លួនជាមូលដ្ឋាន បើមិនដូច្នោះទេ កិត្តិយស និងកេរ្តិ៍ឈ្មោះកម្ពុជានឹងគ្មានទៀតទេ"។

លោក ឈាង វ៉ុន សមាជិកសភាមកពីគណបក្សប្រជាជនកម្ពុជាដែលបានចាត់ទុកលោក អ៊ីវ៉ាន ថាជាបិតានៃប្រទេសកម្ពុជា និងដែលធ្លាប់ធ្វើជាឯកអគ្គរាជទូតកម្ពុជាប្រចាំប្រទេសអូស្ត្រាលីបានមានប្រសាសន៍កាលពីម្សិលមិញតិចតួចអំពីសម្តីរិះគន់របស់លោក អ៊ីវ៉ាន ទៅលើគណបក្ស និងរដ្ឋាភិបាលរបស់លោក ហ៊ុន សែន ។ លោក ឈាង វ៉ុន បានមានប្រសាសន៍ថា "លោក អ៊ីវ៉ាន មិនធ្វើឱ្យខ្ញុំឈឺក្បាលទេ"។

លោក អ៊ីវ៉ាន ដែលធ្លាប់ធ្វើជារដ្ឋមន្ត្រីក្រសួងការបរទេស អូស្ត្រាលី ចន្លោះពីខែកញ្ញា ឆ្នាំ១៩៨៨ ដល់ខែមីនាឆ្នាំ១៩៩៦ និងក្រោយមកបានធ្វើជាប្រធានក្រុមអ្នកពិគ្រោះយោបល់ដែលគួរឱ្យគោរពនៅក្រុមការងារដោះស្រាយវិបត្តិអន្តរជាតិនោះបានលើកឡើងជាគំនិតឱ្យប្រទេសកម្ពុជាមានការរួបរួមគ្នាឡើងវិញក្រោមការគ្រប់គ្រងរបស់អង្គការសហប្រជាជាតិទៅព្រឹទ្ធសភាអូស្ត្រាលីកាលពីខែវិច្ឆិកា ឆ្នាំ១៩៨៩។

គំនិតនេះស្ទើរតែទទួលបានការឆ្លើយតបវិជ្ជមានភ្លាមៗពីក្រសួងការបរទេសវៀតណាម និងកងកម្លាំងកម្ពុជាដែលតស៊ូនៅតាមព្រំដែនថៃ ហើយកាលពីខែកក្កដា ឆ្នាំ១៩៨៨ ពួកគេបានបើកិច្ចប្រជុំជាលើកដំបូងរបស់ខ្លួនអំពីសន្តិភាពនៅប្រទេសកម្ពុជាបន្ទាប់ពីមានសង្គ្រាមជិត១០ឆ្នាំ ៕

**គីមហឿន**

# ប្រភេទអាហារជួយស្ត្រីមានផ្ទៃពោះ



មិនថាអ្នកកំពុងមានផ្ទៃពោះ ឬមានគម្រោងយកកូននោះទេ ស្ត្រីជាម្តាយត្រូវដឹងថា អាស៊ីដហ្វូលីដ Folic គឺជាអាហារដែលមានសារសំខាន់បំផុតនៅក្នុងរបបអាហាររបស់អ្នកសម្រាប់ជួយដល់ការលូតលាស់របស់ទារកនៅក្នុងផ្ទៃ ។ ម្យ៉ាងទៀតវាមានប្រសិទ្ធភាពកាត់បន្ថយការខូចទ្រង់ទ្រាយនៃខួរក្បាល និងខួរឆ្អឹងខ្នងពីកំណើតរបស់ទារកផងដែរ ។ ហេតុដូច្នេះស្ត្រីមានផ្ទៃពោះចាំបាច់ត្រូវទទួលទានសារធាតុ អាស៊ីត Folic ឱ្យបានច្រើនរាល់ថ្ងៃដែលមានដូចខាងក្រោមនេះ ។

- **ស្លឹកផ្ទី :** បន្លែប្រភេទនេះសម្បូរទៅដោយជីវជាតិ និងសារធាតុអាស៊ីដ Folic ។ ស្លឹកផ្ទីបរិមាណ២ពែង មានផ្ទុកសារធាតុ អាស៊ីដ Folic ២១៨មីក្រូក្រាម ។

-**ក្រូចពោធិ៍សាត់ :** ផ្លែក្រូចពោធិ៍សាត់មានសារធាតុអាស៊ីត Folic ៥៥មីក្រូក្រាម ហើយទឹកក្រូចពោធិ៍សាត់មួយកែវ មានផ្ទុកនូវអាស៊ីដ Folic ៧៥មីក្រូក្រាម ។ ក្រូចពោធិ៍សាត់គឺជាអាហារសម្បូរទៅដោយសារធាតុអាស៊ីត Folic ។

- **សណ្តែកក្រហម :** សណ្តែកក្រហមអាចដាក់បន្ថែមយ៉ាងស្រួលទៅក្នុងប្រភេទអាហារផ្សេងៗ ហើយវាមានផ្ទុកនូវសារធាតុអាស៊ីដ Folic១១៥មីក្រូក្រាម ក្នុងបរិមាណសណ្តែកក្រហមស្ងោរកន្លះពែង ។

-**គ្រាប់ឈូករ័ត្ន :** គ្រាប់ឈូករ័ត្នមួយក្តាប់មានផ្ទុកនូវសារធាតុ អាស៊ីដ Folic ៨២ មីក្រូក្រាម ។ ក្រៅពីសារធាតុអាស៊ីដ Folic គ្រាប់ ផ្កាឈូករ័ត្ន មានផ្ទុកនូវជាតិដែក និងសារធាតុកាល់ស្យូម ។

- **ទឹកប៉េងប៉ោះ :** ទឹកប៉េងប៉ោះមានផ្ទុកកម្រិតជាតិស្ករច្រើនជាងប្រភេទទឹកផ្លែឈើដទៃទៀត ហើយវាអាចផ្តល់ឱ្យរាងកាយរបស់អ្នកនូវសារធាតុអាស៊ីតហ្វូលីក៤៨ មីក្រូក្រាមក្នុងមួយកែវ ។ លើសពីនេះទៅទៀតជីវជាតិ C ពីប៉េងប៉ោះនឹង ជួយរាងកាយក្នុងការស្រូបយកជាតិដែក ៕



## ផ្លែទទឹមជួយបំបាត់រោគសញ្ញារាំងរដូវរបស់ស្ត្រីបាន

រាងកាយរបស់ស្ត្រីនឹងផលិតអ័រម៉ូនអេស្ត្រូជែនដោយធម្មជាតិពេញមួយជីវិតរហូតដល់ពួកគេស្ថិតក្នុងស្ថានភាពត្រៀមរាំងរដូវ ព្រោះពេលនោះការផលិតរបស់អ័រម៉ូនអេស្ត្រូជែននឹងថយចុះវិញ។ ទោះបីជាយ៉ាងណាក៏ដោយនៅពេលការរាំងរដូវកើតមានហើយ រាងកាយនឹងឈប់ផលិតអ័រម៉ូនមួយនេះតែម្តង។ ដូច្នេះហេតុអ្វីរឿងនេះធ្វើអោយប្រឈមមុខ អ័រម៉ូនអេស្ត្រូជែនជួយអោយឆ្អឹងមានសុខភាពល្អ។ បើសិនជាគ្មានវាទេ កំហាប់ឆ្អឹងនឹងបាត់បង់។ ការទទួលទានទឹកផ្លែទទឹមសម្រាប់ព្យាបាលអាការៈរាំងរដូវ និងបាត់បង់កំហាប់ឆ្អឹង គឺជាគំនិតមួយដ៏ល្អបំផុត ព្រោះទឹកផ្លែឈើមួយនេះផ្ទុកទៅដោយអ័រម៉ូនអេស្ត្រូជែនក្នុងទម្រង់ធម្មជាតិមួយហៅថា Estrone។ តាមរយៈការទទួលទានទឹកផ្លែទទឹមរាល់ថ្ងៃរាងកាយនឹងទទួលបានទម្រង់អ័រម៉ូនមួយប្រភេទនេះជាមួយនឹងអង់ទីអុកស៊ីដង់ដ៏ខ្លាំងក្លាដែរ។ ការបាត់បង់កំហាប់ឆ្អឹងហាក់បីដូចជាត្រូវបានទប់ស្កាត់តាមរយៈការទទួលទានទឹកផ្លែទទឹម។ អាការៈក្តៅពេញខ្លួនក៏ត្រូវបានកាត់បន្ថយដែរ៕



# ជោគជតារាសីលោកអ្នក ទាំង១២ប្រចាំឆ្នាំរោង

## ឆ្នាំជូត 

រាល់កិច្ចការដែលលោកអ្នកប៉ងប្រាថ្នា ជាយូរមក ហើយនោះក្នុងរយៈពេលនេះ គឺបានសមដូចបំណង ហើយគ្មានអ្វីមករារាំងនោះទេ ហើយរាល់ការប៉ងយាយីពីមនុស្សដែលមានបំណងមិនល្អមកលើលោកអ្នកនោះក៏មិនបានសម្រេចដែរ ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញអាចពង្រីកអាជីវកម្មឱ្យធំបន្ថែមទៀតបាន ។ ឯបញ្ហាស្នេហាគូស្វាមីភរិយាមានភាពសុខដុមរមនាគ្មានផលរមាស់អ្វីឡើយ ៕

## ឆ្នាំឆ្លូវ 

ក្នុងរយៈពេលនេះលោកអ្នកជួបនឹងបញ្ហាខាងផ្លូវចិត្តមិនសូវជាសប្បាយរីករាយប៉ុន្មាននោះទេ តែប្រសិនបើចង់ទទួលផលពីការងារនោះ ចូរធ្វើចិត្តឱ្យត្រជាក់ ទើបបានសម្រេចដូចបំណង ។ បើជាអ្នកប្រកបរបររកស៊ីជួញដូរវិញ គឺមានការប្រទាំងប្រទើសជាមួយអ្នកមានមុខរបរដូចគ្នា ដូច្នេះគួរបើកចិត្តឱ្យទូលាយ ។ រីឯបញ្ហាស្នេហាមានការកាំចិត្ត ព្រោះតែម្នាក់ៗចង់ចាញ់ឈ្នះគ្នានោះឯង ៕

## ឆ្នាំខាល 

អាចពោលបានថា លោកអ្នកមានសេចក្តីសុខក្នុងជីវិត និងការងារ ព្រោះវិបត្តិ និងភាពស្មុគស្មាញដែលមានកន្លងមកក៏បានធូរស្រាលឡើងវិញមួយកម្រិតផងដែរ ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញ ទោះបីជាចេញទៅជួញដូរនៅទីណាក្តី គួរចៀសវាងការដាក់ទុនថ្មីព្រោះអាចនាំឱ្យខាតបង់ ។ រីឯបញ្ហាស្នេហាគូស្នេហ៍ច្រើនប្រចណ្ឌខុសរឿង ៕

## ឆ្នាំថោះ 

រាល់កិច្ចការសព្វបែបយ៉ាងលោកអ្នកអាចជួបនឹងបញ្ហាខ្លះៗ នាគ្រាដំបូងប៉ុន្តែក្រោយមកមិនមានអ្វីជាឧបសគ្គរារាំងទៀតឡើយ ។ ចំពោះអ្នកប្រកបមុខរបររកស៊ីជួញដូរវិញ មានការទិញចូលលក់ចេញគ្រាន់ បើអាចរកផលកម្រៃត្រឡប់មកផ្ទះវិញ យ៉ាងត្រជាក់ចិត្ត ។ រីឯបញ្ហាស្នេហាមានភាពផ្អែមល្ហែម និងស្រស់ស្រាយប្រៀប ដូចត្រីក្នុងទឹកនារដូវខែវស្សាដូច្នេះដែរ ៕

## ឆ្នាំរោង 

រាល់ការបំពេញការងាររបស់លោកអ្នកក្នុងរយៈពេលនេះសុទ្ធតែផ្តល់នូវអត្ថប្រយោជន៍ គួរឱ្យជាទីពេញចិត្តទាំងអស់គ្មានអ្វីមករាំងស្ទះឡើយ ហើយជាងនេះទៀត នោះគម្រោងការដែលបានត្រៀមទុកជាយូរមក ហើយក៏នឹងបានសម្រេចផងដែរ ។ បើជាអាជីវកររកស៊ីវិញ មានការរីកចម្រើនលូតលាស់ទៅមុខជាលំដាប់ ។ រីឯបញ្ហាគូស្នេហ៍ច្រើនយល់ចិត្តគ្នា និងនឹករលឹកគ្នា បើនៅឆ្ងាយ ៕

## ឆ្នាំម្សាញ់ 

លោកអ្នកគួរប្រុងប្រយ័ត្នចំពោះការនិយាយស្តីបន្តិច ពីព្រោះអាចនឹងមានគូសត្រូវចាំចាប់ទោសកំហុសមួលបង្កាច់បង្ខូចកេរ្តិ៍ឈ្មោះរបស់លោកអ្នកឱ្យប្រែក្លាយទៅជាស្មុយអសោចិ៍ ។ សម្រាប់អ្នកប្រកបមុខរបររកស៊ីជួញដូរវិញមានក្រុមមនុស្សតាមឈ្នានីសច្រើន ដូចច្នេះត្រូវប្រយ័ត្នបន្តិចចៀសវាងការបរាជ័យ ។ រីឯបញ្ហាស្នេហាមានភាពចម្រូងចម្រាសដាក់គ្នាបន្តិចបន្តួច ៕

## ឆ្នាំមមី 

រាល់ការស្មុគស្មាញដែលធ្លាប់កើតមានលើលោកអ្នកក្នុងពេលនេះ នឹងត្រូវអហោសិកម្មទាំងអស់ ហើយទ្រព្យដែលរបូតចេញពីដៃទៅនឹងវិលត្រឡប់មកវិញយ៉ាងគ្រប់គ្រាន់ ។ ចំពោះអ្នកប្រកបមុខរបររកស៊ីជួញដូរវិញ ត្រូវគិតគូរឱ្យបានច្បាស់លាស់មុននឹងដាក់ទុនថ្មី ទើបមិនខាតបង់រាល់ការចំណាយទាំងនោះ ។ រីឯបញ្ហាស្នេហាត្រូវចេះពួនជ្រោយចំណងស្នេហាដោយមានភាពផ្អែមល្ហែម ទើបជាការប្រសើរ ៕

## ឆ្នាំមមែ 

រាល់ការបំពេញការងារទាំងឡាយលោកអ្នកមិនមានបញ្ហាអ្វីចោទនោះទេ ប៉ុន្តែក្នុងនោះ សូមប្រយ័ត្នកុំយកអាសាមនុស្សសម្បុរសឱ្យសោះ ព្រោះនាំឱ្យកើតរឿងសៅហ្មងទៅថ្ងៃក្រោយ ។ សម្រាប់អ្នកប្រកបមុខរបររកស៊ីជួញដូរវិញ អាចសន្សំទុកបានខ្លះ ។ រីឯបញ្ហាស្នេហាចូរកុំយកភាពមានះចង់ចាញ់ឈ្នះប្រយ័ត្នកើតមានជម្លោះវិវាទឈានដល់ការប្រេះស្រាំ ៕

## ឆ្នាំវក 

នៅក្នុងរយៈពេលនេះ លោកអ្នកទទួលលាភសក្ការៈពីសាច់ញាតិបងប្អូនដែលជិតស្និទ្ធ ។ ក្រៅពីនោះក៏នៅទទួលបានដំណឹងល្អដែលមានប្រយោជន៍ដល់ជាតិ និងការងាររបស់លោកអ្នកតទៅអនាគតទៀតផង ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញផលកម្រៃទទួលបានកាក់កបគ្រាន់បើតែហាមកុំជួញដូរផ្លូវឆ្ងាយប្រយ័ត្នមានបញ្ហាដល់ខ្លួន ។ រីឯបញ្ហាស្នេហាគូស្នេហ៍អាចមានការរកាំរកូសគ្នាខ្លះ ប៉ុន្តែមិនធ្ងន់ធ្ងរនោះទេ ៕

## ឆ្នាំរកា 

លោកអ្នកនឹងទទួលបាននូវលាភសក្ការៈពីភាគហ៊ុនរកស៊ី និងមិត្តរួមការងារយ៉ាងច្រើនគួរឱ្យពេញចិត្ត ។ លើសពីនេះទៅទៀតគម្រោងការដែលបានត្រៀមទុកនឹងបានសម្រេចដូចបំណងទៀតផង ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញ គួរជួញដូរនៅទីជិតៗទើបសមប្រកប ។ រីឯបញ្ហាស្នេហាគូស្នេហ៍ចេះស្តាប់ឱវាទគ្នា ៕

## ឆ្នាំច 

លោកអ្នកមានភ័ព្វសំណាងល្អក្នុងការងារទទួលរឿងឡើងតួនាទី ឬប្រាក់បៀវត្សរ៍បន្ថែម ។ ជាងនេះទៀតនោះប្រសិនបើចង់ពឹងពាក់អ្នកមានយសស័ក្តិខ្ពង់ខ្ពស់ក្នុងរឿងអ្វីមួយនឹងបាន ដូចបំណងផងដែរ ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញ អាចរកប្រាក់ចំណូលចិញ្ចឹមគ្រួសារបានដោយស្រួលទេ មិនមានអ្វីមករាំងស្ទះឡើយ ។ រីឯបញ្ហាស្នេហាគូស្នេហ៍រមែងចេះអត់ឱនឱ្យគ្នា ៕

## ឆ្នាំកុរ 

លោកអ្នកអាចនឹងមានអារម្មណ៍ច្របូកច្របល់បន្តិចនៅក្នុងរយៈពេលនេះ ព្រោះកិច្ចការដែលថា នឹងទទួលបានផលល្អនោះ វាអាចមានការប្រែប្រួលដោយសារតែមានការរំខានពីអ្នកដទៃ ។ បើចំពោះអ្នកប្រកបមុខរបររកស៊ីជួញដូរវិញ អាចរកផលកម្រៃគ្រាន់ បើគួរជាទីគាប់ប្រសើរជាងមុន ។ រីឯបញ្ហាស្នេហាពុំមានផលរមាស់អ្វីនោះឡើយ ៕

# គន្លឹះងាយៗ វិធីធម្មជាតិទាំង៧យ៉ាងអាចជួយអោយផ្ទៃមុខម៉ត់រលោងបាន

**គ្រប់មនុស្សទាំងអស់តែងរមែងចង់បានមុខម៉ត់ស្រស់ថ្លា ពីព្រោះវាជាការទាក់ទាញផ្នែកសម្រស់មួយ។ ចំពោះអ្នកខ្លះព្យាយាមប្រើប្រាស់ផលិតផលសម្អាង ដើម្បីអាចអោយមុខស្អាតបាន ប៉ុន្តែបែរជាធ្វើអោយមុខមានបញ្ហាកាន់តែខ្លាំងទៅវិញ។ ប៉ុន្តែថ្ងៃនេះប្រហែលជាអ្នកអស់បារម្ភហើយ ពីព្រោះមានវិធីកែខៃផ្ទៃមុខរបស់អ្នកអោយម៉ត់ស្រស់ថ្លាបានជាមួយវិធីសាស្រ្តធម្មជាតិវិញម្តងៈ**

**១-ល្ហុងៈ** ដូចអ្នកបានដឹងហើយ ល្ហុងជាផ្លែឈើធម្មជាតិដែលជំនួយដល់សក់ និងស្បែករបស់អ្នកអោយត្រលប់មកជាផ្ទៃមុខម៉ត់ស្អាតបាន។

**វិធិប្រើៈ** យកសាច់ខាងក្នុងមកលាបលើផ្ទៃមុខរបស់អ្នកអោយសព្វទុកចោលប្រមាណមិនតិចជាងមួយម៉ោង រួចលាងទឹកចេញវិញ។ អ្នកអនុវត្តវិធីនេះ អោយបាន៣ខែយ៉ាងតិច ដូច្នេះអ្នកនឹងឃើញលទ្ធផលថា ផ្ទៃមុខអ្នកនឹងផ្លាស់ប្តូរកម្រិតណា។

**២-ទឹកឃ្មុំៈ** វិធីប្រើគ្រាន់តែយកទឹកឃ្មុំ មកលាបលើមុខអ្នកញឹកញ័ថ្មម។ ជាពិសេសអ្នកគួរតែ



អនុវត្តន៍វិធីនេះ ២ដងក្នុងមួយថ្ងៃ គឺនៅពេលព្រឹក និងពេលរៀបចូលគេង។ បន្ថែមពីនេះទៅទៀត អ្នកនឹងអាចឃើញផ្ទៃមុខអ្នកស្រស់ថ្លាបែបធម្មជាតិបាន ពីព្រោះទឹកឃ្មុំមិនអាចធ្វើអោយមុខអ្នកមានប្រតិកម្មរីក៏មានបញ្ហាទេ ប៉ុន្តែត្រូវប្រាកដ ថាទឹកឃ្មុំគឺសុទ្ធល្អ និងទុកក្នុងទឹកន្លែងត្រឹមត្រូវមិនត្រជាក់ពេក និងមិនក្តៅពេក។

**៣-រមៀត** ប្រហែលជាអ្នកធ្លាប់ស្គាល់រមៀតហើយ វាក៏អាចជួយអោយមុខអ្នកស្រស់



ថ្លា និងម៉ត់បានដែរ។

**វិធីប្រើៈ** បុករមៀតអោយម៉ត់រួចមកលាបលើមុខនៅពេលព្រឹក និងពេលយប់។ ប្រសិនអ្នកមានពេលច្រើន គួរតែឧស្សាហ៍អនុវត្តន៍វិធីនេះជាមួយរមៀតជារៀងរាល់ថ្ងៃ។

**៤-ទឹកដោះគោជូរៈ** ចំពោះទឹកដោះគោជូរ វាក៏ផ្ទុកជាតិទឹកដោះគោដែរ ដូច្នេះវាជាការ



ប្រសើរក្នុងការធ្វើអោយផ្ទៃមុខអ្នកម៉ត់ និងសបាន ។

**វិធីប្រើ** គឺងាយស្រួលគ្រាន់តែចាក់ទឹកដោះគោជូរដាក់លើស្លាបព្រាបាយ រួចយកដៃអ្នកមកប៉ាតលើមុខអោយសព្វ។ ជាពិសេសអ្នកអាចអនុវត្តន៍មួយសប្តាហ៍អោយបាន៤ដង ដើម្បីអាចធ្វើអោយមុខអ្នកម៉ត់ដូចសាច់កូនក្មេង និងការពារមុនខ្សាច់ផងដែរ។

**៥-ត្រសក់ៈ** ត្រសក់ក៏អាចជាបន្លែផង និងឱសថធម្មជាតិជួយព្យាបាលមុខផងដែរ ។



**វិធីប្រើៈ** យកត្រសក់ទៅក្លាសេអោយត្រជាក់មុននឹងអនុវត្តន៍បន្ទាប់មកចិតស្តើងៗមកបិទលើមុខ និងបិទលើភ្នែកផង ដើម្បីជួយកម្ចាត់ស្នាមខ្មៅក្រោមភ្នែក។ ជាពិសេសត្រសក់ក៏ជួយធ្វើអោយស្បែកតឹងណែនបាន។

**៦-ប៉េងប៉ោះៈ** ចំពោះប៉េងប៉ោះដូចនឹងវិធីអនុវត្តន៍ជាមួយត្រសក់ដែរ គឺចិតស្តើងៗមក



បិទលើមុខ។ ការអនុវត្តន៍ជាមួយផ្លែប៉េងប៉ោះជួយអោយមុខអ្នកបំបាត់ស្នាមខ្មៅតូចៗ និងផ្ទៃមុខសស្រស់ថ្លាបាន។

**៧-ស៊ុតលឿងៈ** អ្នកអាចយកស៊ុតលឿងមកក្រឡុកអោយសព្វ រួចលាបលើមុខអ្នក ទុកវាអោយស្ងួតដោយខ្លួនឯង និងបន្ទាប់មកលាងចេញ



ជាមួយទឹកត្រជាក់។ ចំពោះស៊ុតលឿងអាចជួយអោយមុខបំបាត់មុនខ្សាច់តូចៗ និងជួយអោយមុខអ្នកម៉ត់បាន។

វិធីទាំង៧យ៉ាងនេះ អ្នកអាចជ្រើសយកវិធីមួយណាមកអនុវត្តក៏បាន ពីព្រោះវីធីទាំងអស់អាចជួយអ្នកអោយមុខម៉ត់សស្រស់ថ្លាបាន៕



Continued from page 12

## Kanharith Reiterates...

questioned the veracity of Mr. Kanharith's claims about bandwidth.

"We want to have technical experts check if there are really no frequencies," Mr. Ponharith said. "We have seen there are many frequencies for some who ask for TV and radio stations."

The Information Ministry has awarded at least three new television licenses since 2011, government records show. Those stations include the Cambodian News Channel, which is owned by Royal Group chairman Kith Meng, who is close to Prime Minister Hun Sen, and BTV, which is owned by Hun Mana, the prime minister's daughter.

# ខ្មែរអ្នកជាតិនិយម

តពីលេខមុន

ត្រឡប់មកត្រួតត្រាប្រជាជាតិខ្មែរឡើងវិញឡើយ ។

នៅថ្ងៃទី៣១ ឧសភា ១៩៤៦ ក្រុមប្រឹក្សារាជានុសិទ្ធិបានប្រកាសឱ្យប្រើច្បាប់បោះឆ្នោតមួយដែលរៀបចំឡើងដោយគណៈកម្មការសិក្សាបារាំង-ខ្មែរ ។ នៅថ្ងៃទី១ កញ្ញា ១៩៤៦ ការបោះឆ្នោតជាសកលបានធ្វើឡើងជាលើកដំបូងនៅប្រទេសកម្ពុជា ដែលគណបក្សប្រជាធិបតេយ្យបានទទួលជ័យជំនះ៦០%នៃសម្លេងទាំងអស់ គឺក្នុងបណ្ដាកៅអី៦៧នៅក្នុងរដ្ឋសភា ៥០កៅអីបានទៅគណបក្សប្រជាធិបតេយ្យ.១៤កៅអីបានទៅគណបក្សសេរីភាព និង៣កៅអីបានទៅគណបក្សឯកច្ឆន្ទ ។ (ឆ្នាំនោះជាឆ្នាំទី២ ដែលខ្ញុំរៀននៅសាលាបឋមសិក្សាថ្នាក់បញ្ចប់ ព្រោះឆ្នាំ១៩៤៥ ក្នុងប្រទេសកម្ពុជាទាំងមូល គ្មានការប្រឡងទេ ហើយជាពេលដែលខ្ញុំបានស្ម័គ្រចិត្តចូលរួមជាសមាជិកគណៈកម្មការ នៃគណបក្សប្រជាធិបតេយ្យប្រចាំខេត្តស្វាយរៀង ជាមេក្រុមចម្រៀងមួយ"គណបក្សប្រជាធិនតេយ្យ"។ នៅពេលមានការឃោសនាតាមមណ្ឌលបោះឆ្នោតណាមួយ ក្រុមខ្ញុំតែងទៅជាមួយ ។ ម្យ៉ាងទៀតនៅឆ្នាំនោះឯង តាមព្រំដែនខេត្តស្វាយរៀង និងនៅកម្ពុជាក្រោម ពួកយៀកមិញបានលុកលុយរាតត្បាតដុតផ្ទះសម្បែងប្រជាពលរដ្ឋខ្មែរ ហើយប្រជាពលរដ្ឋខ្មែរភាគច្រើននៅតាមព្រំដែន បានភៀសខ្លួនមករស់នៅតាមទីរួមស្រុក រួមខេត្ត ជាពិសេសនៅក្នុងឃុំកំណើតរបស់ខ្ញុំ គឺ ឃុំមេ-សថ្ងក់ ស្រុកស្វាយទាប ខេត្តស្វាយរៀង ។

និពន្ធដោយ ឡឹក សំអឿន ហៅ "ថ្កាយព្រឹក"

នៅថ្ងៃទី២៥ កញ្ញា ១៩៤៦ រដ្ឋសភាបានបើកសម័យប្រជុំទី១ នៅទីចំពោះព្រះភក្រ្តព្រះរាជា ។ រដ្ឋសភាមិនត្រឹមតែពិនិត្យពិភាក្សាច្បាប់ប៉ុណ្ណោះទេ គឺថែមទាំងបានប្រកាសខ្លួនថា ជាសភាតែងតាំងរដ្ឋធម្មនុញ្ញទៀតផង ។ ដោយមានសម្លេងភាគច្រើននៅក្នុងរដ្ឋសភា គណបក្សប្រជាធិបតេយ្យបានទាមទារយកការដឹកនាំរដ្ឋាភិបាលមកកាន់កាប់ ដែលជាច្បាប់ទម្លាប់ក្នុងប្រទេសប្រជាធិបតេយ្យបស្ចឹមទិស ។ នៅចុងឆ្នាំ១៩៤៦ បារាំងបានយកពីសៀមមកវិញ នូវទឹកដីខ្មែរ និងលាវ តាមសន្ធិសញ្ញាក្រុងតូក្យូឆ្នាំ១៩៤១ ។ ក្នុងពេលជាមួយគ្នានោះ រដ្ឋាភិបាល មុនីរ៉េត បានផ្ទេរតំណែងទៅឱ្យរដ្ឋាភិបាលទ្រង់ យុត្តិវង្ស ។ ក្នុងរយៈពេលតែមួយប៉ុណ្ណោះ រដ្ឋាភិបាលទ្រង់យុត្តិវង្ស បានបញ្ចេញគម្រោងរដ្ឋធម្មនុញ្ញមួយ នៅថ្ងៃទី៦ ខែ ឧសភា ឆ្នាំ១៩៤៧ ដែលចែងថា ព្រះរាជាត្រូវផ្ដល់សិទ្ធិសេរីភាពទៅឱ្យប្រជារាស្ត្រខ្មែរ ។ តាមពិតរដ្ឋធម្មនុញ្ញឆ្នាំ ១៩៦៧ នេះ ជាគម្រោងរដ្ឋធម្មនុញ្ញបារាំងកាលពីឆ្នាំ១៩៤៥ បន្ទាប់ពី ដឹហ្គោល បានស្នើសុំ ។ ប្រជាជនបារាំងបានបោះឆ្នោតប្ដូររដ្ឋធម្មនុញ្ញ ហើយជ្រើសរើសក្នុងពេលជាមួយគ្នានោះ នូវភាពព្រាងរដ្ឋធម្មនុញ្ញមួយ ។ សភានោះ មានសម្លេងភាគច្រើនជាពួកឆ្វេងនិយម រួចបានចេញគម្រោងរដ្ឋធម្មនុញ្ញមួយដែលផ្ដល់អំណាចទាំងអស់ទៅរដ្ឋសភា ដូចជាដាក់ឱ្យប្រជាជនបារាំងសម្រេចតាមវិធីប្រជាមតិនៅខែឧសភា ឆ្នាំ១៩៤៦ ហើយដែលត្រូវបានប្រជាជនបារាំងទាត់ចោលក្នុងសម្លេង ៥៣% ទល់នឹង៤៧% ។

ទម្រង់រដ្ឋធម្មនុញ្ញបារាំងចោលនេះឯងហើយ ដែលខ្មែរយកមកធ្វើជាគំរូសម្រាប់រដ្ឋធម្មនុញ្ញខ្មែរឆ្នាំ ១៩៤៧ ដែលបានរៀបរៀងឡើងដោយយុវជនខ្មែរមួយក្រុម ដែលមិនសូវយល់ច្បាស់អំពីស្ថានការណ៍ពិតរបស់ប្រទេសជាតិ និងបំណងរបស់ប្រជារាស្ត្រខ្មែរនាសម័យនោះ ។ ពួកអ្នកតែងរដ្ឋធម្មនុញ្ញខ្មែរនោះ គឺជាពួកអ្នកមានវាសនាខ្ពស់ជាងគេនៅក្នុងសង្គមខ្មែរ ដែលបន្លំយកប្រយោជន៍វណ្ណៈខ្លួនថា ជាប្រយោជន៍ជាតិ ហើយក្រុមនេះឯងដែលដឹកនាំគណបក្សប្រជាធិបតេយ្យ ។ អ្នករៀបរៀងរដ្ឋធម្មនុញ្ញខ្មែរនេះ គ្រាន់តែបន្ថែមការឈ្វេងយល់ជំនាន់នោះ ខ្លះៗប៉ុណ្ណោះ ដូចជាមាត្រា ២១ ដែលចែងថា "អំណាចទាំងឡាយចេញមកពីព្រះរាជា" មាត្រា២៥ថា "រាជបល្ល័ង្កប្រទេសកម្ពុជាជាកេរមរតកអ្នកតស៊ូភេទប្រុសនៃព្រះបាទអង្គដួង"។ រដ្ឋធម្មនុញ្ញខ្មែរឆ្នាំ១៩៤៧នេះ បានផ្ដល់អំណាចទាំងអស់ទៅរដ្ឋសភាពិតមែនហើយ ប៉ុន្តែព្រះរាជាជាអ្នកជ្រើសតែងតាំងនាយករដ្ឋមន្ត្រីដោយខ្លួនឯងគ្រាន់តែសុំសេចក្ដីអនុម័តពីរដ្ឋសភាដែលមានអាណត្តិដល់ទៅ៤ឆ្នាំ ។ សភាជាន់ខ្ពស់មួយបានត្រូវបង្កើតឡើងដោយបានចម្លងយកបែបតាមក្រុមប្រឹក្សាសាធារណរដ្ឋបារាំងទាំងស្រុង គឺក្រុមប្រឹក្សាព្រះរាជាណាចក្រដែលមានមុខនាទីគ្រាន់តែពិគ្រោះពិភាក្សាច្បាប់តែប៉ុណ្ណោះ មានសមាជិកដែលជ្រើសតាំង និងសមាជិកតែងតាំងដោយការបោះឆ្នោតចំពោះបេក្ខជនដែលមានអាយុពី៤០ឆ្នាំឡើងទៅ ។

តទៅលេខក្រោយ

តមកពីទំព័រទី ១៣

## អ្នករាជានិយមសួរពីគតិបណ្ឌិត...

ដើម្បីបង្កើតគណបក្សរបស់ខ្ញុំ និងលើកស្ទួយរាជវង្សានុវង្សឡើងវិញ"។

ព្រះអង្គម្ចាស់ស៊ីសុវត្ថិ សិរីរ័ត្ន ដែលធ្លាប់ធ្វើជាសហរដ្ឋមន្ត្រីក្រសួងការពារជាតិក្នុងរដ្ឋាភិបាលចម្រុះរបស់ព្រះអង្គម្ចាស់នរោត្តម រណឫទ្ធិ ក្នុងទសវត្សរ៍ឆ្នាំ១៩៩០បានមានព្រះបន្ទូលថា ស្មារតីស្វែងរកអំណាចនយោបាយរបស់ព្រះអង្គម្ចាស់នរោត្តម រណឫទ្ធិ អាចនឹងរងសម្ពាធពីមតិដែលយល់ឃើញថា ព្រះធ្លាប់គ្រប់គ្រងដោយគ្មានការប្រុងប្រយ័ត្ន។

ព្រះអង្គម្ចាស់ ស៊ីសុវត្ថ សិរីរ័ត្ន បានមានព្រះបន្ទូលថា "មេដឹកនាំមួយរូបត្រូវទទួលបានកិត្តិស្រឡាញ់ និងការលើកតម្កើងពីប្រជាជន។ ដូច្នេះហើយព្រះអង្គត្រូវមានជំហរឱ្យរឹងមាំ"។ ព្រះអង្គក៏បានមានព្រះបន្ទូលបន្ថែមទៀតថា សេចក្តីអះអាងសារជាថ្មីរបស់ព្រះអង្គម្ចាស់នរោត្តម រណឫទ្ធិ ថានឹងត្រឡប់មកប្រឡូកក្នុងឆាកនយោបាយវិញនោះអាចខ្វះមូលដ្ឋានរៀបចំ។

លោក កែវ ពុទ្ធរស្មី ដែលបានកាន់តំណែងជាប្រធានគណបក្សហ្វ៊ុនស៊ិនប៉ិចជំនួសព្រះអង្គម្ចាស់នរោត្តម រណឫទ្ធិ កាលពីឆ្នាំ២០០៦នោះ និងត្រូវជាស្វាមីរបស់ព្រះអង្គម្ចាស់ក្សត្រីនរោត្តម អរុណ រស្មី ដែលបានដឹកនាំគណបក្សហ្វ៊ុនស៊ិនប៉ិចក្នុងយុទ្ធនាការបោះឆ្នោតជ្រើសតាំងតំណាងរាស្ត្រកាលពីឆ្នាំមុនបានលើកឡើងថាគណបក្សនេះនិងចាំមើលគណបក្សរាជានិយមថ្មីរបស់ព្រះអង្គម្ចាស់នរោត្តម រណឫទ្ធិ។

លោកបានមានប្រសាសន៍ថា "ព្រះអង្គម្ចាស់នរោត្តម រណឫទ្ធិ បានត្រឡប់មក និងត្រឡប់ទៅវិញជាច្រើនលើកច្រើនសារមកហើយ។ និយាយតាមត្រង់ទៅពិបាកព្យាករណាស់ ដូច្នេះខ្ញុំសូមរង់ចាំមើលរយៈពេលប្រាំមួយខែ ឬក៏មួយឆ្នាំដើម្បីឱ្យឃើញភាពច្បាស់លាស់ព្រះអង្គម្ចាស់នរោត្តម រណឫទ្ធិ ឬក៏ចាំមើលថា តើព្រះអង្គគ្រាន់តែមកស្រែករំខានខ្លះៗ ឬយ៉ាងណា"។ លោកបានមានប្រសាសន៍បន្ថែមទៀតថា "យើងនឹងរង់ចាំមើលថា តើព្រះអង្គមានភាពច្បាស់លាស់គ្រប់គ្រាន់សម្រាប់ដឹកនាំគណបក្សហ្វ៊ុនស៊ិនប៉ិចដែរ ឬទេ"។

លោក ញឹក ប៊ុនឆៃ ដែលបច្ចុប្បន្នជាឧបនាយករដ្ឋមន្ត្រីក្នុងរដ្ឋាភិបាលបច្ចុប្បន្ន និងជាសមាជិកគណបក្សហ្វ៊ុនស៊ិនប៉ិចដែលកាន់តំណែងក្នុងកិច្ចការសាធារណៈបានលើកឡើងថា សេចក្តីសម្រេចព្រះទ័យរបស់ព្រះអង្គម្ចាស់នរោត្តម រណឫទ្ធិ ថា នឹងបង្កើតគណបក្សថ្មីនោះ គឺជាការបិទបាំងចេតនារបស់ព្រះអង្គក្នុងការជួយបង្រួបបង្រួមជាតិ។

លោកឧត្តមសេនីយ៍ ញឹក ប៊ុនឆៃ មានប្រសាសន៍ថា "ព្រះអង្គម្ចាស់អង្គឯងស្ថិតក្នុងរាជវង្សានុវង្ស និងជាព្រះរាម ហើយព្រះមហាក្សត្រី អារុណ រស្មី ជាព្រះអនុជ។ តើព្រះអង្គអាចរួបរួមគ្នាបានដែរឬទេ បើមិនអាចទេនោះ តើព្រះអង្គទៅរួបរួមជាមួយអ្នកផ្សេងដោយរបៀបណា"។

ព្រះអង្គម្ចាស់នរោត្តម រណឫទ្ធិ មិនបានឆ្លើយតបទៅនឹងសំណើសុំធ្វើសេចក្តីអត្ថាធិប្បាយទាក់ទងនឹងសេចក្តីសម្រេចព្រះទ័យរបស់ព្រះអង្គក្នុងការបង្កើតគណបក្សរាជានិយមថ្មីមួយឡើយ។

ព្រះអង្គម្ចាស់ ស៊ីសុវត្ថិ ធម្មិកោ ដែលជាសមាជិកស្ថាបនិកគណបក្សហ្វ៊ុនស៊ិនប៉ិច និងបានយាងចូលជាសមាជិកគណបក្សសង្គ្រោះជាតិកាលពីឆ្នាំមុននោះ បានមានព្រះបន្ទូលថា ពេលវេលាសម្រាប់នយោបាយរាជានិយមនៅក្នុងប្រទេសកម្ពុជាធ្លាប់មានប៉ុន្តែបានលេចបាត់ទៅវិញហើយ។

ព្រះអង្គម្ចាស់ ស៊ីសុវត្ថិ ធម្មិកោ បានមានព្រះបន្ទូលដូច្នេះថា "នៅប្រទេសកម្ពុជាមិនមានកន្លែងសម្រាប់នយោបាយរាជានិយមទៀតទេ"។ ព្រះអង្គម្ចាស់ ស៊ីសុវត្ថិ ធម្មិកោ ក៏បានមានព្រះបន្ទូលបន្ថែមដូច្នេះថា "នៅពេលបច្ចុប្បន្ននៅក្នុងប្រទេសកម្ពុជាឆាកនយោបាយមានតែគណបក្សនយោបាយតែពីរប៉ុណ្ណោះ គឺគណបក្សប្រជាជនកម្ពុជាឱ្យដែលជាគណបក្សកំពុងកាន់អំណាច និងគណបក្សមួយទៀតគឺគណបក្សសង្គ្រោះជាតិឱ្យដែលជាគណបក្សប្រឆាំង"។ **សុធា**

តមកពីទំព័រទី ១២

## លោក ខៀវ កាញារីទ្ធ ...

ជាតិដែលបានស្នើសុំអាជ្ញាប័ណ្ណបង្កើតស្ថានីយទូរទស្សន៍ផ្ទាល់ខ្លួនដើម្បីប្រកួតប្រជែងជាមួយស្ថានីយទូរទស្សន៍ជាច្រើននាពេលបច្ចុប្បន្នដែលសុទ្ធតែគាំទ្រគណបក្សប្រជាជនកម្ពុជារបស់លោកនាយករដ្ឋមន្ត្រី ហ៊ុន សែន នោះ ក៏បានចោទសួរពីសច្ចភាពនៃការបញ្ជាក់អះអាងរបស់លោក ខៀវ កាញារីទ្ធ ដែរពាក់ព័ន្ធនឹងប្រេកង់នេះ។ លោកបានមានប្រសាសន៍បន្ថែមទៀតថា "យើងចង់ឱ្យក្រុមបច្ចេកទេសពិនិត្យមើលថា តើពិតជាគ្មានប្រេកង់មែន ឬយ៉ាងណា។ យើងមើលឃើញថា មានប្រេកង់ជាច្រើនសម្រាប់អ្នកមួយចំនួនដែលស្នើសុំបង្កើតស្ថានីយទូរទស្សន៍ និងវិទ្យុ"។

ឯកសាររបស់រដ្ឋាភិបាលបង្ហាញថា ក្រសួងព័ត៌មានបានផ្តល់អាជ្ញាប័ណ្ណដល់ស្ថានីយទូរទស្សន៍ថ្មីយ៉ាងហោចណាស់ចំនួនបីចាប់ តាំងពីឆ្នាំ២០១១មក។ ស្ថានីយទូរទស្សន៍ទាំងនោះរួមមានទាំងបណ្តាញព័ត៌មានកម្ពុជា CNC របស់លោក គិត ម៉េង ប្រធានក្រុមហ៊ុនរ៉ូយាល់គ្រុបដែលមានទំនាក់ទំនងជិតស្និទ្ធជាមួយលោកនាយករដ្ឋមន្ត្រី ហ៊ុន សែន និងស្ថានីយទូរទស្សន៍ BTV របស់លោកស្រី ហ៊ុន ម៉ាណា ដែលត្រូវជាកូនស្រីបង្កើតរបស់លោកនាយករដ្ឋមន្ត្រីផងដែរ៕ **សុខុម**

# រមណីយដ្ឋានវប្បធម៌ និងធម្មជាតិភ្នំប្រុស_ភ្នំស្រី

បើយើងធ្វើដំណើរចេញពីផ្លូវបំបែកស្កុនតាមផ្លូវជាតិលេខ៧មុន និងដល់ក្រុងកំពង់ចាមប្រមាណ៧គីឡូម៉ែត្រ ដោយក្រឡេកមើលខាងឆ្វេងដៃយើងនឹងបានឃើញក្លោងទ្វារ ឬចូលរមណីយដ្ឋានភ្នំប្រុសភ្នំស្រី ។ ការក្រឡេកឃើញពីចម្ងាយធ្វើឱ្យអ្នកដំណើរនិងភ្ញៀវទេសចរទាំងឡាយមិនអាចខកខាននឹងចូលទៅទស្សនាទីនេះឡើយ ។ ជារៀងរាល់ថ្ងៃ ភ្នំប្រុស និងភ្នំស្រី តែងមានភ្ញៀវទៅលេងកម្សាន្តនៅទីនោះជាហូរហែអ្នកធ្វើដំណើរតែងតែសរសើរមិនដាច់ពីមាត់ថាជាវប្បធម៌និងធម្មជាតិដ៏ល្អ ។

ប្រជាពលរដ្ឋរស់នៅខេត្តកំពង់ចាមភាគច្រើនគឺយុវសិស្សតែងនាំគ្នាទៅលេងកម្សាន្តនៅភ្នំប្រុស-ភ្នំស្រី ស្ទើររាល់ថ្ងៃឱ្យតែមានឱកាសឬម៉ោងទំនេរពីការសិក្សាដោយពួកគេនាំគ្នាទៅជាក្រុមៗខ្លះជិះកង់ ឬជិះម៉ូតូដោយសារតែទីរមណីយដ្ឋាន ភ្នំប្រុស-ភ្នំស្រី ស្ថិតនៅមិនឆ្ងាយពីរូមខេត្តកំពង់ចាមផ្លូវធ្វើដំណើរក៏ងាយស្រួល ។ ចំពោះចាស់ៗវិញ គឺគេច្រើននិយមទៅកម្សាន្តនៅទីនោះទាំងក្រុមគ្រួសារនៅពេលថ្ងៃឈប់សម្រាកពីការងារដូចជាថ្ងៃសៅរ៍ ឬថ្ងៃអាទិត្យ និងថ្ងៃបុណ្យទានជាដើម ។ មិនត្រឹមតែអ្នករស់នៅខេត្តកំពង់ចាមទេ សូម្បីអ្នករស់នៅទីក្រុងភ្នំពេញ និងខេត្តមួយចំនួនក៏បាននាំក្រុមគ្រួសារមិត្តភក្តិទៅលេងកម្សាន្តទីនោះដែរព្រោះតែគេយល់ថា ជាអតីតទីកន្លែងដែលមនុស្សប្រុស និងមនុស្សស្រីសម័យដើមនាំគ្នាភ្នាល់ក្នុងការពូនដីបង្កើតធ្វើជាភ្នំបើខាងប្រុសពូនភ្នំបានខ្ពស់ជាងភ្នំខាងស្រីគឺឱ្យខាងស្រីចូលដណ្តឹងប្រុសៗធ្វើជាប្តីតែបើខាងស្រីពូនភ្នំបានខ្ពស់ជាងគឺត្រូវតែខាងប្រុសចូលស្តីដណ្តឹងស្រីៗធ្វើជាប្រពន្ធ ។ ព្រោះតែចាញ់ល្បិចស្រីៗទើបខាងភ្នំប្រុសទាបជាងខាងភ្នំស្រីហេតុនេះហើយដែលនាំឱ្យប្រុសៗត្រូវតែចូលស្តីដណ្តឹងខាងស្រីមានជាប់ជារៀងរហូតមក ។

នៅលើភ្នំប្រុសមានកន្លែងគោរពសក្ការៈជាច្រើនដូចជាប្រាសាទបុរាណដែលកសាងពីថ្មបាយក្រៀម.ព្រះវិហារធំ,ចេតិយ...។ ចុះពីភ្នំប្រុសតាមជណ្តើរចំហៀងខាងជើងទៅកាន់ជើងភ្នំនឹងឃើញវត្តហៅវត្តសមាធិដ្ឋានភ្នំប្រុសដោយរៀបចំឱ្យមានសោភណភាពយ៉ាងស្រស់បំព្រងក្រៅពីមានដើមផ្កាចម្រុះពណ៌ និងដើមឈើធំៗម្លប់ត្រឈៃក៏មានការកសាងរូបសំណាកពុទ្ធប្រវត្តិ. បណ្ណាល័យ. សាលាឆាន់. ចេតិយមាសតម្កល់ឆ្អឹងរបស់ជនរងគ្រោះដែលត្រូវសម្លាប់កាលពីក្នុងរបបវាលពិឃាតខ្មែរក្រហម ប៉ុល ពត ។





នៅទិសខាងជើងចម្ងាយប្រមាណជាមួយគីឡូម៉ែត្រពីភ្នំប្រុស គឺភ្នំស្រីជាភ្នំដែលខ្ពស់ជាងភ្នំប្រុសមានជណ្តើរ២១៧ កាំ កម្ពស់ ១១៤ ម៉ែត្រកំពូលភ្នំរាងស្រួច ។ នៅលើកំពូលភ្នំស្រីមានកន្លែងសម្រាប់ភ្ញៀវអង្គុយលម្ហែមើលទេសភាពនានាលើកំពូលភ្នំ ពិសេសទិដ្ឋភាពដ៏ល្អនៃខេត្តកំពង់ចាមដែលគេអាចមើលឃើញបានយ៉ាងច្បាស់ ។ កាលពីអំឡុងឆ្នាំ១៩៧៥-៧៩ ដែលជារបបខ្មែរក្រហម ប៉ុល ពត កាន់កាប់អំណាចពួកវាប្រែក្លាយទីបរិវេណភ្នំប្រុសទៅជាមន្ទីរឃុំឃាំងមួយដ៏ធំសម្រាប់ធ្វើទារុណកម្មលើប្រជាពលរដ្ឋខ្មែរក្នុងខេត្តកំពង់ចាម ។ ជាក់ស្តែងរូបតោថ្មបុរាណនៅលើភ្នំប្រុសដែលបន្សល់ទុកមកដល់សព្វថ្ងៃគេឃើញមានបន្សល់ទុកនូវស្លាកស្នាមរបស់ពួកឃាតកវាបានយកកាំបិត ពូថៅ សម្រាប់ធ្វើឃាតមនុស្សទៅសំលៀងលើគូទរបស់តោថ្មឡើងខូង ។ រីឯនៅជើងភ្នំប្រុសគឺសុទ្ធតែជារណ្តៅសាកសពដែលពួកឃាតកអាវខ្មៅវាបានសម្លាប់រួចហើយយកទៅកប់នៅទីនោះប្រមាណជារាប់ម៉ឺននាក់ឯណោះ ។ ពេលនេះភ្នំប្រុសលែងជាទីក្រៀមក្រោះដូចពេលមុនទៀតហើយ សព្វថ្ងៃគេបានរៀបចំឱ្យក្លាយជារមណីយដ្ឋានវប្បធម៌ និងធម្មជាតិដែលមានការទាក់ទាញដល់ភ្ញៀវទេសចរឱ្យចូលចិត្តទៅលេងកម្សាន្តនៅទីនោះ ៕



